

ក្រសួងអប់រំ យុវជន និងកីឡា
នាយកដ្ឋានបឋមសិក្សា

# កម្រងកិច្ចការផ្ទះ

# ភាសាខ្មែរ

## ថ្នាក់ទី៣



# កិច្ចការផ្ទះ

# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី១ សាលាកុមារមេត្រី

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** (១០ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

សាលារៀនខ្ញុំ ជាសាលាកុមារមេត្រី។

សាលារៀននេះសង់លើទីទួល មានបរិវេណធំទូលាយ និងរបងព័ទ្ធជុំវិញ។ ក្នុងបរិវេណសាលារៀន មានអគារបីខ្នង ដប់ប្រាំបីបន្ទប់។ នៅក្នុងទីធ្លាមានដងទង់ជាតិ សួនច្បារ សួនកុមារ ទីលានកីឡា និងដើមឈើធំៗ។ នៅខាងក្រោយអគារ មានសួនជីវៈចម្រុះ សួនបន្លែ និងបង្គន់អនាម័យសម្រាប់សិស្សប្រុស ស្រីផ្សេងពីគ្នា។ ក្នុងបន្ទប់នីមួយៗ មានតុ កៅអី ក្ដារខៀន តាមជញ្ជាំងមានរូបភាព ពាក្យស្លោក និងមានតាំងស្នាដៃសិស្ស។ល។ សាលារៀនខ្ញុំស្អាតគ្មានសំរាម និងមានពណ៌បៃតង ស្រស់ បំព្រងជានិច្ច។

សិស្សទាំងអស់ពេញចិត្តនឹងការសិក្សានៅក្នុងសាលារៀននេះណាស់។ នៅចុងឆ្នាំពួកគេបានឡើងថ្នាក់ទាំងអស់គ្នា ហើយគ្មានសិស្សបោះបង់ចោលការសិក្សាឡើយ។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ (១០ពិន្ទុ)

១- តើសាលារៀននេះមានបរិវេណដូចម្ដេច? (២ពិន្ទុ)

☐ ក. តូច ☐ ខ. ចង្អៀត

☐ គ. ស្អាត ☐ ឃ. ធំទូលាយ និងរបងព័ទ្ធជុំវិញ

២- តើក្នុងបរិវេណសាលារៀននេះ មានអគារប៉ុន្មានខ្នង? (២ពិន្ទុ)

☐ ក. មួយខ្នង ☐ ខ. ពីរខ្នង

☐ គ. បីខ្នង ☐ ឃ. បួនខ្នង

៣- តើសាលារៀននេះ មានប៉ុន្មានបន្ទប់? (២ពិន្ទុ)

☐ ក. ដប់ប្រាំបន្ទប់ ☐ ខ. ដប់ប្រាំមួយបន្ទប់

☐ គ. ដប់ប្រាំពីរបន្ទប់ ☐ ឃ. ដប់ប្រាំបីបន្ទប់

៤- តើមុនពេលចូលរៀន សិស្សទាំងអស់តែងជួបជុំគ្នានៅឯណា? (២ពិន្ទុ)

☐ក. មុខសួនច្បារ ☐ខ. នៅមុខខ្លោងទ្វារសាលា

☐គ. នៅដងទង់ជាតិ ☐ឃ. នៅមុខទីចាត់ការ

៥- ចូររកបដិសព្ទនឹងពាក្យ " ទូលាយ " ។ (២ពិន្ទុ)

☐ក. រលាយ ☐ខ. ចង្អៀត

☐គ. សម្បើម ☐ឃ. ធំ

**សំណេរ** (១០ពិន្ទុ)

១- ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- កុមារមេត្រី ( )..........................................................................................................
- បដិសព្ទ ( )..........................................................................................................
- សួនជីវៈចម្រុះ ( )..........................................................................................................

..........................................................................................................

២- ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញល្បះខាងក្រោម ឱ្យបានត្រឹមត្រូវ។ (៣ពិន្ទុ)

| | | | |
|---|---|---|---|
| បៃតង | ដងទង់ជាតិ | មេត្រី | សំរាម |

ក. សាលារៀនខ្ញុំ ជាសាលារៀនកុមារ......................។

ខ. នៅក្នុងទីធ្លាសាលាមាន........................សួនច្បារ សួនកុមារ ទីលានកីឡា និងដើមឈើធំៗ។

គ. សាលារៀនខ្ញុំស្អាតគ្មាន.....................និងមានពណ៌.....................ស្រស់បំព្រងជានិច្ច។

៣- ចូររៀបពាក្យ ឬកន្សោមពាក្យខាងក្រោមទៅជាល្បះ ឱ្យបានត្រឹមត្រូវ។ (២ពិន្ទុ)

| | | | | | |
|---|---|---|---|---|---|
| ដើម្បី | ខិតខំ | រៀន | ក្លាយជា | គ្រូបង្រៀន។ | ខ្ញុំ |

..........................................................................................................

| | | | | | |
|---|---|---|---|---|---|
| ស្រលាញ់ | នេះ | ខ្ញុំ | សាលារៀន | ណាស់។ | ខ្លាំង |

..........................................................................................................

៤- ចូរតែងល្បះតាមរូបភាពខាងក្រោមឱ្យបានពីរល្បះ។ (២ពិន្ទុ)




..........................................................................

..........................................................................

..........................................................................

..........................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣
មេរៀនទី២ វេវចនសព្ទ

សាលាបឋមសិក្សា...............................

ឈ្មោះសិស្ស.......................................




**អំណាន** (១០ពិន្ទុ)

ចូរអានឧទាហរណ៍ខាងក្រោម រួចឆ្លើយនឹងសំណួរ។

ឧទាហរណ៍ទី១

១. សុខាសំពះលាម្ដាយឪពុកមុនពេលទៅសាលារៀន។

២. ម៉ែជូនកូនទៅចុះឈ្មោះចូលរៀន។

៣. សុភាពសុំលុយម៉ាក់ទិញសៀវភៅ។

៤. យើងជាកូន ត្រូវគោរពមាតាបិតា។

ឧទាហរណ៍ទី២

ថ្ងៃនេះ ជាថ្ងៃចូលរៀនដំបូង។ កុមារាកុមារីទាំងឡាយធ្វើដំណើរយ៉ាងប្រញាប់ប្រញាល់សំដៅទៅសាលារៀន។ លោកគ្រូ អ្នកគ្រូរូតរះទៅសាលារៀន រង់ចាំទទួលសិស្សទាំងឡាយដោយក្ដីរីករាយ។ គេឃើញ ឪពុកម្ដាយម្នីម្នាដឹកដៃកូនចូលក្នុងបរិវេណសាលារៀន។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយដែលត្រឹមត្រូវ (១០ពិន្ទុ)

១- តើសុខាសំពះលានរណា មុនពេលទៅសាលារៀន? (២ពិន្ទុ)

☐ ក. ប្អូន ☐ ខ. ម្ដាយឪពុក

☐ គ. មិត្តភក្តិ ☐ ឃ. លោកគ្រូ អ្នកគ្រូ

២- តើនរណាជូនកូនទៅចុះឈ្មោះចូលរៀន? (២ពិន្ទុ)

☐ ក. ម៉ែ ☐ ខ. បង

☐ គ. យាយ ☐ ឃ. តា

៣- តើសុភាពសុំលុយនរណាទិញសៀវភៅ? (២ពិន្ទុ)

☐ ក. បង ☐ ខ. ម៉ាក់

☐ គ. មីង ☐ ឃ. ពូ

៤- តើក្នុងនាមយើងជាកូនត្រូវគោរពដឹងគុណនរណា? (២ពិន្ទុ)

☐ក. មិត្តភក្តិ ☐ខ. ចាស់ព្រឹទ្ធាចារ្យ

☐គ. មាតាបិតា ☐ឃ. អ្នកជិតខាង

៥- ចូររកវេវចនសព្ទនឹងពាក្យ " រៀន " ? (២ពិន្ទុ)

☐ក. ចេះ ☐ខ. សង្វាត

☐គ. សិក្សា ☐ឃ. ខិតខំ

**សំណេរ** (១០ពិន្ទុ)

១- ដូចម្ដេចដែលហៅថា វេវចនសព្ទ? (៣ពិន្ទុ)

វេវចនសព្ទ គឺជា ..............................................................................................................

..............................................................................................................................

២- ចូរប្អូនស្រង់ពាក្យដែលជាវេវចនសព្ទនឹងពាក្យ " ម្ដាយ " ក្នុងឧទាហរណ៍ទី១។ (២ពិន្ទុ)

..............................................................................................................................

៣- ចូរប្អូនស្រង់ពាក្យដែលជាវេវចនសព្ទនឹងពាក្យ " ប្រញាប់ " ក្នុងឧទាហរណ៍ទី២។ (២ពិន្ទុ)

..............................................................................................................................

៤- ចូរតែងល្បះដោយប្រើវេវចនសព្ទនឹងពាក្យ " ឪពុក " ។ (៣ពិន្ទុ)

..............................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៣ សិស្សឧស្សាហ៍

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** (១០ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

សុខា ជាសិស្សឧស្សាហ៍ ។

រាល់ថ្ងៃ នាងទៅរៀនទៀងទាត់ និងទាន់ពេលជានិច្ច។ សុខាគោរពបទបញ្ជារបស់សាលារៀនបានត្រឹមត្រូវ។ ក្នុងថ្នាក់រៀន នាងយកចិត្តទុកដាក់ ស្តាប់គ្រូពន្យល់ និងហ៊ានជម្រាបសួរគ្រូនៅពេលមិនយល់។ ពេលខ្លះនាងជួយពន្យល់មិត្តរួមថ្នាក់ ដែលរៀនយឺតទៀតផង។ សុខាតែងណែនាំមិត្តភក្តិ កុំឱ្យដើរលេងផ្តេសផ្តាស។ នៅផ្ទះ សុខាខំធ្វើលំហាត់ អានសៀវភៅ សិក្សាស្រាវជ្រាវ និងជួយធ្វើកិច្ចការផ្ទះ។

ឪពុកម្តាយសុខា សប្បាយចិត្តណាស់ ព្រោះឃើញកូនខិតខំរៀនសូត្រ និងទទួលបានលទ្ធផលល្អជាទីគាប់ចិត្ត។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ (១០ពិន្ទុ)

១- តើសុខាជាសិស្សដូចម្តេច? (២ពិន្ទុ)

☐ ក. ដើរលេងច្រើន
☐ ខ. តមាត់ជាមួយគ្រូ
☐ គ. ឧស្សាហ៍រៀនសូត្រ
☐ ឃ. បង្កជម្លោះក្នុងថ្នាក់រៀន

២- តើនៅក្នុងថ្នាក់រៀនសុខា ធ្វើអ្វីខ្លះ? (២ពិន្ទុ)

☐ ក. ឡូឡា និងរំខានមិត្តភក្តិ
☐ ខ. ខ្ជិលរៀន និងនាំមិត្តភក្តិលេង
☐ គ.មិនស្តាប់គ្រូពន្យល់ និងបង្កជម្លោះ
☐ ឃ. យកចិត្តទុកដាក់រៀនសូត្រ និងជួយមិត្តភក្តិ

៣- តើនៅផ្ទះ សុខាបានធ្វើអ្វីខ្លះ? (២ពិន្ទុ)

☐ ក. មិនស្តាប់បង្គាប់ឪពុកម្តាយ
☐ ខ. ខិតខំរៀនបន្ថែម និងជួយធ្វើការងារផ្ទះ
☐ គ. មើលទូរសព្ទ និងទូរទស្សន៍
☐ ឃ. ដើរលេង និងរំខានឪពុកម្តាយ

៤- ហេតុអ្វីបានជាឪពុកម្ដាយសុខាសប្បាយចិត្ត? (២ពិន្ទុ)

☐ក. សុខាជាក្មេងឆ្លាត ☐ខ. ឃើញកូនខិតខំរៀនសូត្រ និងរៀនពូកែ

☐គ. រកការងារបានធ្វើ ☐ឃ. រកលុយបានច្រើន

៥- ចូរគូសភ្ជាប់ពីសំណេរពាក្យ ទៅនឹងសំណួរពាក្យ។ (២ពិន្ទុ)

| សំណេរពាក្យ | សំណួរពាក្យ |
|---|---|
| មិត្តភក្តិ | [ ឡាត់- ធៈ - ផល់ ] |
| ឧស្សាហ៍ | [ បត់ - បញ់ - ជា ] |
| បទបញ្ជា | [ មិត - ភាក់ ] |
| លទ្ធផល | [ អ៊ុស - សា ] |

**សំណេរ** (១០ពិន្ទុ)

១- ចូរពន្យល់ពាក្យ “ ឧស្សាហ៍ មិត្តភក្តិ បទបញ្ជា ” ។ (៣ពិន្ទុ)

- ឧស្សាហ៍ ( )...............................................................................................
- មិត្តភក្តិ ( )...............................................................................................
- បទបញ្ជា ( )...............................................................................................

២- ចូររកបដិសព្ទនឹងពាក្យ “ ហ៊ាន ” ។ (១ពិន្ទុ)

.......................................................................................................................

៣- ចូររកវេវចនសព្ទនឹងពាក្យ “ ឪពុក ” ។ (១ពិន្ទុ)

.......................................................................................................................

៤- ចូរជ្រើសរើសពាក្យក្នុងប្រអប់ ទៅបំពេញឈ្លោះតាមរូបភាពខាងក្រោមឱ្យបានត្រឹមត្រូវ ។ (៣ពិន្ទុ)

| ការងារ | បង្រៀន | អាន |
|---|---|---|







ក- សុខា..........សៀវភៅនៅផ្ទះ។ ខ. សុខាជួយធ្វើ ............ផ្ទះ។ គ. សុខាជួយ...........មិត្តភក្តិរួមថ្នាក់។

៥. តើសុខាតែងណែនាំមិត្តភក្តិដូចម្ដេច? (២ពិន្ទុ)

.......................................................................................................................

.......................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣
## មេរៀនទី៤ ការសម្អាតថ្នាក់រៀន

សាលាបឋមសិក្សា..............................

ឈ្មោះសិស្ស......................................




**អំណាន** (១០ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

ការសម្អាតថ្នាក់រៀន ជាភារកិច្ចរបស់យើងទាំងអស់គ្នា។

សិស្សថ្នាក់ខ្ញុំ ប្តូរវេនគ្នាសម្អាតបន្ទប់រៀនរៀងរាល់ថ្ងៃ។ ព្រឹកនេះ ដល់វេនក្រុមខ្ញុំសម្អាតបន្ទប់រៀន។ មិត្តភក្តិដែលជាសមាជិកក្រុមទាំងអស់នាំគ្នាទៅសាលារៀនមុនម៉ោងសិក្សាដោយយកអំបោស កន្ទប និងធុងទឹកទៅជាមួយផង។ ពួកយើងនាំគ្នាបោសបន្ទប់រៀន ជូតតុ កៅអី ទ្វារ និងបង្អួច។ អ្នកខ្លះ ប្រមូលសំរាម កម្ទេចកម្ទី កើបធូលីយកទៅចោលក្នុងធុងសំរាម។

ថ្នាក់រៀនខ្ញុំស្អាតជានិច្ច ដោយសិស្សក្នុងថ្នាក់ចូលរួមសម្អាតទាំងអស់គ្នា។ គ្រូតែងសរសើរពួកយើងគ្រប់ៗគ្នា។

“ អនាម័យនាំមកនូវសុខភាព ”

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ (១០ពិន្ទុ)

១- តើការសម្អាតថ្នាក់រៀន ជាភារកិច្ចរបស់អ្នកណា? (២ពិន្ទុ)

☐ ក. យើងទាំងអស់គ្នា ☐ ខ. នាយកសាលា

☐ គ. អាណាព្យាបាលសិស្ស ☐ ឃ. គ្រូបង្រៀន

២- តើក្នុងការសម្អាតថ្នាក់រៀន គេបែងចែកដូចម្តេច? (២ពិន្ទុ)

☐ ក. ម្នាក់ត្រូវសម្អាតពេញមួយឆ្នាំ ☐ ខ. អ្នករៀនខ្សោយត្រូវសម្អាតថ្នាក់

☐ គ. ប្តូរវេនគ្នារៀងរាល់ថ្ងៃ ☐ ឃ. អ្នករៀនពូកែមានសិទ្ធិបញ្ជា

៣- តើសមាជិកក្រុមដែលត្រូវវេនសម្អាតថ្នាក់ត្រូវធ្វើដូចម្តេច? (២ពិន្ទុ)

☐ ក. ទៅយឺតម៉ោងបន្តិច ☐ ខ. ទៅមុនម៉ោងសិក្សា

☐ គ. គេចមិនជួយក្រុម ☐ ឃ. ទៅតាមម៉ោងដូចសព្វមួយដង

៤- តើឈ្មោះមួយណាទាក់ទងនឹងខ្លឹមសារអត្ថបទខាងលើ? (២ពិន្ទុ)

☐ក. ថ្ងៃនេះយើងត្រូវសម្អាតផ្ទះ ☐ខ. ថ្ងៃនេះយើងត្រូវទៅស្រែ

☐គ. ថ្ងៃនេះយើងត្រូវវេនសម្អាតបន្ទប់រៀន ☐ឃ. ថ្ងៃនេះយើងត្រូវទៅប្រឡង

៥- ចូររៀបព្រឹត្តិការណ៍តាមលំដាប់អត្ថបទឡើងវិញ ដោយបង់លេខក្នុងប្រអប់ឱ្យបានត្រឹមត្រូវ ។ (២ពិន្ទុ)

☐អ្នកខ្លះប្រមូលសំរាម កម្ទេចកម្ទី កើបធូលីយកទៅចោលក្នុងធុងសំរាម។

☐គ្រូបានសរសើរ ពួកយើងគ្រប់ៗគ្នា។

☐ពួកយើងនាំគ្នាបោសបន្ទប់រៀន ជូតតុ កៅអី ទ្វារ និងបង្អួច។

☐មិត្តភក្តិដែលជាសមាជិកក្រុមទាំងអស់នាំគ្នាទៅសាលារៀនមុនម៉ោងសិក្សា។

**សំណេរ** (១០ពិន្ទុ)

១- ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- ភារកិច្ច ( )..........................................................................................
- សមាជិក ( )..........................................................................................
- កន្ទប ( )..........................................................................................

២- ចូររកបដិសព្ទនឹងពាក្យ " ពង្រាយ " ។ (១ពិន្ទុ)

..........................................................................................

៣- ចូររកវេវចនសព្ទនឹងពាក្យ " មិត្តភក្តិ " ។ (១ពិន្ទុ)

..........................................................................................

៤- ចូរជ្រើសរើសពាក្យ ឬកន្សោមពាក្យក្នុងប្រអប់ ទៅបំពេញឈ្មោះខាងក្រោមឱ្យបានត្រឹមត្រូវ។ (៣ពិន្ទុ)

| | | | |
|---|---|---|---|
| ជានិច្ច | បន្ទប់រៀន | សម្អាត | ចូលរួម |

ក. ព្រឹកនេះ ដល់វេនក្រុមខ្ញុំ.................បន្ទប់រៀន។

ខ. ពួកយើងនាំគ្នាបោសសម្អាត....................ជូតតុ កៅអី ទ្វារ និងបង្អួច។

គ. ថ្នាក់រៀនខ្ញុំស្អាត............. ដោយសិស្សក្នុងថ្នាក់....................សម្អាតទាំងអស់គ្នា។

៥- ចូរតែងឈ្មោះតាមរូបភាពខាងក្រោម។ (២ពិន្ទុ)





.......................................................... ..........................................................

.......................................................... ..........................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣
មេរៀនទី៥ ពាក្យចួន

សាលាបឋមសិក្សា.................................

ឈ្មោះសិស្ស.......................................




**អំណាន** (១០ពិន្ទុ)

ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ។

សម្ភារៈសិក្សា (បទកាកគតិ)

ប្រដាប់ប្រដា សម្រាប់សិក្សា មានច្រើនអនេក
ក្តារបិកសៀវភៅ កាតាបល្អប្លែក បន្ទាត់ជ័រដែក
ប្រើគូសសរសេរ។

ជ័រលុបខ្មៅដៃ ទុកប្រើរាល់ថ្ងៃ សប្បាយម្ល៉េះទេ
ខិតខំសូត្ររៀន មិនចម្លងគេ កុំនៅទំនេរ
ទើបមានប្រយោជន៍។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ (១០ពិន្ទុ)

១- តើមេសូត្រខាងលើនិយាយពីអ្វី? (២ពិន្ទុ)

☐ក. ការខិតខំរៀនសូត្រ ☐ខ. សម្ភារៈសិក្សា

☐គ. ការគោរពទង់ជាតិ ☐ឃ. ការចូលរៀន

២- តើមេសូត្រខាងលើក្នុងមួយវគ្គ មានប៉ុន្មានឃ្លា? (២ពិន្ទុ)

☐ក. ប្រាំពីរឃ្លា ☐ខ. បីឃ្លា

☐គ. បួនឃ្លា ☐ឃ. ប្រាំមួយឃ្លា

៣- តើឃ្លានីមួយៗ មានប៉ុន្មានព្យាង្គ? (២ពិន្ទុ)

☐ក. បីព្យាង្គ ☐ខ. បួនព្យាង្គ

☐គ. ប្រាំព្យាង្គ ☐ឃ. ប្រាំពីរព្យាង្គ

៤- តើពាក្យ " ប្រដា " ក្នុងល្បះទីមួយ ចួននឹងពាក្យអ្វី? (២ពិន្ទុ)

- ☐ក. ប្លែក ☐ខ. អនេក
- ☐គ. សម្រាប់ ☐ឃ. សិក្សា

៥- តើពាក្យ " អនេក " ក្នុងល្បះទីមួយ ចួននឹងពាក្យអ្វីខ្លះ? (២ពិន្ទុ)

- ☐ក. ប្លែក ដែក ☐ខ. សៀវភៅ កាតាប
- ☐គ. សិក្សា ប្លែក ☐ឃ. ដែក សរសេរ

**សំណេរ** (១០ពិន្ទុ)

១- ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- សិក្សា ( )...........................................................................................................
- ប្លែក ( )...............................................................................................................
- អនេក ( )...........................................................................................................

២- ចូររកបដិសព្ទនឹងពាក្យ " ថ្លៃ ទំនេរ " ។ (១ពិន្ទុ)

...............................................................................................................................

៣- ដូចម្ដេចដែលហៅថាពាក្យចួន? (២ពិន្ទុ)

...............................................................................................................................

...............................................................................................................................

៤- ចូរស្រង់ពាក្យចួន ក្នុងវគ្គទីពីរ នៃមេសូត្រខាងលើ។ (២ពិន្ទុ)

...............................................................................................................................

...............................................................................................................................

៥- ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញក្នុងមេសូត្រខាងក្រោមឱ្យបានត្រឹមត្រូវ។ (២ពិន្ទុ)

| ឆ្នូន | បវរ | បណ្ដាក់ | ឆ្លាក់ | សិក្សា | ល្អ |
|---|---|---|---|---|---|

| | | |
|---|---|---|
| ប្រដាប់ប្រដា | យកមក......... | ប្រើប្រាស់ក្នុងថ្នាក់ |
| បន្ទាត់ជ័រលុប | ខ្មៅដៃគួរ.......... | គូសវាស.......... |
| | សរសេរអក្សរ។ | |
| សំពៀតក្ដារ.......... | យើងប្រើថែធួន | សំចៃបាន........ |
| កូនខំរៀនសូត្រ | ពុកម៉ែត្រេកអរ | កូនពៅ........... |
| | គួរឱ្យស្រឡាញ់។ | |



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៦ ពេលគោរពទង់ជាតិ

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** (១០ពិន្ទុ)

ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ។

មេសូត្រ : បទកាកគតិ

យើងបុត្រខេមរា មុនចូលសិក្សា គោរពទង់ជាតិ
ឈរតម្រង់ជួរ រួតរះខ្មីឃ្មាត កុំគេចកុំឆ្វៀត
មកទាន់វេលា។

ទង់បង្ហូតឡើង មិននៅចចើង បែរជដែកគ្នា
មាត់ច្រៀងតាមបទ ភ្នែកមើលផ្ទាលា ទង់ជាតិប្រជា
សញ្ញាណជាតិខ្មែរ។

យើងត្រូវគោរព ដោយក្ដីសញ្ជប់ សញ្ជឹងឥតបែរ
នឹកគុណបុព្វ បុរសជាតិខ្មែរ ធ្លាប់មានហូរហែ
តាំងពីយូរយារ។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ (១០ពិន្ទុ)

១- តើសិស្សទាំងអស់ត្រូវគោរពទង់ជាតិនៅពេលណា? (២ពិន្ទុ)

☐ក. ពេលរសៀល ☐ខ. ក្រោយពេលចូលរៀន

☐គ. មុនចូលរៀន ☐ឃ. ពេលចេញលេង

២- នៅពេលគោរពទង់ជាតិ តើយើងត្រូវធ្វើដូចម្ដេច? (២ពិន្ទុ)

☐ក. ច្រៀងតាមបទ ភ្នែកមើលទង់ជាតិ ☐ខ. ជជែកគ្នាលេង

☐គ. ឱនមុខចុះ ☐ឃ. ឈរជុំគ្នា

៣- តើទង់ជាតិ ជាសញ្ញាណតំណាងឱ្យអ្វី? (២ពិន្ទុ)

☐ក. ជាតិ ☐ខ. សាសនា

☐គ. ព្រះមហាក្សត្រ ☐ឃ. សាលារៀន

៤- ហេតុអ្វីបានជាយើងត្រូវគោរពទង់ជាតិ? (២ពិន្ទុ)

☐ក. ជួបជុំគ្នា ☐ខ. នឹកគុណបុព្វបុរសជាតិ

☐គ. ដើម្បីបានចូលរៀន ☐ឃ. ច្រៀងកម្សាន្ត

៥- តើល្បះមួយណាទាក់ទងនឹងខ្លឹមសារមេសូត្រខាងលើ? (២ពិន្ទុ)

☐ក. យើងត្រូវគោរពឪពុកម្ដាយ មុនពេលចេញមកសាលារៀន។

☐ខ. យើងត្រូវគោរពចាស់ទុំ នៅពេលជួបគាត់តាមផ្លូវ។

☐គ. យើងត្រូវគោរពទង់ជាតិមុនពេលចូលរៀន។

☐ឃ. យើងត្រូវគោរពគ្រូមុនពេលចូលរៀន។

**សំណេរ** (១០ពិន្ទុ)

១- ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- ខេមរា ( )..........................................................................................
- សញ្ញាណជាតិ ( )..................................................................................
- ខ្មីឃ្មាត ( )........................................................................................

២- ចូររកវេវចនសព្ទនឹងពាក្យ “ ខេមរា ” ។ (១ពិន្ទុ)

..........................................................................................................

..........................................................................................................

៣- ចូររកពាក្យចួនក្នុងវគ្គមេសូត្រខាងក្រោម។ (៣ពិន្ទុ)

ទង់បង្ហូតឡើង មិននៅចចើង បែរជផែកគ្នា
មាត់ច្រៀងតាមបទ ភ្នែកមើលផ្ទាលា ទង់ជាតិប្រជា
សញ្ញាណជាតិខ្មែរ។

យើងត្រូវគោរព ដោយក្ដីសញ្ជប់ សញ្ជឹងឥតបែរ
នឹកគុណបុព្វ បុរសជាតិខ្មែរ ធ្លាប់មានហូរហែ
តាំងពីយូរយារ។

..........................................................................................................

..........................................................................................................

..........................................................................................................

..........................................................................................................

៤- ចូរតែងល្បះតាមរូបភាពខាងក្រោម ។(៣ពិន្ទុ)



.....................................................................................................




.....................................................................................................



.....................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៧ ការប្រាប់ព័ត៌មានផ្ទាល់ខ្លួន

សាលាបឋមសិក្សា..................................

ឈ្មោះសិស្ស.........................................




**អំណាន** (១០ពិន្ទុ)

ចូរអានអត្ថបទសន្ទនាខាងក្រោម រួចឆ្លើយនឹងសំណួរ។

សុភាព : សួស្តី ! ខ្ញុំឈ្មោះ សុភាព ។ ខ្ញុំមានអាយុ ៩ ឆ្នាំ។ ខ្ញុំរៀននៅថ្នាក់ទី៣ “ ក ” នៃសាលាបឋមសិក្សាសម្តេចព្រះរាជអគ្គមហេសី។

ណារី : សួស្តី សុភាព ! នាងខ្ញុំឈ្មោះ ណារី។ ខ្ញុំមានអាយុ ៩ ឆ្នាំដែរ។ ខ្ញុំរៀននៅថ្នាក់ទី៣ “ ខ ” នៃសាលាបឋមសិក្សាវិហារហ្លួង។ តើឯងមានទីលំនៅ នៅឯណា?

សុភាព : បាទ ! ខ្ញុំរស់នៅភូមិរាំងចាស់ ឃុំរាំងចាស់ ស្រុកឧដុង្គ ខេត្តកំពង់ស្ពឺ។ ឪពុកខ្ញុំឈ្មោះ បាន សួរ និងម្តាយឈ្មោះ ហុន សុភិន។ ចុះឯងវិញមានអាសយដ្ឋាននៅឯណាដែរ?

ណារី : ចាស ! នាងខ្ញុំនៅភូមិកំពង់ចុះវារ ឃុំវិហារហ្លួង ស្រុកពញាឮ ខេត្តកណ្តាល។ ប៉ាខ្ញុំឈ្មោះ ជា សារឿន និងម៉ាក់ឈ្មោះ សំ សូដា។ នុ៎ះ ! ប៉ាម៉ាក់ខ្ញុំមកហើយ ខ្ញុំសូមលាសិនហើយ ចាំថ្ងៃក្រោយជួបគ្នា។

សុភាព : បាទ ! សូមអញ្ជើញដោយសុខសប្បាយ ថ្ងៃក្រោយជួបគ្នា។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ (១០ពិន្ទុ)

១- ពេលជួបណារី តើសុភាពប្រើពាក្យស្វាគមន៍ដូចម្តេច? (២ពិន្ទុ)

☐ ក. ជម្រាបសួរ ☐ ខ. សួស្តី !

☐ គ. ខ្ញុំឈ្មោះសុភាព ☐ ឃ. ជម្រាបលា

២- តើសុភាពមានអាយុប៉ុន្មានឆ្នាំ? (២ពិន្ទុ)

☐ ក. មានអាយុប្រាំបីឆ្នាំ ☐ ខ. មានអាយុប្រាំបួនឆ្នាំ

☐ គ. មានអាយុដប់ឆ្នាំ ☐ ឃ.មានអាយុប្រាំពីរឆ្នាំ

៣- តើសុភាពរៀននៅសាលាណា? (២ពិន្ទុ)

☐ក. សម្ដេចព្រះរាជអគ្គមហេសី ☐ខ. វិហារហ្លួង

☐គ. ព្រះនរោត្តម ☐ឃ. បាក់ទូក

៤- តើណារីមានអាយុប៉ុន្មានឆ្នាំ? (២ពិន្ទុ)

☐ក. អាយុប្រាំពីរឆ្នាំ ☐ខ. អាយុប្រាំបីឆ្នាំ

☐គ. អាយុប្រាំបួនឆ្នាំ ☐ឃ. អាយុដប់ឆ្នាំ

៥- តើណារីរៀននៅសាលាណា? (២ពិន្ទុ)

☐ក. បាក់ទូក ☐ខ. ព្រះនរោត្តម

☐គ. វិហារហ្លួង ☐ឃ. សម្ដេចព្រះរាជអគ្គមហេសី

**សំណេរ**( ១០ ពិន្ទុ )

១- ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- ស្វាគមន៍ (   )................................................................................................
- ព័ត៌មាន (   )................................................................................................
- អាសយដ្ឋាន (   )............................................................................................

២- ចូររៀបរាប់ពីព័ត៌មានផ្ទាល់ខ្លួនរបស់សុភាព។ (២ពិន្ទុ)

....................................................................................................................

....................................................................................................................

....................................................................................................................

....................................................................................................................

៣- ចូររៀបរាប់ពីព័ត៌មានផ្ទាល់ខ្លួនរបស់ណារី។ (២ពិន្ទុ)

....................................................................................................................

....................................................................................................................

....................................................................................................................

....................................................................................................................

៤- ចូររៀបរាប់ពីព័ត៌មានផ្ទាល់ខ្លួនរបស់ប្អូនឱ្យបានច្បាស់លាស់។ (៣ពិន្ទុ)

....................................................................................................................

....................................................................................................................

....................................................................................................................

....................................................................................................................

....................................................................................................................

....................................................................................................................

....................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៨ រឿងទឹកចិត្តដ៏ប្រពៃ

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស........................................




**អំណាន** (១០ពិន្ទុ)

ចូរអានអត្ថបទអំណានខាងក្រោម រួចឆ្លើយនឹងសំណួរ។

ថ្ងៃមួយស្រីនាថ បានត្រឡប់មកពីសាលារៀនមុនម៉ោង។

មីងណានឆ្ងល់ក៏សួរ ៖ " យី ! ថ្ងៃនេះម្ដេចក៏កូនចេញពីរៀនមុនម៉ោងដូច្នេះ? "។ ស្រីនាថឆ្លើយ ៖ " ចាសម៉ាក់ ! ថ្ងៃនេះអ្នកគ្រូខ្ញុំឈឺ "។ ស្រីនាថបានសុំម្ដាយឱ្យជូននាងទៅសួរសុខទុក្ខអ្នកគ្រូ ដែលកំពុងសម្រាកព្យាបាលនៅឯមណ្ឌលសុខភាព។ មីងណានឆ្លើយ ៖ " អើ ! ល្អហើយកូន ម៉ាក់ជូនកូនទៅ តែចាំម៉ែរៀបចំផ្លែឈើបន្តិចបន្តួចផ្ញើជូនគាត់ "។ ឃើញស្រីនាថ និងម្ដាយមកដល់ អ្នកគ្រូសប្បាយចិត្តខ្លាំងណាស់។ គាត់និយាយ ៖ " អ្នកគ្រូសូមអរគុណកូនស្រីនាថ និងអ្នកមីងដែលមកសួរសុខទុក្ខខ្ញុំ "។ មីងណានតប ៖ " មិនអីទេ ! សូមជូនពរអ្នកគ្រូឱ្យឆាប់ជាសះស្បើយ "។ អ្នកគ្រូ ៖ " ចាស! អរគុណ ! "។

" គ្រូជាឪពុកម្ដាយទីពីររបស់យើង "

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ (១០ពិន្ទុ)

១- ហេតុអ្វីបានជាស្រីនាថ ចេញពីរៀនមុនម៉ោង? (២ពិន្ទុ)

☐ ក. សាលារៀនឈប់សម្រាក ☐ ខ. ស្រីនាថឈឺ

☐ គ. កង់ខូច ☐ ឃ. អ្នកគ្រូស្រីនាថឈឺ

២- តើស្រីនាថ និងម្ដាយនាំគ្នាទៅណា? (២ពិន្ទុ)

☐ ក. ទៅសាលារៀន ☐ ខ. ទៅផ្សារ

☐ គ. ទៅមណ្ឌលសុខភាព ☐ ឃ. ទៅមន្ទីរពេទ្យ

៣- តើស្រីនាថបានសុំម្ដាយឱ្យជូននាងទៅសួរសុខទុក្ខនរណា? (២ពិន្ទុ)

- ☐ក. អ្នកគ្រូ ☐ខ. លោកគ្រូ
- ☐គ. មីង ☐ឃ. មិត្តរួមថ្នាក់

៤- តើម្ដាយស្រីនាថបានយកអ្វីទៅជូនអ្នកជំងឺ? (២ពិន្ទុ)

- ☐ក. បបរ ☐ខ. ផ្លែឈើ
- ☐គ. ភេសជ្ជៈ ☐ឃ. បាច់ផ្កា

៥- តើអត្ថបទខាងលើមានតួអង្គប៉ុន្មាននាក់? (២ពិន្ទុ)

- ☐ក. មានពីរនាក់ ☐ខ. មានបីនាក់
- ☐គ. មានបួននាក់ ☐ឃ. មានប្រាំនាក់

**សំណេរ** (១០ពិន្ទុ)

១- ចូរពន្យល់ពាក្យខាងក្រោម។ (៤ពិន្ទុ)

- មណ្ឌលសុខភាព ( )......................................................................
- ប្រពៃ ( )......................................................................
- សះស្បើយ ( )......................................................................

២- ចូររៀបពាក្យ ឬកន្សោមពាក្យខាងក្រោមជាល្បះឱ្យបានត្រឹមត្រូវ។ (៣ពិន្ទុ)

| | | | | | |
|---|---|---|---|---|---|
| យើង។ | ជា | របស់ | គ្រូបង្រៀន | ម្ដាយឪពុក | ទីពីរ |

..............................................................................................

| | | | | | |
|---|---|---|---|---|---|
| មាន | មណ្ឌលសុខភាព។ | ត្រូវទៅ | ពេល | ជំងឺ | យើង |

..............................................................................................

| | | | | | | | |
|---|---|---|---|---|---|---|---|
| និង | មណ្ឌលសុខភាព។ | មីងណន | នៅ | សុខទុក្ខ | អ្នកគ្រូ | ទៅសួរ | ស្រីនាថ |

..............................................................................................

៣- ចូរជ្រើសរើសពាក្យក្នុងប្រអប់ ទៅបំពេញល្បះខាងក្រោមរូបភាពឱ្យបានត្រូវ។ (៣ពិន្ទុ)

| | | |
|---|---|---|
| មណ្ឌលសុខភាព | សំពះ | សុខ |




ក- កុមារីលើកដៃ............... ........... ពេលជួបអ្នកគ្រូ។




ខ- ស្រីនាថ និងម្ដាយទៅសួរ....... ............................ អ្នកជំងឺ។




គ- នេះជា............................... ..................... ក្នុងឃុំយើង។



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣
មេរៀនទី៩ សិស្សគំរូ

សាលាបឋមសិក្សា...............................

ឈ្មោះសិស្ស......................................




**អំណាន** (១០ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

សុធា ជាសិស្សគំរូម្នាក់នៅក្នុងសាលារៀន។

សុធារៀនពូកែ ហើយតែងជាប់ចំណាត់ថ្នាក់ល្អជារៀងរាល់ខែ។ ក្រៅពីការរៀនសូត្រ សុធាគោរពវិន័យសាលាយ៉ាងខ្ជាប់ខ្ជួន។ សុធាតែងស្ដាប់ការទូន្មានប្រៀនប្រដៅរបស់អ្នកគ្រូ លោកគ្រូ និងចេះគោរពចាស់ទុំ ទាំងនៅក្នុងសាលារៀន ក៏ដូចជានៅតាមទីសាធារណៈដែរ។ ដោយសារមានចរិយាមារយាទល្អ ទើបគេជ្រើសរើសសុធាជាសិស្សឆ្នើមប្រចាំសាលា និងជាប្រធានក្រុមប្រឹក្សាកុមារប្រចាំសាលារៀនទៀតផង។

នាយក អ្នកគ្រូ លោកគ្រូ និងមិត្តភក្តិទាំងអស់ ស្រឡាញ់រាប់អានសុធាគ្រប់ៗគ្នា។

"វិន័យនាំមកនូវសេចក្ដីថ្លៃថ្នូរ"

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ (១០ពិន្ទុ)

១- តើនៅក្នុងសាលារៀន សុធាជាសិស្សដូចម្ដេច? (២ពិន្ទុ)

☐ក. ជាសិស្សគំរូ ☐ខ. ជាសិស្សរៀនខ្សោយ

☐គ. ជាសិស្សគេចសាលា ☐ឃ. ជាសិស្សមិនល្អ

២- តើសុធា រៀនជាប់ចំណាត់ថ្នាក់ដូចម្ដេច? (២ពិន្ទុ)

☐ក. ខ្សោយ ☐ខ. មធ្យម

☐គ. បង្គួរ ☐ឃ. ល្អ

៣- ក្រៅពីការរៀនសូត្រ តើសុធាជាសិស្សដូចម្ដេច? (២ពិន្ទុ)

- ☐ក. បង្កភាពស្មុគស្មាញក្នុងសាលា ☐ខ. គោរពវិន័យសាលាយ៉ាងខ្ជាប់ខ្ជួន
- ☐គ. មិនគោរពវិន័យសាលា ☐ឃ. លេងសើចច្រើន

៤- តើវិន័យនាំមកនូវអ្វី? (២ពិន្ទុ)

- ☐ក. អពមង្គល ☐ខ. បរាជ័យ
- ☐គ. សេចក្ដីថ្លៃថ្នូរ ☐ឃ. ការសប្បាយរីករាយ

៥- ហេតុអ្វីគេជ្រើសរើសសុធាជាសិស្សឆ្នើម និងជាប្រធានក្រុមប្រឹក្សាកុមារ? (២ពិន្ទុ)

- ☐ក. ចេះជួយការងារគ្រូ ☐ខ. ចូលចិត្តរៀន
- ☐គ. ចរិយាមារយាទល្អ ☐ឃ. រៀនពូកែ

**សំណេរ** (១០ពិន្ទុ)

១- ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- មារយាទ ( )..........................................................................................
- វិន័យ ( )..........................................................................................
- ក្រុមប្រឹក្សាកុមារ ( )..........................................................................................

..........................................................................................

២- ចូររកវេវចនសព្ទនឹងពាក្យ “ ទូន្មាន ” ។ (២ពិន្ទុ)

..........................................................................................

៣- ចូររៀបពាក្យ ឬកន្សោមពាក្យខាងក្រោមជាល្បះឱ្យបានត្រឹមត្រូវ ។ (៣ពិន្ទុ)

| | | | | | |
|---|---|---|---|---|---|
| ថ្លៃថ្នូរ ។ | វិន័យ | សេចក្ដី | នាំ | នូវ | មក |

..........................................................................................

| | | | | | |
|---|---|---|---|---|---|
| សុខភាព | អនាម័យ | មក | នាំ | ល្អ ។ | នូវ |

..........................................................................................

| | | | | | | |
|---|---|---|---|---|---|---|
| សិស្ស | សុធា | គំរូ | ជា | ម្នាក់ | សាលារៀន។ | នៅក្នុង |

..........................................................................................

៤- ចូរតែងល្បះតាមរូបភាពខាងក្រោមឱ្យបានត្រឹមត្រូវ ។ (២ពិន្ទុ)





.................................................... ....................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣
មេរៀនទី១០ សមាជិកគ្រួសារខ្ញុំ

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** (១០ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

គ្រួសារខ្ញុំ មានសមាជិកជាច្រើននាក់ ហើយម្នាក់ៗមានភារកិច្ចរៀងៗខ្លួន។

ជីដូនជីតាខ្ញុំនៅផ្ទះថែទាំចៅ។ ពុកម៉ែខ្ញុំជាមេគ្រួសារ។ គាត់ប្រកបរបររកស៊ីដើម្បីផ្គត់ផ្គង់ជីវភាពគ្រួសារ និងតាមដានការសិក្សារបស់កូន។ មាមីងរបស់ខ្ញុំ ក៏ទៅធ្វើការដូចពុកម៉ែដែរ។ ចំណែកបងប្រុស បងស្រី និងខ្ញុំមានភារកិច្ចសំខាន់ជាងគេ គឺខិតខំរៀនសូត្រដើម្បីមានអនាគតល្អ។ សមាជិកគ្រួសារខ្ញុំ ចេះគោរពស្រឡាញ់គ្នា យោគយល់គ្នា និងជួយទុក្ខធុរៈគ្នាទៅវិញទៅមក។ ពួកយើងតែងជួបជុំទទួលទានអាហាររួមគ្នា និងជជែកលេងយ៉ាងសប្បាយរីករាយ។

សមាជិកគ្រួសារខ្ញុំ រស់នៅប្រកបដោយសុភមង្គល។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ (១០ពិន្ទុ)

១- តើជីដូន ជីតានៅផ្ទះមានភារកិច្ចជួយធ្វើអ្វី? (២ពិន្ទុ)

☐ ក. រៀបចំម្ហូបអាហារសម្រាប់គ្រួសារ ☐ ខ. ថែទាំចៅៗ

☐ គ. តាមដានការសិក្សារបស់កូន ☐ ឃ. រកស៊ីចិញ្ចឹមគ្រួសារ

២- តើពុកម៉ែមានភារកិច្ចចម្បងអ្វីខ្លះ? (២ពិន្ទុ)

☐ ក. រកស៊ី និងតាមដានការសិក្សារបស់កូន ☐ ខ. រៀបចំម្ហូបអាហារ

☐ គ. គិតតែពីរឿងរកលុយ ☐ ឃ. បង្ខំកូនឱ្យទៅរៀន

៣- តើកូនៗមានភារកិច្ចសំខាន់ធ្វើអ្វី? (២ពិន្ទុ)

☐ ក. មើលប្អូន ☐ ខ. ជួយរកលុយ

☐ គ. ជួយធ្វើស្រែចម្ការ ☐ ឃ. ខិតខំរៀនសូត្រ

៤- តើកូនៗត្រូវធ្វើដូចម្ដេច ដើម្បីឱ្យឪពុកម្ដាយសប្បាយចិត្ត? (២ពិន្ទុ)

☐ ក. ស្រឡាញ់ សាមគ្គី និងចេះជួយគ្នា ☐ ខ. ជួយធ្វើម្ហូប

☐ គ. ជួយរកលុយ ☐ ឃ. ជួយធ្វើស្រែ ចម្ការ

៥- ចូររកបដិសព្ទនឹងពាក្យ " សុភមង្គល " ។ (២ពិន្ទុ)

☐ ក. មានក្ដីសុខ ☐ ខ. អពមង្គល

☐ គ. សប្បាយ ☐ ឃ. រីករាយ

**សំណេរ** (១០ពិន្ទុ)

១- ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- ជីវភាព ( )......................................................................................................
- ភារកិច្ច ( )......................................................................................................
- សុភមង្គល ( )..................................................................................................

២- ចូរកែតម្រូវពាក្យខុសដែលមានគូសបន្ទាត់ពីក្រោមឱ្យបានត្រឹមត្រូវ។(៣ពិន្ទុ)

| | |
|---|---|
| គ្រួសារខ្ញុំ មានសមាជីកជាច្រើននាក់។ ជីដូនជីតាខ្ញុំនូវផ្ទះមើលថៃចៅ។ ពុកម៉ែខ្ញុំជាមេគ្រួសារ គាត់ប្រកប់របររកស៊ីដើម្បីផ្គត់ផ្គង ជីវភាពគ្រួសារ។ មាមីញខ្ញុំក៏ទៅធ្វើការដូចពុកម៉ែដែរ។ ពួកយើងតែងទទួលទានអារហាររួមគ្នា។ កូនៗមានភារកិចសំខាន់ជាងគេគឺ ខិតខំរៀនសូតដើម្បីមានអនាគត់ល្អ។ | កំណែពាក្យត្រូវ<br>........... ........... ...........<br>........... ........... ...........<br>........... ........... ........... |

៣- ចូររៀបពាក្យ ឬកន្សោមពាក្យខាងក្រោមជាល្បះឱ្យបានត្រឹមត្រូវ។ (២ពិន្ទុ)

| | | | | | | |
|---|---|---|---|---|---|---|
| សុភមង្គល ។ | សមាជិក | ប្រកប | គ្រួសារ | ដោយ | រស់នៅ | ខ្ញុំ |

.......................................................................................................................

| | | | | | | |
|---|---|---|---|---|---|---|
| ធ្វើការ | ដើម្បី | ខ្ញុំ | ពុកម៉ែ | ជីវភាព | គ្រួសារ ។ | ផ្គត់ផ្គង់ |

.......................................................................................................................

៤- ចូរតែងល្បះតាមរូបភាពខាងក្រោមឱ្យបានពីរល្បះ។ (២ពិន្ទុ)



១. ...................................................................................
...................................................................................

២. ...................................................................................
...................................................................................



**កិច្ចការផ្ទះ**

**ភាសាខ្មែរ ថ្នាក់ទី៣**

មេរៀនទី១១ បដិសព្ទ

សាលាបឋមសិក្សា.................................

ឈ្មោះសិស្ស........................................




**អំណាន** ( ១០ ពិន្ទុ )

ចូរអានឧទាហរណ៍ខាងក្រោម។

១. គោធំជាងជ្រូក តែតូចជាងដំរី។
២. ខ្ញុំពូកែភាសាខ្មែរ តែខ្សោយគណិតវិទ្យា។
៣. សោភាស្រឡាញ់សត្វឆ្កែ តែនាងស្អប់សត្វឆ្មា។
៤. អ្នកគ្រូសរសើរអ្នកឧស្សាហ៍ គាត់មិនដែលស្តីបន្ទោសអ្នកខ្ជិលឡើយ។

១- ចូរគូសភ្ជាប់ពាក្យដែលជាបដិសព្ទនឹងគ្នា។ (៥ពិន្ទុ)

| | |
|---|---|
| ធំ | ខ្សោយ |
| ពូកែ | តិច |
| ស្រឡាញ់ | ទាប |
| សរសើរ | ខ្ជិល |
| ឧស្សាហ៍ | តូច |
| ចំណេញ | កើតទុក្ខ |
| ច្រើន | ស្អប់ |
| បន្ថយ | បន្ថែម |
| សប្បាយ | ស្តីបន្ទោស |
| ខ្ពស់ | ខាត |

២- ចូរគូសភ្ជាប់ល្បះដែលជាបដិសព្ទនឹងគ្នាឱ្យបានត្រឹមត្រូវ (៥ពិន្ទុ)

| ក | ខ |
|---|---|
| សាលារៀននេះមានទីធ្លាធំទូលាយ។ | ផ្ទះសុភីនៅជិតសាលារៀន។ |
| ផ្ទះសុភាពឆ្ងាយពីសាលារៀន។ | គោជាសត្វស្លូតបូត។ |
| ស្បែកជើងសុភាចាស់។ | សាលារៀននេះមានទីធ្លាតូចចង្អៀត។ |
| ខ្លាជាសត្វកាចសាហាវ។ | រដូវប្រាំងមានអាកាសធាតុក្តៅ។ |
| រដូវរំហើយមានអាកាសធាតុត្រជាក់។ | ស្បែកជើងដារ៉ាថ្មី។ |

**សំណេរ**( ១០ ពិន្ទុ )

១- ដូចម្តេចដែលហៅថា បដិសព្ទ? (៣ពិន្ទុ)

..............................................................................................................................

២- ចូរជ្រើសរើសពាក្យដែលជាបដិសព្ទនឹងគ្នា ពីក្នុងប្រអប់។ (៥ពិន្ទុ)

ល្អ យឺត សុខ ហ៊ាន ខ្លាច លឿន ទុក្ខ អាក្រក់

ជិត រាក់ ខ្ពស់ ជ្រៅ ស្រាល ឆ្ងាយ ទាប ធ្ងន់

..............................................................................................................................

..............................................................................................................................

..............................................................................................................................

៣- ចូររកបដិសព្ទនឹងពាក្យ “ អពមង្គល ដំអក់ ”។ (២ពិន្ទុ)

..............................................................................................................................

..............................................................................................................................



# កិច្ចការផ្ទះ

# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី១២ គុណម្ដាយឪពុក

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** (១០ ពិន្ទុ)

ចូរច្រៀងចម្រៀងខាងក្រោម រួចឆ្លើយនឹងសំណួរ។

ចម្រៀង : លំនាំបទខ្ញុំមានមាត់សម្រាប់និយាយ

១. ខ្ញុំមានពុកម៉ែអ្នកមានគុណ ធ្លាប់រែកពុនចិញ្ចឹមគ្រួសារ
ម៉ែដេរប៉ះចម្អិនអាហារ ពុកធ្វើការភ្ជួរចម្ការស្រែ
បន្ទរ ៖ មែនហើយភ្ជួរចម្ការស្រែ។

២. ពុកម៉ែខ្ញុំខិតខំធ្វើការ ទាំងទ្វេហារពុំដែលត្អូញត្អែរ
ការងាររាជការចម្ការស្រែ ធ្វើហូរហែពុំខ្លាចនឿយហត់
បន្ទរ ៖ មែនហើយពុំខ្លាចនឿយហត់។

៣. ខ្ញុំស្រឡាញ់គោរពលោកណាស់ ព្រោះលោកចាស់ពូកែទ្រាំអត់
គុណធំធេងគ្មានដែនកំណត់ ទោះសមុទ្រក៏ប្រៀបពុំបាន
បន្ទរ ៖ មែនហើយក៏ប្រៀបពុំបាន។

ចូរគូសសញ្ញា √ ក្នុងប្រអប់ ☐ចម្លើយមួយដែលត្រឹមត្រូវ (១០ពិន្ទុ)

១- តើចម្រៀងខាងលើនិយាយពីអ្វី? (២ពិន្ទុ)

☐ក. គុណម្ដាយឪពុក ☐ខ. ចម្រៀង តន្ត្រី

☐គ. របរកសិកម្ម ☐ឃ. ដំណើរកម្សាន្ត

២- តើឪពុកម្ដាយមានគុណចំពោះកូនដូចម្ដេច? (២ពិន្ទុ)

☐ក.ផ្ដល់កំណើត ចិញ្ចឹមបីបាច់ ថែរក្សា ផ្គត់ផ្គង់ ☐ខ. ផ្ដល់អាហារ

☐គ. ការសិក្សា ☐ឃ. សម្លៀកបំពាក់

៣- ចូរគូសភ្ជាប់ពីសំណេរពាក្យ ទៅសំណួរពាក្យ ឱ្យបានត្រឹមត្រូវ? (២ពិន្ទុ)

| សំណេរពាក្យ | សំណួរពាក្យ |
|---|---|
| ចិញ្ចឹម | [ ចំ-កា ] |
| សមុទ្រ | [ រាជ: - កា ] |
| រាជការ | [ ស: - ម៉ុត ] |
| ចម្ការ | [ ចិញ-ចឹម ] |

៤- ចូរគូសសញ្ញាព្រួញភ្ជាប់ឃ្លាខាងក្រោម ឱ្យបានជាវគ្គចម្រៀងត្រឹមត្រូវ។ (៣ពិន្ទុ)

ពុកម៉ែខ្ញុំខិតខំធ្វើការ　　ធ្វើហូរហែពុំខ្លាចនឿយហត់ ។
ខ្ញុំមានពុកម៉ែអ្នកមានគុណ　　ពុកធ្វើការភ្ជួរចម្ការស្រែ ។
ការងាររាជការចម្ការស្រែ　　ទាំងទ្វេហារពុំដែលត្អូញត្អែរ
ម៉ែដេរប៉ះចម្អិនអាហារ　　ធ្លាប់ថែកពុនចិញ្ចឹមគ្រួសារ

៥- ចូររកបដិសព្ទនឹងពាក្យ “ នឿយហត់ ”។ (១ពិន្ទុ)

☐ក. ពិបាក　　☐ខ. ស្រណុក
☐គ. ធុញទ្រាន់　　☐ឃ. សប្បាយ

**សំណេរ**( ១០ ពិន្ទុ )

១- ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- គុណ ( )........................................................................................................
- នឿយ ( )........................................................................................................
- ចិញ្ចឹម ( )........................................................................................................

២- ចូររកសទិសសព្ទនឹង “ ប្រៀប ”។ (២ពិន្ទុ)

..............................................................................................................................
..............................................................................................................................
..............................................................................................................................

៣- ចូរជ្រើសរើសពាក្យ ឬកន្សោមពាក្យក្នុងប្រអប់ទៅបំពេញល្បះខាងក្រោមឱ្យបានត្រឹមត្រូវ។ (៣ពិន្ទុ)

នឿយហត់　រាជការ　ខិតខំ　ចម្អិន　ចិញ្ចឹម　គុណ　ភ្ជួរ　ត្អូញត្អែរ

ខ្ញុំមានពុកម៉ែអ្នកមាន...........　　ធ្លាប់ថែកពុន...........គ្រួសារ
ម៉ែដេរប៉ះ............អាហារ　　ពុកធ្វើការ.........ចម្ការស្រែ

បន្ទរ ៖ មែនហើយភ្ជួរចម្ការស្រែ។

ពុកម៉ែខ្ញុំ............ធ្វើការ　　ទាំងទ្វេហារពុំដែល...............
ការងារ.............ចម្ការស្រែ　　ធ្វើហូរហែពុំខ្លាច..................

បន្ទរ ៖ មែនហើយពុំខ្លាចនឿយហត់។

៤- ចូរតែងល្បះតាមរូបភាពខាងក្រោមឱ្យបានពីរល្បះ ។ (២ពិន្ទុ)



..........................................................................................................................

..........................................................................................................................

..........................................................................................................................

..........................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣
មេរៀនទី១៣ ការពណ៌នាអំពីមនុស្ស

សាលាបឋមសិក្សា...............................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

ម្ដាយខ្ញុំឈ្មោះគន្ធា គាត់មានអាយុសាមសិបប្រាំបីឆ្នាំហើយ។ សព្វថ្ងៃគ្រួសារខ្ញុំរស់នៅភូមិត្រពាំងត្របែក ឃុំអង្គតាសោម ស្រុកត្រាំកក់ ខេត្តតាកែវ។

ម្ដាយខ្ញុំមានមាឌធំល្មម កម្ពស់ប្រហែលមួយម៉ែត្រហុកសិប សម្បុរខ្មៅស្រអែម សក់វែងស្លូត ច្រមុះស្រួច ភ្នែកធំល្មម ដៃជើងសមនឹងដងខ្លួន។ គាត់និយាយស្ដីមួយៗ តែច្បាស់។ នៅពេលមានបុណ្យទានម្ដងៗ គាត់ស្លៀកពាក់ហូល ផាមួង អាវប៉ាក់យ៉ាងស្អាត។ ម្ដាយខ្ញុំឧស្សាហ៍ធ្វើការងារណាស់។ គាត់ជាអ្នករួសរាយ រាក់ទាក់ចំពោះមនុស្សទូទៅ។ គាត់ចូលចិត្តនិយាយដាស់តឿនកូនចៅ ឱ្យខិតខំរៀនសូត្រ។

ខ្ញុំគោរព និងស្រឡាញ់ម្ដាយខ្ញុំណាស់ ព្រោះគាត់ជាអ្នកមានគុណ បានបង្កើត បីបាច់ថែរក្សាចិញ្ចឹមខ្ញុំ និងក្រុមគ្រួសារ។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ (១០ពិន្ទុ)

១- តើអត្ថបទនេះពណ៌នាពីអ្វី? (២ពិន្ទុ)

☐ក. អំពីសិល្បៈ តន្ត្រី ☐ខ. អំពីរុក្ខជាតិ

☐គ. អំពីសត្វ ☐ឃ. អំពីមនុស្ស

២- តើម្ដាយគាត់ឈ្មោះអ្វី? អាយុប៉ុន្មានឆ្នាំ? (២ពិន្ទុ)

☐ក. ឈ្មោះ សុភាព អាយុ សាមសិបបួនឆ្នាំ ☐ខ. ឈ្មោះ គន្ធា អាយុ សាមសិបប្រាំបីឆ្នាំ

☐គ. ឈ្មោះ សុភី អាយុ សាមសិបប្រាំពីរឆ្នាំ ☐ឃ. ឈ្មោះ កញ្ញា អាយុ សាមសិបប្រាំឆ្នាំ

៣- តើសព្វថ្ងៃគាត់រស់នៅស្រុក ខេត្តណា? (២ពិន្ទុ)

☐ក. ស្រុកត្រាំកក់ ខេត្តកណ្ដាល ☐ ខ. ស្រុកត្រាំកក់ ខេត្តកំពង់ស្ពឺ

☐គ. ស្រុកត្រាំកក់ ខេត្តតាកែវ ☐ ឃ. ស្រុកត្រាំកក់ ខេត្តកំពត

៤- តើម្ដាយរបស់គាត់ មានមាឌ និងកម្ពស់ដូចម្ដេច? (២ពិន្ទុ)

☐ក. មាឌតូច កម្ពស់មួយម៉ែត្រហាសិប ☐ ខ. មាឌធំ កម្ពស់មួយម៉ែត្រហាសិបបី

☐គ. មាឌធំល្មម កម្ពស់មួយម៉ែត្រហុកសិប ☐ ឃ. មាឌធំ កម្ពស់មួយម៉ែត្រហុកសិបប្រាំ

៥- តើម្ដាយគាត់ជាមនុស្សដូចម្ដេច? (២ពិន្ទុ)

☐ក. ឧស្សាហ៍ រួសរាយ រាក់ទាក់ ☐ ខ. សុភាព មិនសូវមាត់ក

☐គ. ម៉ឺងម៉ាត់ ☐ ឃ. ខ្ជិល មិនសូវរួសរាយ រាក់ទាក់

**សំណេរ**( ១០ ពិន្ទុ )

១- ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- ឧស្សាហ៍ ( )...........................................................................................................
- រួសរាយ ( )...........................................................................................................
- ថែរក្សា ( )...........................................................................................................

២- ចូររកបដិសព្ទនឹងពាក្យ “ ស្លូត ខ្ពស់ ខ្មៅ វែង ធំ ស្រួច ” ។ (២ពិន្ទុ)

...........................................................................................................

...........................................................................................................

...........................................................................................................

៣- ចូរសរសេរតែងសេចក្ដីពណ៌នាពី **មិត្តភក្ដិរបស់ប្អូន** ដោយឆ្លើយនឹងសំណួរខាងក្រោម។ (៥ពិន្ទុ)

ក. តើមិត្តភក្ដិរបស់ប្អូន ប្រុស ឬស្រី? ឈ្មោះអ្វី? អាយុប៉ុន្មាន? រស់នៅឯណា?

ខ. តើមិត្តភក្ដិរបស់ប្អូនមានមាឌ កម្ពស់ សម្បុរ សក់ មុខ មាត់ ដៃ ជើង និយាយ ដូចម្ដេច?

គ. តើមិត្តភក្ដិរបស់ប្អូន ស្លូត ឬកាច?

ឃ. តើមិត្តភក្ដិរបស់ប្អូនចិត្តគំនិត(ចំណុចល្អ ឬមិនល្អ)ដូចម្ដេច?

ង. តើប្អូនចូលចិត្តមិត្តភក្ដិរបស់ប្អូនឬទេ? ព្រោះអ្វី?

សេចក្ដីអធិប្បាយ

...........................................................................................................

...........................................................................................................

...........................................................................................................

...........................................................................................................

...........................................................................................................

...........................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី១៤ រឿងគោ ក្របីគ្មានធ្មេញលើ

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស........................................




**អំណាន** ( ១០ ពិន្ទុ )

ចូរអានអត្ថបទរឿងខាងក្រោម រួចឆ្លើយនឹងសំណួរ។

កាលពីព្រេងនាយមានខ្លាមួយសួរគោថា ខ្លួនបងគោឯងធំ ហេតុអ្វីក៏ទ្រាំឱ្យមនុស្សទឹមដូច្នេះ? គោតប ៖ " មនុស្សតូចមែន ! ប៉ុន្តែមានប្រាជ្ញា " ។ ខ្លាឆ្ងល់ក៏សួរកសិករ ៖ " ពូ ! ឯណាប្រាជ្ញារបស់ពូ? " ។ កសិករតប ៖ " ប្រាជ្ញាពូទុកនៅឯផ្ទះ ចាំពូទៅយកឱ្យមើល តែពូសុំចងឯងសិន ព្រោះខ្លាចឯងស៊ីគោខ្ញុំ " ។ ខ្លាយល់ព្រមឱ្យកសិករចងខ្លួនជាប់។ ពេលនោះកសិករទាញដំបងសំពងខ្លា ហើយប្រាប់ថា នេះហើយប្រាជ្ញាមនុស្ស ! គោ និងក្របីឃើញដូច្នេះ ក៏សើចហើយដួល មាត់បុកត្រូវនឹងថ្មបាក់ធ្មេញលើអស់រលីង។

ហេតុនេះហើយបានជាគោ និងក្របី គ្មានធ្មេញខាងលើរហូតដល់សព្វថ្ងៃនេះ។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ (១០ពិន្ទុ)

១- តើខ្លាសួរគោដូចម្ដេច? (២ពិន្ទុ)

☐ក. ហេតុអ្វីក៏ទ្រាំឱ្យមនុស្សទឹមដូច្នេះ? ☐ខ. តើឯណាប្រាជ្ញារបស់ពូ?

☐គ. តើមនុស្សនៅឯណា? ☐ឃ. តើបងកំពុងធ្វើអ្វី?

២- តើគោតបវិញ ដូចម្ដេច? (២ពិន្ទុ)

☐ក. ខ្ញុំកំពុងដើររកម្ចាស់របស់ខ្ញុំ ☐ខ. ខ្ញុំកំពុងជាប់ចំណង

☐គ. មនុស្សតូចមែន ! ប៉ុន្តែមានប្រាជ្ញា ☐ឃ. មនុស្សរស់នៅក្នុងភូមិ

៣- តើខ្លាសួរកសិកររកអ្វី? (២ពិន្ទុ)

☐ក. រកទឹកបឹង ☐ខ. រកប្រាជ្ញាមនុស្ស

☐គ. រកគោ ☐ឃ. រកផ្លូវទៅផ្ទះ

៤- ហេតុអ្វីបានជាខ្លាត្រូវជាប់ចំណង? (២ពិន្ទុ)

- ក. ចាញ់បោកគោ
- ខ. ជាប់អន្ទាក់ព្រានព្រៃ
- គ. ចងខ្លួនឯង
- ឃ. ចាញ់ប្រាជ្ញាមនុស្ស

៥- ហេតុអ្វីបានជាគោ និងក្របី បាក់ធ្មេញលើអស់? (២ពិន្ទុ)

- ក. មនុស្សវាយ
- ខ. ប្រយុទ្ធជាមួយខ្លា
- គ. ដល់គ្នា
- ឃ. សើចចំអកខ្លា រួចដួលបុកត្រូវនឹងថ្ម

**សំណេរ**( ១០ ពិន្ទុ )

១- ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- កសិករ ( )...................................................................................................
- ប្រាជ្ញា ( )...................................................................................................
- សំពង ( )...................................................................................................

២- ចូរជ្រើសរើសពាក្យក្នុងប្រអប់ ទៅបំពេញកថាខណ្ឌខាងក្រោមឱ្យបានត្រឹមត្រូវ។ (៣ពិន្ទុ)

| | | | | |
|---|---|---|---|---|
| បង្កើន | ចិញ្ចឹម | ជីវភាព | ពាហនៈ | អូសទាញ |

សត្វគោ ក្របី សេះ ជាកម្លាំង ............ ដ៏សំខាន់របស់កសិករ។ ក្រៅពីសត្វ ......... កសិករយើងត្រូវចិញ្ចឹមសត្វផ្សេងៗ ដូចជាជ្រូក មាន់ ទា ដើម្បី............... ជីវភាពគ្រួសារ។ លើសពីនេះ ការ ........... ត្រី កង្កែប អន្ទង់ សត្វក្អួចជាដើម គឺធ្វើឱ្យ................ គ្រួសារកាន់តែប្រសើរឡើង។

៣- ចូររៀបពាក្យ ឬកន្សោមពាក្យខាងក្រោមឱ្យបានទៅជាល្បះត្រឹមត្រូវ។ (២ពិន្ទុ)

| | | | | | | | |
|---|---|---|---|---|---|---|---|
| ចំពោះមុខ។ | ក្នុង | ប្រាជ្ញា | អាវុធ | ការ | ជា | ដោះស្រាយ | បញ្ហា |

.................................................................................................................

| | | | | | | |
|---|---|---|---|---|---|---|
| ហ្វឹកហាត់។ | ចេញកើត | ពីការ | បញ្ញា | និង | រៀនសូត្រ | ការ |

.................................................................................................................

៤- ចូរតែងល្បះតាមរូបភាពខាងក្រោមឱ្យបានពីរល្បះ។ (២ពិន្ទុ)



១. .........................................................................

.........................................................................

២. .........................................................................

.........................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣
មេរៀនទី១៥ អំពីនាម

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរអានឧទាហរណ៍ខាងក្រោម រួចឆ្លើយនឹងសំណួរ។

សុខាចិញ្ចឹមជ្រូកពីរក្បាល និងមាន់ ទាជាច្រើនក្បាលទៀត។ គេតែងបោសសម្អាត ទ្រុង ជ្រូក មាន់ ទា ជារៀងរាល់ថ្ងៃ ដើម្បីកុំឱ្យសត្វទាំងនោះមានជំងឺ។ សុខាយកលាមកសត្វទាំងអស់នោះ ទៅចាក់ក្នុងរណ្តៅជី ក្បែរដើមស្វាយ ឯចម្ការក្រោយផ្ទះ។ នៅពេលបោសសម្អាត សុខាតែងពាក់ម៉ាស់ការពារជានិច្ច។ ក្រោយពេលបោសសម្អាតរួច គេងូតទឹក ដុសសាប៊ូសម្អាតខ្លួនប្រាណ ដើម្បីកុំឱ្យឆ្លងមេរោគ។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. តើសុខាចិញ្ចឹមជ្រូកប៉ុន្មានក្បាល? (២ពិន្ទុ)

☐ ក. ពីរក្បាល ☐ ខ. បីក្បាល

☐ គ. បួនក្បាល ☐ ឃ. ប្រាំក្បាល

២. ដើម្បីកុំឱ្យសត្វទាំងនោះមានជំងឺ តើសុខាតែងតែធ្វើដូចម្តេច? (២ពិន្ទុ)

☐ ក. បែងចែកទៅតាមប្រភេទសត្វ ☐ ខ. បោសសម្អាតទ្រុង ជារៀងរាល់ថ្ងៃ

☐ គ. ចាក់ថ្នាំពេលមានជំងឺ ☐ ឃ. ដាក់ចំណីឱ្យស៊ីជាប្រចាំ

៣. តើសុខាយកលាមកសត្វទាំងអស់ទៅណា? (២ពិន្ទុ)

☐ ក. ឱ្យអ្នកជិតខាង ☐ ខ. ចាក់ចោល

☐ គ. ចាក់ក្នុងរណ្តៅជី ឯចម្ការក្រោយផ្ទះ ☐ ឃ. យកទៅលក់

៤. ពេលបោសសម្អាត ដើម្បីកុំឱ្យឆ្លងមេរោគ តើសុខាតែងធ្វើដូចម្តេច? (២ពិន្ទុ)

☐ ក. ពាក់ស្រោមជើង ☐ ខ. បាញ់ថ្នាំសម្លាប់មេរោគ

☐ គ. ពាក់ម៉ាស់ ☐ ឃ. ពាក់អាវដៃវែង

៥. ក្រោយពេលបោសសម្អាត ដើម្បីកុំឱ្យឆ្លងមេរោគ តើសុខាតែងធ្វើដូចម្តេច? (២ពិន្ទុ)

- ☐ក. ងូតទឹក ដុះសាប៊ូ
- ☐ ខ. ចាក់ថ្នាំការពារ
- ☐គ. ប្តូរខោអាវ
- ☐ឃ. លាងដៃ

**សំណេរ** ( ១០ ពិន្ទុ )

១. ដូចម្តេចដែលហៅថានាម? (២ពិន្ទុ)

..........................................................................................................................

..........................................................................................................................

២. ចូរស្រង់នាមឱ្យបាន១០ពាក្យពីឧទាហរណ៍ខាងលើ។ (២ពិន្ទុ)

..........................................................................................................................

..........................................................................................................................

..........................................................................................................................

៣. ចូរជ្រើសរើសពាក្យនាមក្នុងប្រអប់ទៅបំពេញចន្លោះល្បះខាងក្រោម ឱ្យបានត្រឹមត្រូវ។ (៤ពិន្ទុ)

| អ្នកគ្រូ | គោក្របី | សិស្ស | ដើមឈើ | បណ្ណាល័យ |
|---|---|---|---|---|

ក. ពេលទំនេរយើងនាំគ្នាទៅអានសៀវភៅ នៅឯ.............................។

ខ. យើងជា.......................ត្រូវស្តាប់ដំបូន្មានលោកគ្រូ.......................។

គ. ....................ជាសត្វមានសារៈសំខាន់ចំពោះកសិករ ។

ឃ. ....................ផ្តល់ប្រយោជន៍ច្រើនយ៉ាងណាស់ ។

៤. ចូរតែងល្បះតាមរូបភាពខាងក្រោមឱ្យបានពីរល្បះ។ (២ពិន្ទុ)



..........................................................................................................................

..........................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី១៦ អ្នកមានគុណ

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** (១០ ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

យើងជាកុលបុត្រ កុលធីតាខ្មែរ ត្រូវចេះគោរពស្រឡាញ់ និងមានចិត្តកតញ្ញូ ចំពោះអ្នកមានគុណរបស់យើង។

អ្នកមានគុណមានដូចជា ជីដូនជីតា ឪពុកម្ដាយ អាណាព្យាបាល លោកគ្រូ អ្នកគ្រូ ជាដើមដែលចិញ្ចឹមបីបាច់ថែរក្សា និងបង្ហាត់បង្រៀនយើងតាំងពីវ័យកុមារ រហូតដល់វ័យសិក្សាមានចំណេះដឹងខ្ពង់ខ្ពស់ មានសេចក្ដីថ្លៃថ្នូរ និងមានអនាគតល្អ។ អ្នកមានគុណ បានខិតខំរកប្រាក់សម្រាប់ចំណាយចំពោះការសិក្សារបស់កូន។

ដូច្នេះយើងត្រូវខិតខំសិក្សា និងគោរពលោក ព្រមទាំងជួយចិញ្ចឹមគាត់វិញឱ្យសមជាកូនកតញ្ញូ។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. តើកុលបុត្រ កុលធីតាត្រូវធ្វើអ្វី ចំពោះអ្នកមានគុណ? (២ពិន្ទុ)

☐ក. គោរពស្រឡាញ់ និងកតញ្ញូ ☐ខ. ប្រព្រឹត្តតាមទំនើងចិត្ត

☐គ. ស្រឡាញ់ ☐ឃ. ខ្លាច

២. ហេតុអ្វីបានជាគេថាឪពុកម្ដាយជាអ្នកមានគុណចំពោះកូន? (២ពិន្ទុ)

☐ក. ផ្ដល់ប្រាក់កាស ☐ខ. ជួយបង្ហាត់បង្រៀន

☐គ. ផ្ដល់កំណើត ចិញ្ចឹមបីបាច់ ទំនុកបម្រុង ☐ឃ. ផ្ដល់អាហារ

៣. ហេតុអ្វីបានជាគេថា លោកគ្រូ អ្នកគ្រូជាអ្នកមានគុណចំពោះកូន? (២ពិន្ទុ)

☐ក. ស្ដីបន្ទោស ☐ខ. យកចិត្តទុកដាក់ អប់រំ ជួយបង្ហាត់បង្រៀន

☐គ. វាយដំ ☐ឃ. បង្រៀន

៤. តើកូនត្រូវធ្វើអ្វីខ្លះ ដើម្បីក្លាយជាកូនកតញ្ញូ? (២ពិន្ទុ)

- ☐ក. ជួយមើលប្អូន
- ☐ខ. ជួយធ្វើការងារផ្ទះ
- ☐គ. ខិតខំរៀន គោរព និងជួយចិញ្ចឹមគាត់វិញ
- ☐ឃ. មិនដើរលេង

៥. តើអត្ថបទនេះមានគំនិតអប់រំដូចម្តេច? (២ពិន្ទុ)

- ☐ក. ខិតខំរៀនសូត្រ
- ☐ខ. មិនដើរលេងផ្តេសផ្តាស
- ☐គ. ធ្វើជាក្មេងល្អ
- ☐ឃ. មានចិត្តកតញ្ញូចំពោះអ្នកមានគុណ

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យខាងក្រោម " កតញ្ញូ ចិញ្ចឹម អាណាព្យាបាល " ។ (៣ពិន្ទុ)

.......................................................................................................................

.......................................................................................................................

.......................................................................................................................

២. ចូររៀបពាក្យ ឬកន្សោមពាក្យខាងក្រោមជាល្បះឱ្យបានត្រឹមត្រូវ។ (៣ពិន្ទុ)

| | | | | | |
|---|---|---|---|---|---|
| បុត្រា | ចំពោះ | ឪពុកម្តាយ | បុត្រី។ | អ្នកមានគុណ | ជា |

.......................................................................................................................

| | | | | | |
|---|---|---|---|---|---|
| ខិតខំ | អ្នកគ្រូ | ឡើយហត់។ | ដោយមិនខ្លាច | បង្រៀនសិស្ស | លោកគ្រូ |

.......................................................................................................................

| | | | | | |
|---|---|---|---|---|---|
| ចំពោះ | ត្រូវមាន | អ្នកមានគុណ។ | កតញ្ញូ | យើង | ចិត្ត |

.......................................................................................................................

៣. ចូរសរសេរបំពេញល្បះតាមគំនិតផ្ទាល់ខ្លួន។ (២ពិន្ទុ)

ក. យើងត្រូវមានចិត្ត......................ចំពោះអ្នកមានគុណ។

ខ. ឪពុកម្តាយ បានខិតខំ.......................សម្រាប់ចំណាយចំពោះការសិក្សារបស់កូន។

៤. ចូរតែងល្បះតាមរូបភាពខាងក្រោមឱ្យបានត្រឹមត្រូវ។ (២ពិន្ទុ)





១. ....................................................

....................................................

២. ....................................................

....................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី១៧ អនាម័យ

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស........................................




**អំណាន** ( ១០ ពិន្ទុ )

ចូរអានអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

មានកុមារម្នាក់មិនសូវខិតខំរៀនសូត្រ និងមានទម្លាប់អាក្រក់មិនសម្អាតខ្លួនប្រាណ។

រាល់ថ្ងៃ សម្លៀកបំពាក់របស់គេមិនដែលស្អាត។ មុនពេលបរិភោគនំចំណី កុមាររូបនេះមិនដែលលាងដៃនឹងសាប៊ូសោះ។ ពេលខ្លះ វាយកដៃកខ្វក់នោះទៅជូតនឹងខ្លួនប្រាណ ឬសម្លៀកបំពាក់។ ក្រោយមកវាឈឺ សុខភាពវាទ្រុឌទ្រោម និងចុះខ្សោយជាលំដាប់។

ក្រោយពីបានទទួលការណែនាំពីគ្រូប្រចាំថ្នាក់ មិត្តភក្តិ និងអ្នកគ្រូពេទ្យអំពីការថែទាំសុខភាព និងការរស់នៅស្អាតរួចមក កុមារនោះបានភ្ញាក់រឭក និងអនុវត្តតាមក្បួនអនាម័យដូចជា លាងដៃនឹងសាប៊ូមុននឹងញ៉ាំចំណី។ ដូច្នេះសុខភាពរបស់កុមារក៏ល្អឡើងវិញ។

" អនាម័យនាំមកនូវសុខភាពល្អ "

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. តើកុមារខាងលើមានទម្លាប់អាក្រក់ដូចម្ដេច? (២ពិន្ទុ)

☐ក. ចូលចិត្តដើរលេង ☐ខ. មិនស្ដាប់ដំបូន្មានឪពុកម្ដាយ

☐គ. មិនសម្អាតខ្លួនប្រាណ ☐ឃ. សំងំមើលទូរសព្ទច្រើន

២. មុនពេលបរិភោគនំចំណី តើកុមាររូបនោះធ្វើដូចម្ដេច? (២ពិន្ទុ)

☐ក. មិនដែលលាងដៃនឹងសាប៊ូ ☐ខ. លាងដៃនឹងទឹកធម្មតា

☐គ. លាងដៃនឹងសាប៊ូ ☐ឃ. ជូតដៃនឹងខោអាវ

៣. តើកុមាររូបនោះមានសុខភាពដូចម្ដេច? (២ពិន្ទុ)

☐ក. សុខភាពធម្មតា ☐ខ. សុខភាពល្អ

☐គ. សុខភាពរឹងមាំ ☐ឃ. សុខភាពទ្រុឌទ្រោម និងចុះខ្សោយ

៤. ក្រោយពីបានទទួលការណែនាំ តើកុមារនោះមានសុខភាពដូចម្ដេច? (២ពិន្ទុ)

☐ក. មានសុខភាពទ្រុឌទ្រោម ☐ខ. មិនប្រសើរជាងមុន

☐គ. មានសុខភាពល្អឡើងវិញ ☐ឃ. កាន់តែដុនដាប

៥. តើអត្ថបទនេះមានគំនិតអប់រំដូចម្ដេច? (២ពិន្ទុ)

☐ក. ខិតខំរៀនសូត្រ ☐ខ. ឱ្យចេះធ្វើអនាម័យខ្លួនប្រាណ

☐គ. ស្ដាប់ដំបូន្មានលោកគ្រូ អ្នកគ្រូ ☐ឃ. មានចិត្តកតញ្ញូចំពោះឪពុកម្ដាយ

**សំណេរ** (១០ ពិន្ទុ)

១. ចូរពន្យល់ពាក្យខាងក្រោម " អនាម័យ សុខភាព ទ្រុឌទ្រោម " ។ (៣ពិន្ទុ)

..........................................................................................................................

..........................................................................................................................

..........................................................................................................................

២. ចូរតែងល្បះតាមរូបភាពខាងក្រោមឱ្យបានត្រឹមត្រូវ។ (២ពិន្ទុ)







ក. ..................................................... ខ. ..................................................................

..................................................... ..................................................................

៣. ចូរសសេរតែងសេចក្ដីពណ៌នាពីមិត្តភក្ដិរបស់កូនម្នាក់។ (៥ពិន្ទុ)

សេចក្ដីអធិប្បាយ

..........................................................................................................................

..........................................................................................................................

..........................................................................................................................

..........................................................................................................................

..........................................................................................................................

..........................................................................................................................

..........................................................................................................................

..........................................................................................................................

..........................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី១៨ កិច្ចការយើងនៅផ្ទះ

សាលាបឋមសិក្សា...............................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ។

មេសូត្រ : បទកាកគតិ

កូនទៅសាលា ខិតខំសិក្សា រៀនលេខអក្សរ
ពេលមកដល់ផ្ទះ ខំរៀនបន្ត ឱ្យចងចាំល្អ
នោះទើបប្រសើរ។

រៀនរួចរូតរះ ជួយកិច្ចការផ្ទះ ម៉ាក់ប៉ាលោកប្រើ
ជួយតាមកម្លាំង កុំគិតគេចដើរ ទើបគេសរសើរ
ថាជាបុត្រល្អ។

កូនល្អចេះជួយ ខិតខំលើកស្ទួយ គ្រួសារបវរ
ស្ដាប់ដំបូន្មាន ដោយចិត្តស្មោះសរ ពុកម៉ែត្រេកអរ
គ្រួសារសុខសាន្ត។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. តើនៅសាលារៀនកូនត្រូវធ្វើអ្វី? (២ពិន្ទុ)

☐ ក. ធ្វើពលកម្ម ☐ ខ. ខិតខំសិក្សា រៀនលេខអក្សរ

☐ គ. ដាំបន្លែ ☐ ឃ. លេងជាមួយមិត្តភក្តិ

២. តើពេលមកដល់ផ្ទះកូនត្រូវធ្វើអ្វី? (២ពិន្ទុ)

☐ ក. ខំរៀនបន្ថែម ☐ ខ. ដើរលេង

☐ គ. លេងទូរសព្ទ ☐ ឃ. មើលទូរទស្សន៍

៣. ក្រោយពីការរៀនរួច តើកូនត្រូវធ្វើអ្វីខ្លះដើម្បីក្លាយជាកូនល្អ? (២ពិន្ទុ)

☐ក. សំងំតែនៅក្នុងបន្ទប់ ☐ខ. ចេញទៅរកលុយខាងក្រៅ

☐គ. ជួយធ្វើការងារផ្ទះ ស្ដាប់ដំបូន្មាន ☐ឃ. គេចទៅដើរលេង

៤. តើចម្លើយមួយណាត្រូវនឹងអត្ថន័យរបស់មេសូត្រខាងលើ? (២ពិន្ទុ)

☐ក. នៅផ្ទះកូននាំគ្នាលេងសប្បាយ ☐ខ. នៅផ្ទះកូនត្រូវជួយធ្វើស្រែចម្ការ

☐គ.នៅផ្ទះកូនត្រូវខំរៀនបន្ថែម និងជួយធ្វើការងារ ☐ឃ. នៅផ្ទះកូនត្រូវមើលទូរទស្សន៍

៥. តើក្នុងវគ្គទី១នៃមេសូត្រ ពាក្យ "អក្សរ" ចួននឹងពាក្យអ្វីខ្លះ? (២ពិន្ទុ)

☐ក. ខំរៀន ចងចាំ ☐ខ. បន្ត ល្អ ប្រសើរ

☐គ. សាលា សិក្សា ☐ឃ. បន្ត ល្អ

**សំណេរ** (១០ ពិន្ទុ)

១. ចូរពន្យល់ពាក្យខាងក្រោម "រូតរះ ដំបូន្មាន បវរ"។ (៣ពិន្ទុ)

........................................................................................................................

........................................................................................................................

........................................................................................................................

២. ចូររកពាក្យចួនពីក្នុងមេសូត្រ ដែលចួននឹងពាក្យដូចខាងក្រោម។ (២ពិន្ទុ)

វគ្គទី២ : រូតរះ ចួននឹងពាក្យ ...........................................។

ប្រើ ចួននឹងពាក្យ ...........................................។

វគ្គទី៣ : ជួយ ចួននឹងពាក្យ ...........................................។

បវរ ចួននឹងពាក្យ ...........................................។

៣. ចូររកវេវចនសព្ទនឹងពាក្យ "រូតរះ"។ (១ពិន្ទុ)

........................................................................................................................

៤. ចូររៀបពាក្យ កន្សោមពាក្យខាងក្រោមឱ្យបានជាល្បះត្រឹមត្រូវ។ (២ពិន្ទុ)

| | | | | | |
|---|---|---|---|---|---|
| រៀនសូត្រ | និង | កិច្ចការផ្ទះ។ | ជួយធ្វើ | ត្រូវខិតខំ | កូនល្អ |

........................................................................................................................

| | | | | | |
|---|---|---|---|---|---|
| យើង | ឱ្យ | ចំណេះវិជ្ជា | រួចផុតពី | ភាពក្រីក្រ។ | ជួយ |

........................................................................................................................

៥. ចូរតែងល្បះតាមរូបភាពខាងក្រោមឱ្យបានពីរល្បះ។ (២ពិន្ទុ)



១. ..........................................................................................

២. ..........................................................................................



# **កិច្ចការផ្ទះ**
# **ភាសាខ្មែរ ថ្នាក់ទី៣**

មេរៀនទី១៩ តួអង្គ

សាលាបឋមសិក្សា.................................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរអានរឿងខាងក្រោម រួចឆ្លើយនឹងសំណួរ។

រឿងទឹកចិត្តមេមាន់

កសិករម្នាក់បានចិញ្ចឹមមេមាន់មួយ និងមេទាមួយ។

មេមាន់ភ្ញាស់បានកូនមួយសម្បុក។ មេទាក៏ភ្ញាស់បានកូនមួយសម្បុកដែរ ហើយក៏ចាកចោលកូនទៅ។ មេមាន់ឃើញកូនទាកំព្រា ក៏យកមកចិញ្ចឹម។ កូនមាន់ឆ្ងល់ក៏សួរ ៖ “ ម៉ែ! ហេតុអ្វីបានជាម៉ែចិញ្ចឹមកូនទា? ” ។ មេមាន់ឆ្លើយ៖ “ កូនទាកំព្រា វាត្រូវការការថែទាំដូចកូនដែរ ”។ ម៉ែចិញ្ចឹមវា ព្រោះតែវាក៏មានសិទ្ធិរស់រានមានជីវិតដូចកូនដែរ។ កូនមាន់សួរ ៖ “ម៉ែគិតចិញ្ចឹមកូនទារហូតឬ? ” ។ មេមាន់ឆ្លើយ ៖ “ ទេ ! ដល់វាគ្រប់អាយុម៉ែឱ្យវាទៅរៀនជាមួយកូន ហើយដល់ពេលវាអាចចិញ្ចឹមខ្លួនបានម៉ែឈប់ជួយវាហើយ ”។ កូនៗលាន់មាត់ ៖ “ យី ! ម៉ែខ្ញុំចិត្តល្អណាស់ ”។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. តើកសិករម្នាក់នោះចិញ្ចឹមសត្វអ្វី? (២ពិន្ទុ)

☐ ក. គោ ក្របី　　☐ ខ. មេមាន់មួយ និងមេទាមួយ

☐ គ. ទា និងសេះ　　☐ ឃ. មាន់ និងជ្រូក

២. ហេតុអ្វីបានជាកូនទាមករស់នៅជាមួយមេមាន់? (២ពិន្ទុ)

☐ ក. មេរបស់វាចាកចោល　　☐ ខ. មេរបស់វាមានជំងឺធ្ងន់ធ្ងរ

☐ គ. មេរបស់វាងាប់　　☐ ឃ. មេរបស់វាបណ្ដេញចេញ

៣. ហេតុអ្វីបានជាមេមាន់ចិញ្ចឹមកូនទា? (២ពិន្ទុ)

- ☐ក. ព្រោះមេមាន់គ្មានកូន
- ☐ ខ. ចង់ឱ្យកូនទាបម្រើខ្លួន
- ☐គ. ព្រោះកូនទាកំព្រាត្រូវការការថែទាំ
- ☐ ឃ. ចង់ឱ្យកូនរបស់ខ្លួនមានគ្នាលេងជាមួយ

៤. តើរឿងនេះមានតួអង្គអ្វីខ្លះ? (២ពិន្ទុ)

- ☐ក. កសិករ មេមាន់ មេទា កូនមាន់ កូនទា
- ☐ ខ. កសិករ មេមាន់ មេទា គោ ក្របី
- ☐គ. កសិករ មេមាន់ មេទា ឆ្មា ឆ្កែ ទន្សាយ
- ☐ ឃ. កសិករ មេមាន់ មេទា ជ្រូក ឆ្កែ ឆ្មា

៥. តើមេមាន់ជាតួអង្គដូចម្ដេច? (២ពិន្ទុ)

- ☐ក. គិតតែពីផលប្រយោជន៍របស់ខ្លួន
- ☐ ខ. ចិត្តអាក្រក់
- ☐គ. លោភលន់ ចូលចិត្តធ្វើបាបអ្នកដទៃ
- ☐ ឃ. ចិត្តល្អ ចេះជួយសង្គ្រោះអ្នកដទៃ

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យខាងក្រោម " កំព្រា សិទ្ធិ "។ (២ពិន្ទុ)

......................................................................................................................

......................................................................................................................

២. ដូចម្ដេចដែលហៅថា តួអង្គ? (២ពិន្ទុ)

......................................................................................................................

## រឿងអណ្ដាត និងបេះដូង

ថ្ងៃមួយបុរសម្នាក់បង្គាប់ទៅអ្នកបម្រើឱ្យយកជ្រូកនៅក្នុងទ្រុងទៅសម្លាប់។ បុរសនោះប្រាប់អ្នកបម្រើឱ្យយកអ្វីដែលល្អជាងគេនៅក្នុងខ្លួនជ្រូកនេះឱ្យទៅគាត់។ អ្នកបម្រើធ្វើតាមបញ្ជា ហើយក៏យកបេះដូង និងអណ្ដាតទៅជូនចៅហ្វាយ។ បួនប្រាំថ្ងៃក្រោយមក ចៅហ្វាយក៏បង្គាប់អ្នកបម្រើឱ្យចាប់ជ្រូកមួយទៀតទៅសម្លាប់ ហើយឱ្យយកអ្វីដែលអាក្រក់បំផុតក្នុងខ្លួនជ្រូកមកឱ្យគាត់។ អ្នកបម្រើនោះក៏យកបេះដូង និងអណ្ដាតមកជូនចៅហ្វាយដូចមុនទៀត។ ចៅហ្វាយក៏សួរ ៖ “ហេតុដូចម្ដេច បានជាឯងនៅតែយកបេះដូង និងអណ្ដាតមកដដែលៗដូច្នេះ? ”។

បាវក៏ឆ្លើយថា សូមលោកជ្រាប “ ល្អ ឬអាក្រក់ ” មកតែពីសម្ដី និងចិត្តនេះឯង គឺអណ្ដាត និងបេះដូង។

៣. ចូរស្រង់តួអង្គនៅក្នុងនៅក្នុងរឿងអណ្ដាត និងបេះដូង ខាងលើ។ (២ពិន្ទុ)

......................................................................................................................

៤.តើរឿងអណ្ដាត និងបេះដូង លោកចៅហ្វាយឱ្យអ្នកបម្រើសម្លាប់ជ្រូកយកអ្វីមកជូនគាត់? (២ពិន្ទុ)

......................................................................................................................

៥. ហេតុអ្វីបានជាអ្នកបម្រើយកបេះដូង និងអណ្ដាត ជូនចៅហ្វាយដដែលៗ? (២ពិន្ទុ)

......................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣
មេរៀនទី២០ មេរៀនកូនចាំ

សាលាបឋមសិក្សា...............................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ។

មេសូត្រ ៖ បទកាកគតិ

ម៉ែអើយស្ដាប់ខ្ញុំ ពុកអើយកូនសុំ ចង្អុលទិសប្រាប់
តាមដែលកូនរៀន ពុកប្រៀនម៉ែប្រាប់ ថាបើនឹងរាប់
ទិសធំមានបួន។

ទិសបូព៌ទក្សិណ បស្ចិមរាប់មិន មានខុសនឹងក្បួន
ទើបដល់ឧត្តរ បន្តមិនស្ទួន កូនចេះមាំមួន
ទិសតូចបួនទៀត។

អាគ្នេយ៍និរតី ពាយ័ព្យគ្រប់បី កូនរាប់មិនឃ្លាត
ឦសានគ្រប់បួន ដោយខ្ញុំប្រឹងឆ្លៀត សិក្សាខ្មីឃ្មាត
តាមលោកទាំងពីរ។

គូសសញ្ញា √ ក្នុងប្រអប់ □ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. តើមេសូត្រខាងលើនិយាយពីអ្វី? (២ពិន្ទុ)

□ ក. មុខរបរចិញ្ចឹមត្រី　　□ ខ. សាលារៀន

□ គ. ការចិញ្ចឹមសត្វ　　□ ឃ. ទិស

២. តើទិសធំមានប៉ុន្មាន? (២ពិន្ទុ)

□ ក. មានបួន　　□ ខ. មានប្រាំ

□ គ. មានប្រាំមួយ　　□ ឃ. មានប្រាំបី

៣. តើទិសទាំងអស់មានប៉ុន្មាន? (២ពិន្ទុ)

☐ក. មានបួន ☐ខ. មានប្រាំ

☐គ. មានប្រាំពីរ ☐ឃ. មានប្រាំបី

៤. តើចន្លោះទិសខាងលិច និងទិសខាងជើងជាទិសអ្វី? (២ពិន្ទុ)

☐ក. អាគ្នេយ៍ ☐ខ. និរតី

☐គ. ពាយ័ព្យ ☐ឃ. ឦសាន

៥. ចូរគូសភ្ជាប់ពីក្នុងតារាង ក ទៅ ខ ឱ្យបានត្រឹមត្រូវ។ (២ពិន្ទុ)

| ក | ខ |
|---|---|
| បូព៌ | ទិសខាងលិច |
| ទក្សិណ | ទិសខាងជើង |
| បស្ចិម | ទិសខាងកើត |
| ឧត្តរ | ទិសខាងត្បូង |

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញក្នុងចន្លោះឱ្យបានត្រឹមត្រូវ។ (២ពិន្ទុ)

ទក្សិណ ស្ងួន ឃ្លាត ឃ្មាត បី និរតី

ទិសបូព៌............ បស្ចិមរាប់មិន មានខុសនឹងក្បួន

ទើបដល់ឧត្តរ បន្តមិន.......... កូនចេះមាំមួន

ទិសតូចបួនទៀត។

អាគ្នេយ៍......... ពាយ័ព្យគ្រប់......... កូនរាប់មិន.......

ឦសានគ្រប់បួន ដោយខ្ញុំប្រឹងផ្ទៀត សិក្សាខ្មី..........

តាមលោកទាំងពីរ។

២. ចូររកបដិសព្ទនឹងពាក្យ “ ប្រឹងប្រែង មាំមួន ”។ (២ពិន្ទុ)

..........................................................................................................

៣. ចូររកវេវចនសព្ទនឹងពាក្យ “ ទក្សិណ បស្ចិម ”។ (២ពិន្ទុ)

..........................................................................................................

..........................................................................................................

៤. ចូររកសទិសសព្ទនឹងពាក្យ “ នឹង ”។ (២ពិន្ទុ)

..........................................................................................................

..........................................................................................................

..........................................................................................................

៥. ចូរតែងល្បះតាមរូបភាពខាងក្រោមឱ្យបានត្រឹមត្រូវ។ (២ពិន្ទុ)



..............................................................................................................................។



..............................................................................................................................។



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី២១ សញ្ញាខណ្ឌ " ។ "

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរអានឧទាហរណ៍ខាងក្រោម រួចឆ្លើយនឹងសំណួរ។

១. សមាជិកគ្រួសារខ្ញុំ មានគ្នាប្រាំនាក់។
២. ម្ដាយខ្ញុំជាអ្នកដេរប៉ះ បោកគក់ ដាំស្ល និងសម្អាតផ្ទះសម្បែង។
៣. ធ្វើការ
៤. ឪពុកខ្ញុំជាកម្មករសំណង់នៅទីក្រុង។
៥. លេងកម្សាន្ត

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ

១. តាមរយៈឧទាហរណ៍ទាំងអស់ខាងលើ តើលេខរៀងណាខ្លះគ្មានសញ្ញាខណ្ឌ? (២ពិន្ទុ)

☐ក. លេខ ១ , ២ , ៣ ☐ខ. លេខ ៣ , ៤ , ៥
☐គ. លេខ ៣ , ៥ ☐ឃ. លេខ ១ , ២ , ៤

២. តាមរយៈឧទាហរណ៍ទាំងអស់ខាងលើ តើលេខរៀងណាខ្លះមានសញ្ញាខណ្ឌ? (២ពិន្ទុ)

☐ក. លេខ ១ , ២ , ៣ ☐ខ. លេខ ៣ , ៤ , ៥
☐គ. លេខ ៣ , ៥ ☐ឃ. លេខ ១ , ២ , ៤

៣. តើសញ្ញាខណ្ឌមានទីតាំងត្រង់ណានៃល្បះ? (២ពិន្ទុ)

☐ក. ពីមុខនៃល្បះ ☐ខ. នៅចំកណ្ដាលនៃល្បះ
☐គ. នៅចុងបញ្ចប់នៃល្បះ ☐ឃ. នៅត្រង់ណានៃល្បះក៏បាន

៤. តើគេប្រើសញ្ញាខណ្ឌដើម្បីអ្វី? (២ពិន្ទុ)

☐ក. បញ្ចប់កន្សោមពាក្យ ឬក្រុមពាក្យ ☐ខ. បញ្ចប់សេចក្ដីនៅខាងចុងនៃល្បះ
☐គ. បញ្ចប់ឃ្លានៃល្បះ ☐ឃ. បញ្ចប់ពាក្យនីមួយៗ

៥. គូសសញ្ញា ☑ ខាងមុខល្បះដែលត្រឹមត្រូវ (២ពិន្ទុ)

☐ ក. យើងត្រូវខិតខំរៀនទាន់ខ្លួននៅក្មេង។

☐ ខ. យើងនាំគ្នារៀនលេខ និងអក្សរឱ្យបានពូកែ។

☐ គ. ការខ្ជិលច្រអូស។

☐ ឃ. កូនល្អស្តាប់ម៉ែ សិស្សពូកែស្តាប់គ្រូ។

☐ ង. ការឧស្សាហ៍ព្យាយាម។

**សំណេរ** ( ១០ ពិន្ទុ )

១. ដូចម្តេចដែលហៅថាសញ្ញាខណ្ឌ? (២ពិន្ទុ)

..............................................................................................................................

..............................................................................................................................

២. ចូរបំពេញសញ្ញាខណ្ឌ " ។ " ឱ្យបានត្រឹមត្រូវ។ (២ពិន្ទុ)

ក. តើថ្នាក់រៀនកូនធំទូលាយ ឬទេ.........

ខ. នៅក្នុងទីធ្លាសាលាមានដើមឈើធំៗ.........

គ. ការខិតខំ.........

ឃ. កូនល្អត្រូវជួយធ្វើកិច្ចការផ្ទះ.........

៣. ចូរដាក់សញ្ញាខណ្ឌ " ។ " នៅខាងក្រោយល្បះនីមួយៗឱ្យបានត្រឹមត្រូវ។ (៣ពិន្ទុ)

សាលារៀនខ្ញុំ តូចតែស្អាត ថ្នាក់រៀនខ្ញុំ នៅជិតទីចាត់ការ ថ្នាក់រៀននីមួយៗ មានទ្វារនិងបង្អួចធំៗ សាលារៀននេះ មានរបងព័ទ្ធជុំវិញ នៅខាងមុខថ្នាក់រៀន មានសួនច្បារ នៅក្នុងទីធ្លាសាលាមានដើមឈើ ធំៗផ្តល់ម្លប់ត្រឈឹងត្រឈៃ

៤. ចូរតែងល្បះដែលបញ្ចប់ដោយសញ្ញា " ។ " ឱ្យបានបីល្បះ។ (៣ពិន្ទុ)

..............................................................................................................................

..............................................................................................................................

..............................................................................................................................




# កិច្ចការផ្ទះ

## ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី២២ រឿង កុមារចេះសន្សំសំចៃ

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

> **រឿង កុមារចេះសន្សំសំចៃ**
>
> ថ្ងៃមួយ ពេលចេញលេង សំណាង និងសុភីបានអង្គុយនិយាយគ្នា ក្រោមម្លប់ឈើ។ សំណាងនិយាយទៅកាន់សុភី ៖ “ សុភី ! ពេលដែលខ្ញុំខ្ចីសៀវភៅមេរៀនឯងមើល ខ្ញុំឃើញមានស្នាមហែក និងគូសវាសលេងផ្តេសផ្តាសទៀតផង ”។
>
> សុភី : មែនឬ?
>
> សំណាង : មែន ! សុភីឯង មិនត្រូវគូសវាសក្នុងសៀវភៅមេរៀន និងហែកក្រដាសបត់លេង ឬសរសេររំលងសន្លឹកទេ។ ឯងត្រូវសរសេរឱ្យដល់សន្លឹកចុងក្រោយសិន ចាំប្តូរសៀវភៅថ្មី។
>
> សុភី : សំណាង ! ខ្ញុំអរគុណឯងណាស់ ដែលបានជួយប្រាប់ និងរំឭកពីរបៀបថែរក្សារបស់ប្រើប្រាស់ និងសន្សំសំចៃ។ ខ្ញុំនឹងធ្វើតាមឯង។
>
> ចាប់ពីពេលនោះមក សុភីចេះសន្សំសំចៃ ទាំងប្រាក់កាស និងរបស់របរប្រើប្រាស់ផ្សេងៗ ដូចសំណាងដែរ។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. តើអត្ថបទខាងលើមានចំណងជើងដូចម្តេច? (២ពិន្ទុ)

☐ ក. សិស្សឧស្សាហ៍ ☐ ខ. កុមារចេះសន្សំសំចៃ

☐ គ. សិស្សគំរូ ☐ ឃ. អ្នកមានគុណ

២. តើអត្ថបទខាងលើមានតួអង្គប៉ុន្មាននាក់? (២ពិន្ទុ)

- ☐ក. ពីរនាក់ ☐ខ. បីនាក់
- ☐គ. បួននាក់ ☐ឃ. ប្រាំនាក់

៣. តើពេលចេញលេងសំណាង និងសុភីបានអង្គុយនិយាយគ្នានៅកន្លែងណា? (២ពិន្ទុ)

- ☐ក. នៅផ្ទះសុភី ☐ខ. នៅកន្លែងអ្នកលក់
- ☐គ. នៅក្រោមម្លប់ឈើ ☐ឃ. នៅក្នុងថ្នាក់រៀន

៤. តើសំណាងជាតួអង្គដូចម្តេច? (២ពិន្ទុ)

- ☐ក. ចេះស្តាប់ការណែនាំ ☐ខ. មិនល្អ
- ☐គ. ច្រណែនមិត្តភក្តិ ☐ឃ. ចេះជួយណែនាំមិត្តភក្តិ

៥. តើអត្ថបទខាងលើអប់រំប្អូនពីអ្វី? (២ពិន្ទុ)

- ☐ក. មានភាពស្មោះត្រង់ ☐ខ. ក្លាយជាមនុស្សល្អ
- ☐គ. មានភាពក្លាហាន ☐ឃ. ឱ្យចេះសន្សំសំចៃ

**សំណេរ** ( ១០ ពិន្ទុ )

១. ចូររៀបពាក្យ ឬកន្សោមពាក្យក្នុងប្រអប់ឱ្យបានជាល្បះត្រឹមត្រូវ។ (៣ពិន្ទុ)

ក.

| | | | | |
|---|---|---|---|---|
| ជា | រៀនសូត្រ។ | សំណាង | ព្យាយាម | សិស្ស |

..........................................................................................................................

ខ.

| | | | | | |
|---|---|---|---|---|---|
| សន្សំសំចៃ | របស់ប្រើប្រាស់។ | យើង | ប្រាក់កាស | ត្រូវចេះ | និង |

..........................................................................................................................

គ.

| | | | | | |
|---|---|---|---|---|---|
| ក្មេង | យោបល់ | មិត្តភក្តិ។ | ចេះស្តាប់ | សុភី | ជា |

..........................................................................................................................

២. ចូរតែងល្បះនឹងពាក្យ “ សន្សំសំចៃ ” ឱ្យបានពីរល្បះ។ (២ពិន្ទុ)

១. ..........................................................................................................................

២. ..........................................................................................................................

៣. ចូរបំពេញចន្លោះខាងក្រោមឱ្យបានត្រឹមត្រូវ។ (៣ពិន្ទុ)

សាលារៀនខ្ញុំឈ្មោះ....................................សង់អំពី....................ប្រក់.......................... មាន...................ចំនួន............ខ្នង ចែកចេញជា......................បន្ទប់។ សាលារៀននេះស្ថិតនៅខាង.....................ទីចាត់ការ ។ រាល់ព្រឹក យើង...............................ស្អាតជានិច្ច។ ខ្ញុំស្រឡាញ់សាលារៀនខ្ញុំណាស់ ពីព្រោះ..........................................................................................។

៤. ចូរតែងល្បះតាមរូបភាពខាងក្រោមឱ្យបានចំនួនពីរល្បះ។ (២ពិន្ទុ)



១. ...........................................................................................................................

២. ...........................................................................................................................



# កិច្ចការផ្ទះ

# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី២៣ ការពណ៌នាអំពីសត្វ

សាលាបឋមសិក្សា...............................

ឈ្មោះសិស្ស.......................................




**អំណាន** (១០ ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

**ចម្រើនឆ្មាខ្ញុំ**

ខ្ញុំមានឆ្មាឈ្មោលមួយឈ្មោះចម្រើន។

វាមានរាងតូចបន្តិចតែធាត់ ហើយមានសម្បុរ ត្រសក់។ ក្បាលវារាងមូលភ្នែកធំៗ មានពន្លឺភ្លឺថ្លាដូចគ្រាប់ពេជ្រ។ ចម្រើនមានពាម ពុកមាត់ដុះវែងៗ ហើយរឹង។ ធ្មេញវាស្រួច ចង្កូមវិញវែងហើយមុតទៀតផង។ ឯច្រមុះវាតូចតែមានសំណើមជានិច្ច។ ចំណែកត្រចៀកទាំងពីររបស់វាធំល្មម ស្រដៀងនឹងត្រចៀកខ្លា។ ជើងទាំងបួនរបស់វាមានក្រចកមុតស្រួចរាងកោង ហើយខុបចូលក្នុង។ នៅពេលវាចាប់កណ្តុរម្តងៗ កណ្តុរមិនដែលរួចខ្លួនម្តងណាឡើយ។

ខ្ញុំស្រឡាញ់ចម្រើនណាស់ ព្រោះវាប៉ិនចាប់កណ្តុរ ហើយមិនចេះលួចត្រីអាំង ឬសាច់របស់ម្តាយខ្ញុំទេ។ វាជាសត្វចតុបាទមានប្រយោជន៍ចំពោះយើង។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ (១០ពិន្ទុ)

១. តើអត្ថបទខាងលើមានចំណងជើងដូចម្តេច? (២ពិន្ទុ)

☐ ក. ឆ្មាចេះ ☐ ខ. ឆ្មា និងកណ្តុរ

☐ គ. ចម្រើនឆ្មាខ្ញុំ ☐ ឃ. សត្វដែលខ្ញុំចិញ្ចឹម

២. តើសត្វនោះមានសម្បុរអ្វី? (២ពិន្ទុ)

☐ ក. ស ☐ ខ. ត្រសក់

☐ គ. លឿង ☐ ឃ. ខ្មៅ

៣. តើចម្រើនជាអ្វី? (២ពិន្ទុ)

☐ក. ឈ្មោះក្មេងប្រុស ☐ខ. ឈ្មោះសត្វឆ្មា

☐គ. ឈ្មោះសត្វគោ ☐ឃ. ឈ្មោះសត្វកណ្ដុរ

៤. តើវាតែងតែចាប់អ្វីជាអាហារ? (២ពិន្ទុ)

☐ក. ចាប់មាន់ ☐ខ. ចាប់ត្រី

☐គ. ចាប់កន្ធំរុយ ☐ឃ. ចាប់កណ្ដុរ

៥. ហេតុអ្វីបានជាម្ចាស់វាស្រឡាញ់វាខ្លាំងម្ល៉េះ? (២ពិន្ទុ)

☐ក. ប៉ិនចាប់កណ្ដុរ និងមិនចេះលួច ☐ខ. មានរូបរាងស្អាត

☐គ. ចេះយកចិត្តម្ចាស់ ☐ឃ. រត់លឿន

**សំណេរ** ( ១០ ពិន្ទុ )

**សំណួរ**

១. តើតែងសេចក្ដីចែកចេញជាប៉ុន្មានផ្នែកធំៗ? អ្វីខ្លះ? (២ពិន្ទុ)

២. តើផ្នែកនីមួយៗនៃតែងសេចក្ដីនិយាយពីអ្វី? (៣ពិន្ទុ)

៣. ចូរប្អូនសរសេរតែងសេចក្ដីពណ៌នាអំពីសត្វឆ្កែ។ (៥ពិន្ទុ)

**<u>ចម្លើយ</u>**

..............................................................................................................

..............................................................................................................

..............................................................................................................

..............................................................................................................

..............................................................................................................

..............................................................................................................

..............................................................................................................

..............................................................................................................

..............................................................................................................

..............................................................................................................

..............................................................................................................

..............................................................................................................

..............................................................................................................

..............................................................................................................

..............................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣
មេរៀនទី២៤ អ្នកជិតខាងល្អ

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

អ្នកជិតខាង គឺជាអ្នកដែលរស់នៅក្បែរផ្ទះយើងគ្រប់គ្នា គ្រប់ទីកន្លែង។

អ្នកជិតខាងល្អ គឺជាអ្នកដែលចេះគោរពស្រឡាញ់រាប់អានគ្នា ហើយចេះគួរសមដោយមិនរើសអើងចំពោះគ្នា។ ពេលមានទុក្ខធុរៈដូចជា មានពិធីរៀបការ ពិធីបុណ្យទាន ពេលមានអាសន្ន និងមានកិច្ចការរវល់ផ្សេងៗ អ្នកជិតខាងតែងតែជួយគ្នាទៅវិញទៅមក។ ពេលមានចំណី ម្ហូបអាហារឆ្ងាញ់ យើងតែងចែករំលែកគ្នាហូប។ លើសពីនេះទៀត អ្នកជិតខាងល្អមានឫកពាអាកប្បកិរិយាសុភាពរាបសា និងមានសម្ដីទន់ភ្លន់ដោយមិនទ្រគោះបោះបោកដាក់គ្នាដែលនាំឱ្យកើតជម្លោះ។ ម្យ៉ាងទៀត អ្នកជិតខាងល្អ គឺមិននិយាយដើមគ្នា មិនបញ្ចេញឫកពាច្រងេងច្រងាងដាក់គ្នា។ ពោលគឺចេះការពារ និងគោរពសិទ្ធិគ្នា។

ដូច្នេះ យើងនឹងរួមរស់ជាមួយគ្នាក្នុងសហគមន៍មួយប្រកបដោយសុខសន្តិភាព។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. តើអត្ថបទខាងលើមានចំណងជើងដូចម្ដេច? (២ពិន្ទុ)

☐ ក. កុមារចេះសន្សំសំចៃ ☐ ខ. អ្នកជិតខាងល្អ

☐ គ. ការពណ៌នាអំពីសត្វ ☐ ឃ. មនុស្សល្អ

២. តើអត្ថបទនេះនិយាយពីអ្វី? (២ពិន្ទុ)

☐ ក. ការច្រណែនឈ្នានីស ☐ ខ. ការងារជាមាសប្រាក់

☐ គ. រស់នៅក្បែរគ្នាត្រូវចេះគោរព យកអាសាគ្នា ☐ ឃ. មិត្តល្អ

៣. ដើម្បីឱ្យអ្នកជិតខាងគោរពស្រឡាញ់យើង តើយើងត្រូវធ្វើដូចម្តេច? (២ពិន្ទុ)

☐ក. មានទ្រព្យសម្បត្តិច្រើន ☐ខ. មានអំណាច

☐គ. មានការងារធ្វើ ☐ឃ. ចេះគោរព ឱ្យតម្លៃ និងយកអាសាគ្នា

៤. តើអ្វីខ្លះដែលយើងមិនគួរធ្វើចំពោះអ្នកជិតខាង? (២ពិន្ទុ)

☐ក. ជួយយកអាសាគ្នា ☐ខ. និយាយលេងសើច

☐គ. បៀតបៀន បង្កទំនាស់ រើសអើង ☐ឃ. បរិភោគអាហារជាមួយ

៥. ចូរគូសភ្ជាប់ពាក្យដែលមានថ្នាក់ពាក្យជានាម ទៅ (នាម) ឱ្យបានត្រឹមត្រូវ។ (២ពិន្ទុ)




**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យ “ រើសអើង សហគមន៍ សន្តិភាព ”។ (៣ពិន្ទុ)

.................................................................................................................

.................................................................................................................

.................................................................................................................

២. ចូររកសទិសសព្ទនឹងពាក្យ “ ក៏ ”។ (២ពិន្ទុ)

.................................................................................................................

.................................................................................................................

.................................................................................................................

.................................................................................................................

.................................................................................................................

.................................................................................................................

.................................................................................................................

៣. ចូរធ្វើចំណែកក្រុមពាក្យជាចំណីអាហារ និងវត្ថុដូចខាងក្រោម។ (២ពិន្ទុ)

ទូ បាយ កៅអី សម្ល ចាន គុយទាវ គ្រែ បន្លែ ផ្ទះ សាច់ នំ

| ក្រុមពាក្យជាចំណីអាហារ | ក្រុមពាក្យជាវត្ថុ |
|---|---|
| ........................................................... | ........................................................... |
| ........................................................... | ........................................................... |

៤. ចូរតែងល្បះតាមរូបភាពខាងក្រោម ឱ្យបានបីល្បះ។ (៣ពិន្ទុ)



១...........................................................................................................................

២...........................................................................................................................

៣...........................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី២៥ សទិសសព្ទ

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

មីងសានជាអ្នកថែទាំសួនច្បារ។ គាត់ជាមនុស្សគ។ ភារកិច្ចគាត់គឺសម្អាត និងថែទាំសួនច្បារ។ រាល់ថ្ងៃ មីងសានប្រមូលសំរាមយកមកគរទុកក្បែរដើមគធំមួយ រួចហើយគាត់កើបយកទៅដាក់ក្នុងធុងសំរាម ដើម្បីកុំឱ្យធុំក្លិនស្អុយ។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. តើមីងសានជានរណា? (២ពិន្ទុ)

☐ក. គ្រូពេទ្យ ☐ខ. គ្រូបង្រៀន

☐គ. អ្នកថែសួន ☐ឃ. អ្នកលក់ដូរ

២. តើគាត់មានភារកិច្ចធ្វើអ្វី? (២ពិន្ទុ)

☐ក. ព្យាបាលអ្នកជំងឺ ☐ខ. បង្រៀនសិស្ស

☐គ. ថែទាំកូន ☐ឃ. សម្អាត និងថែរក្សាសួនច្បារ

៣. តើមីងសានប្រមូលអ្វី មកគរទុកក្បែរដើមគធំមួយ? (២ពិន្ទុ)

☐ក. ផ្កា ☐ខ. សំរាម

☐គ. ផ្លែគ ☐ឃ. ដើមជំឡូង

៤. ហេតុអ្វីមីងសាន យកសំរាមទៅដាក់ក្នុងធុងសំរាម? (២ពិន្ទុ)

☐ក. កុំឱ្យចង្អៀតផ្ទះ ☐ខ. កុំឱ្យធុំក្លិនស្អុយ

☐គ. ខ្លាចគេផាកពិន័យ ☐ឃ. ខ្លាចគេស្តីបន្ទោស

៥. ចូរបង្ហាញពាក្យដែលជាសទិសសព្ទនឹងពាក្យ " ធុំ និង គរ"។ (២ពិន្ទុ)

- ☐ក. ស្អុយ និង រលួយ
- ☐ខ. តូច និង និយាយ
- ☐គ. ធំ និង គ
- ☐ឃ. សំរាម និង ធុង

**សំណេរ** ( ១០ ពិន្ទុ )

១. ដូចម្ដេចដែលហៅថាសទិសសព្ទ។ (២ពិន្ទុ)

..................................................................................................................................

..................................................................................................................................

២. ចូររកសទិសសព្ទនឹងពាក្យ " លិច សរ "។ (៤ពិន្ទុ)

..................................................................................................................................

..................................................................................................................................

..................................................................................................................................

..................................................................................................................................

..................................................................................................................................

..................................................................................................................................

..................................................................................................................................

..................................................................................................................................

..................................................................................................................................

..................................................................................................................................

..................................................................................................................................

៤. ចូរតែងល្បះជាមួយពាក្យដែលជាសទិសសព្ទនឹងពាក្យ " គ "ឱ្យបានពីរល្បះ។ (២ពិន្ទុ)

..................................................................................................................................

..................................................................................................................................

៥. ចូរតែងល្បះឱ្យត្រូវនឹងរូបភាពខាងក្រោម។ (២ពិន្ទុ)





.............................................................. ..............................................................



# កិច្ចការផ្ទះ

# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី២៦ ពិធីបុណ្យដារលាននៅភូមិខ្ញុំ

សាលាបឋមសិក្សា.................................

ឈ្មោះសិស្ស.........................................




**អំណាន** ( ១០ ពិន្ទុ )

ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ។

មេសូត្រ បទកាកគតិ

| | | |
|---|---|---|
| បុណ្យដាររភូមិខ្ញុំ | មីងពូជួបជុំ | សប្បាយរីករាយ |
| នៅក្រោមដើមពោធិ៍ | ញញឹមពព្រាយ | ខ្លះរែកទូលស្ពាយ |
| | នំម្ហូបអាហារ។ | |
| មីងពូទាំងអស់ | ចាស់ទុំស្រីប្រុស | រួមទាំងអាចារ្យ |
| រាប់បាត្រព្រះសង្ឃ | បួងសួងទេវតា | ស្ដាប់លោកទេសនា |
| | ប្រាថ្នាសុខសាន្ត។ | |
| ពិសេសសុំដល់ | សម្បូរភោគផល | ជួបសុខក្សេមក្សាន្ត |
| ប្រកបរបរ | ស្រែចម្ការបាន | រុងរឿងថ្កើងថ្កាន |
| | ជាប់ជាប្រចាំ។ | |
| បុណ្យដាររភូមិខ្ញុំ | បានសុខមនោរម្យ | ជារៀងរាល់ឆ្នាំ |
| រំឭកដល់គុណ | បុណ្យជូនតាផ្ដាំ | ចងជាចំណាំ |
| | ក្នុងក្បួនតម្រា។ | |

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ (១០ពិន្ទុ)

១. តើមេសូត្រខាងលើជាបទអ្វី? (២ពិន្ទុ)

☐ ក. ពាក្យបួន ☐ ខ. កាកគតិ

☐ គ. ព្រហ្មគីតិ ☐ ឃ. ពាក្យ៧

២. តើមេសូត្រខាងលើមានប៉ុន្មានវគ្គ? (២ពិន្ទុ)

☐ក. បីវគ្គ ☐ខ. បួនវគ្គ

☐គ. ប្រាំវគ្គ ☐ឃ. ប្រាំពីរវគ្គ

៣. តើមេសូត្រខាងលើមួយវគ្គមានប៉ុន្មានឃ្លា? (២ពិន្ទុ)

☐ក. ប្រាំមួយឃ្លា ☐ខ. បួនឃ្លា

☐គ. ប្រាំឃ្លា ☐ឃ. ប្រាំពីរឃ្លា

៤. តើបុណ្យដារលានគេធ្វើនៅឯណា? (២ពិន្ទុ)

☐ក. នៅវត្ត ☐ខ. នៅផ្ទះ

☐គ. ក្រោមដើមពោធិ៍ ☐ឃ. នៅផ្ទះមេភូមិ

៥. តើគេធ្វើបុណ្យដារលានដើម្បីអ្វី? (២ពិន្ទុ)

☐ក. ឧទ្ទិសដល់ទេវៈផ្សេង

☐ខ. ឧទ្ទិសដល់អ្នកតាទឹកសុំឱ្យមានភ្លៀងធ្លាក់ច្រើន

☐គ. ឧទ្ទិសដល់បុព្វការីជនដែលបានស្លាប់ទៅ

☐ឃ. បួងសួងទេវតាសុំសេចក្ដីសុខសាន្ត និងប្រកបរបរស្រែចម្ការទទួលបានផលល្អ

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យ " បុណ្យដារ ទេសនា "។ (២ពិន្ទុ)

........................................................................................................................

........................................................................................................................

........................................................................................................................

........................................................................................................................

២. ចូររកបដិសព្ទនឹងពាក្យ " បុណ្យ សុខ "។ (២ពិន្ទុ)

........................................................................................................................

........................................................................................................................

៣. ចូររកសទិសសព្ទនឹងពាក្យ " ទុំ "។ (២ពិន្ទុ)

........................................................................................................................

........................................................................................................................

៤. ចូរតែងល្បះនឹងពាក្យ " ព្រះសង្ឃ ចាស់ទុំ " ឱ្យបានមួយពាក្យ ក្នុងមួយល្បះ។ (២ពិន្ទុ)

........................................................................................................................

........................................................................................................................

៥. ចូរតែងល្បះឱ្យត្រូវនឹងរូបភាព ឱ្យបានចំនួនពីរល្បះ។ (២ពិន្ទុ)



....................................................................................................................................

....................................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣
មេរៀនទី២៧ អំពីគុណនាម

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** (១០ ពិន្ទុ)

ចូរអានកថាខណ្ឌខាងក្រោម រួចឆ្លើយនឹងសំណួរ។

ដារីជាសិស្សឧស្សាហ៍។ នាងមានរាងស្ដើងខ្ពស់ សម្បុរខ្មៅស្រអែម សក់ស្លូតហើយវែង។ ដារីមិនត្រឹមតែឧស្សាហ៍រៀនសូត្ររហូតក្លាយជាសិស្សពូកែប៉ុណ្ណោះទេ ប៉ុន្តែនាងក៏ជាកូនល្អម្នាក់នៅក្នុងគ្រួសារថែមទៀត។ រាល់ថ្ងៃក្រៅពីកិច្ចការរៀនសូត្រនៅសាលានាងតែងជួយធ្វើកិច្ចការផ្ទះជាមួយឪពុកម្ដាយ ដូចជាបោសសម្អាតផ្ទះ បោកគក់លាងចានឆ្នាំងបានស្អាត មិនខ្ជិលច្រអូសឡើយ។

ឪពុក ម្ដាយ និងញាតិជិតខាងតែងសរសើរនាងថាជាក្មេងឆ្លាត មានចរិតស្លូតបូត សុភាពរាបសា គួរឱ្យស្រឡាញ់។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. តើដារីជាសិស្សដូចម្ដេច? (២ពិន្ទុ)

☐ក. សិស្សឧស្សាហ៍ ☐ខ. សិស្សខ្ជិល

☐គ. សិស្សរៀនខ្សោយ ☐ឃ. សិស្សបង្កបញ្ហាក្នុងថ្នាក់

២. តើដារីមានសម្បុរអ្វី? (២ពិន្ទុ)

☐ក. ខ្មៅ ☐ខ. ស

☐គ. សណ្ដែកបាយ ☐ឃ. ខ្មៅស្រអែម

៣. តើដារីជាកូនដូចម្ដេចនៅក្នុងគ្រួសារ? (២ពិន្ទុ)

☐ក. មិនស្ដាប់បង្គាប់ ☐ខ. ខ្ជិលច្រអូស

☐គ. កូនល្អក្នុងគ្រួសារ ☐ឃ. មិនជួយធ្វើការ

៤. ក្រៅពីកិច្ចការរៀនសូត្រនៅសាលារៀន តើនៅផ្ទះដាវីបានធ្វើអ្វីខ្លះ? (២ពិន្ទុ)

- ☐ ក. មើលតែទូរសព្ទ
- ☐ ខ. មិនជួយធ្វើការងារផ្ទះ
- ☐ គ. បោសសម្អាតផ្ទះ បោកគក់ លាងចាន
- ☐ ឃ. ដើរលេងជាមួយមិត្តភក្តិ

៥. តើដាវីជាក្មេងដូចម្ដេច? (២ពិន្ទុ)

- ☐ ក. គួរឱ្យស្អប់
- ☐ ខ. មិនឆ្លាត
- ☐ គ. ពូកែងរ
- ☐ ឃ. ឆ្លាតគួរឱ្យស្រឡាញ់

**សំណេរ** ( ១០ ពិន្ទុ )

១. ដូចម្តេចដែលហៅថាគុណនាម? (២ពិន្ទុ)

.......................................................................................................................................

.......................................................................................................................................

២. ចូរស្រង់គុណនាមយ៉ាងតិចឱ្យបានចំនួនប្រាំ ពីក្នុងអត្ថបទខាងលើ។ (២ពិន្ទុ)

.......................................................................................................................................

.......................................................................................................................................

៣. ចូរបំពេញចន្លោះក្នុងល្បះខាងក្រោមឱ្យបានត្រឹមត្រូវ ដោយប្រើពាក្យជាគុណនាម។ (៣ពិន្ទុ)

ក. វឌ្ឍនាជាក្មេង.........................រៀនសូត្រណាស់។

ខ. ម្ដាយខ្ញុំមានចរិត.......................សុភាពរាបសា ហើយ....................វាងវៃក្នុងការងារ។

គ. សុហេងមានរាង...................ស្រឡះ សក់....................ហើយតែងតែបានពិន្ទុ............ ជាងគេនៅក្នុងថ្នាក់។

៤. ចូរតែងល្បះនឹងពាក្យខាងក្រោមឱ្យបានត្រឹមត្រូវ។ (៣ពិន្ទុ)

- ឆ្លាត : ......................................................................................................
- ស្លូតបូត : ......................................................................................................
- ពូកែ : ......................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣
## មេរៀនទី២៨ ល្បែងបោះអង្គញ់

សាលាបឋមសិក្សា...............................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

ខ្មែរយើងមានល្បែងប្រជាប្រិយជាច្រើនសម្រាប់លេងកម្សាន្តដូចជា បោះអង្គញ់ ទាញព្រ័ត្រ លាក់កន្សែង ចោលឈូង។ល។

បោះអង្គញ់ជាល្បែងដ៏មានប្រជាប្រិយមួយ ដែលគេនិយមលេងនៅក្នុងឱកាសបុណ្យចូលឆ្នាំខ្មែរ។ គេលេងល្បែងនេះ ដោយចែកគ្នាជាពីរក្រុម គឺមួយក្រុមជាបុរស និងមួយក្រុមទៀតជាស្ត្រី។ ក្រុមទាំងពីរមានសមាជិកតិច ឬច្រើនមិនកំណត់ឡើយ។ គេប្រើគ្រាប់អង្គញ់សម្រាប់ដាំធ្វើជាកោយ និងសម្រាប់ធ្វើជាគ្រាប់បោះ។ តាមទម្លាប់ប្រពៃណីខ្មែរ គឺក្រុមឈ្នះត្រូវយកគ្រាប់អង្គញ់ ទៅជោះក្បាលជង្គង់ក្រុមចាញ់។

បោះអង្គញ់ ជាល្បែងប្រជាប្រិយខ្មែរ ដែលបានបន្សល់ទុកតាំងពីដូនតាមក។ ដូច្នេះ យើងត្រូវរួមគ្នាថែរក្សាកេរមរតកនេះ ឱ្យបានគង់វង្ស។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. តើអត្ថបទខាងលើមានចំណងជើងដូចម្ដេច? (២ពិន្ទុ)

☐ក. បុណ្យចូលឆ្នាំខ្មែរ ☐ខ. ល្បែងប្រជាប្រិយ

☐គ. មរតកខ្មែរ ☐ឃ. ល្បែងបោះអង្គញ់

២. តើល្បែងបោះអង្គញ់គេនិយមលេងនៅពេលណា? (២ពិន្ទុ)

☐ក. បុណ្យអុំទូក ☐ខ. បុណ្យចូលឆ្នាំ

☐គ. បុណ្យកឋិនទាន ☐ឃ. បុណ្យភ្ជុំ

៣. តើគេលេងល្បែងបោះអង្គញ់ចែកគ្នាជាប៉ុន្មានក្រុម? (២ពិន្ទុ)

☐ក. ពីរក្រុម ☐ខ. បីក្រុម

☐គ. មួយក្រុម ☐ឃ. បួនក្រុម

៤. តើល្បែងបោះអង្គញ់ គេយកអ្វីទៅលេង? (២ពិន្ទុ)

☐ក. ផ្លែក្រសាំង ☐ខ. ឈើ

☐គ. គ្រាប់ត្នោត ☐ឃ. គ្រាប់អង្គញ់

៥. តើល្បែងបោះអង្គញ់អ្នកចាញ់ត្រូវធ្វើដូចម្ដេច? (២ពិន្ទុ)

☐ក. ច្រៀង ☐ខ. រាំ

☐គ. ឱ្យអ្នកឈ្នះជោះក្បាលជង្គង់ ☐ឃ. ធ្វើកាយវិការត្រាប់តាមសត្វ

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យ " ជោះ ប្រជាប្រិយ ព្រ័ត្រ "។ (២ពិន្ទុ)

.....................................................................................................................

.....................................................................................................................

.....................................................................................................................

.....................................................................................................................

២. ចូររកសទិសសព្ទនឹងពាក្យ " លាក់ "។ (៣ពិន្ទុ)

.....................................................................................................................

.....................................................................................................................

.....................................................................................................................

.....................................................................................................................

.....................................................................................................................

.....................................................................................................................

៣. ចូរស្រង់ពាក្យជាគុណនាមក្នុងអត្ថបទឱ្យបានចំនួន ៥។ (២ពិន្ទុ)

.....................................................................................................................

៤. ចូរឆ្លើយសំណួរខាងក្រោម។ (៣ពិន្ទុ)

ក. តើខ្មែរយើងមានល្បែងប្រជាប្រិយអ្វីខ្លះ?

ខ. តើគេលេងល្បែងបោះអង្គញ់យ៉ាងដូចម្ដេច?

គ. ហេតុអ្វីបានជាយើងចាំបាច់ចូលរួមថែរក្សាល្បែងប្រជាប្រិយខ្មែរ?

<u>ចម្លើយ</u>

.....................................................................................................................

.....................................................................................................................

.....................................................................................................................

.....................................................................................................................

.....................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី២៩ ការណែនាំទីកន្លែងទេសចរណ៍ក្នុងភូមិ

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរអានអត្ថបទសន្ទនាខាងក្រោម រួចឆ្លើយនឹងសំណួរ។

កុសល : ជម្រាបសួរមីង! ខ្ញុំសូមសួរមីងបន្តិច តើមីងដឹងថារមណីយដ្ឋានភ្នំជើងព្រៃស្ថិតនៅឯណា?

មីង : ពេលក្មួយចេញដំណើរពីរង្វង់មូលស្តូន់តាមផ្លូវជាតិលេខ៦ សំដៅទៅភ្នំពេញប្រមាណ៩ គីឡូម៉ែត្រក្មួយនឹងឃើញបង្គោលគីឡូម៉ែត្រ ព្រមទាំងផ្លាកសញ្ញាបង្ហាញមួយនៅខាងស្ដាំដៃ បន្ទាប់មកបត់ស្ដាំទៅតាមផ្លូវលំដីក្រហមប្រហែល២គីឡូម៉ែត្រ ឆ្លងកាត់ភូមិឈូក ឃុំគោករវៀង ក្បែរជើងភ្នំ នោះក្មួយនឹងឃើញរមណីយដ្ឋានភ្នំជើងព្រៃនោះជាពុំខាន។

កុសល : បាទ ! អរគុណមីង ! ខ្ញុំសូមជម្រាបលា។

មីង : មិននអីទេក្មួយ ! ទៅចុះសូមបានសេចក្ដីសុខ និងសុវត្ថិភាពតាមផ្លូវ។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. ពេលជួបនឹងមីង តើកុសលនិយាយទៅកាន់គាត់ដូចម្ដេច? (២ពិន្ទុ)

☐ក. អរគុណមីង ☐ខ. មីងឈប់!

☐គ. ជម្រាបលាមីង ☐ឃ. ជម្រាបសួរមីង

២. តើកុសល សួរមីងរកអ្វី? (២ពិន្ទុ)

☐ក. រង្វង់មូលស្តូន់ ☐ខ. ភូមិឈូក

☐គ. រមណីយដ្ឋានភ្នំជើងព្រៃ ☐ឃ. ឃុំគោករវៀង

៣. តើរមណីយដ្ឋានភ្នំជើងព្រៃស្ថិតនៅក្នុងខេត្តណា? (២ពិន្ទុ)

☐ក. កំពង់ធំ ☐ខ. កំពង់ចាម

☐គ. ព្រៃវែង ☐ឃ. កំពង់ឆ្នាំង

៤. ចុងក្រោយ តើកុសលនិយាយទៅកាន់មីងដូចម្ដេច? (២ពិន្ទុ)

- ☐ ក. សូមសួរបន្តិចមីង
- ☐ ខ. បាទ! អរគុណមីង!
- ☐ គ. មិនអីទេមីង
- ☐ ឃ. ជម្រាបសួរមីង!

៥. តើអត្ថបទខាងលើនិយាយពីអ្វី? (២ពិន្ទុ)

- ☐ ក. ទីកន្លែងទេសចរណ៍ក្នុងភូមិ
- ☐ ខ. ល្បែងប្រជាប្រិយ
- ☐ គ. ពិធីបុណ្យ
- ☐ ឃ. របរកសិកម្ម

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យ “ រមណីយដ្ឋាន ទេសចរណ៍ សុវត្ថិភាព ”។ (៣ពិន្ទុ)

..........................................................................................................................

..........................................................................................................................

..........................................................................................................................

២. ចូររកបដិសព្ទនឹងពាក្យ “ សុវត្ថិភាព សុខ ”។ (១ពិន្ទុ)

..........................................................................................................................

..........................................................................................................................

៣. ចូរស្រង់ពាក្យជានាមក្នុងអត្ថបទខាងលើឱ្យបានចំនួន ៥។ (១ពិន្ទុ)

..........................................................................................................................

៤. ចូរតែងល្បះឱ្យត្រូវនឹងរូបភាព។ (២ពិន្ទុ)



..........................................................................................................................

..........................................................................................................................

៥.ចូរសរសេរអត្ថបទសន្ទនា តាមគំរូអត្ថបទខាងលើ ដោយម្នាក់ធ្វើជាអ្នកសួររកទីកន្លែងទេសចរណ៍ ឬរមណីយដ្ឋានណាមួយ និងម្នាក់ទៀតជាអ្នកធ្លាប់ស្គាល់ ជួយណែនាំទីកន្លែងទេសចរណ៍នោះ។ (៣ពិន្ទុ)

..........................................................................................................................

..........................................................................................................................

..........................................................................................................................

..........................................................................................................................

..........................................................................................................................

..........................................................................................................................

..........................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៣០ ទឹកជំនន់នៅភូមិខ្ញុំ

សាលាបឋមសិក្សា.................................

ឈ្មោះសិស្ស........................................




**អំណាន** (១០ ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

កាលពីខែមុន មានភ្លៀងធំធ្លាក់ជាប់គ្នាច្រើនថ្ងៃឥតស្រាកស្រាន្ត។

ភូមិមួយចំនួន ត្រូវលិចលង់ស្ទើរតែទាំងអស់។ នៅតាមផ្លូវកម្ពស់ទឹកបានឡើងដល់មួយម៉ែត្រ។ អ្នកភូមិខ្ញុំ បាននាំគ្នាជញ្ជូនកូនចៅ សត្វពាហនៈ គោ ក្របី និងជ្រូក មាន់ ទា ព្រមទាំងសម្ភារៈ ឧបករណ៍ប្រើប្រាស់សំខាន់ៗ ទៅកាន់ទីទួលសុវត្ថិភាព។ ទឹកជំនន់ឆ្នាំនេះ បានបង្កគ្រោះមហន្តរាយជាច្រើន ធ្វើឱ្យប៉ះពាល់បាត់បង់អាយុជីវិតមនុស្ស សត្វ ខូចខាតទ្រព្យសម្បត្តិ ផ្ទះសម្បែង សាលារៀន មណ្ឌលសុខភាព ស្រូវ ដំណាំ និងស្ពាន ផ្លូវ យ៉ាងធ្ងន់ធ្ងរ។ ទឹកជំនន់បាននាំមកជាមួយនូវកាកសំណល់ និងលាមកគ្រប់ប្រភេទដែលជាហេតុបណ្ដាលឱ្យមានជំងឺរាកដល់អ្នកដែលខ្វះអនាម័យ។ ក្រោយគ្រោះមហន្តរាយនេះ យើងឃើញមានក្រុមសង្គ្រោះ បានរុករកអ្នករងគ្រោះ។ គណៈកម្មាធិការជាតិគ្រប់គ្រងគ្រោះមហន្តរាយ កាកបាទក្រហមកម្ពុជា អង្គការមនុស្សធម៌ជាតិ អន្តរជាតិ និងសប្បុរសជនជាច្រើនទៀតបានចុះជួយឧបត្ថម្ភ ស្បៀង អាហារ ថ្នាំពេទ្យ និងសម្ភារៈប្រើប្រាស់ចាំបាច់នានា ដើម្បីសម្រួលទុក្ខលំបាកនៃជនរងគ្រោះ និងបានណែនាំប្រជាជននៅពេលមានទឹកជំនន់ ឱ្យញ៉ាំទឹកឆ្អិនជានិច្ច។

ដើម្បីត្រៀមបង្ការជាមុន ពេលមានគ្រោះទឹកជំនន់ យើងត្រូវត្រៀមសម្ភារៈ បរិក្ខារសង្គ្រោះ ទីទួលសុវត្ថិភាព សាងសង់ផ្ទះ សាលារៀនឱ្យខ្ពស់ផុតពីទឹក ព្រមទាំងសាងសង់ទំនប់ជាដើម។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. ក្រោយពីមានភ្លៀងធំធ្លាក់ជាប់ៗគ្នា តើនៅក្នុងភូមិមួយចំនួនមានរឿងអ្វីកើតឡើង? (២ពិន្ទុ)

☐ក. មានអំពើចោរកម្ម ☐ខ. មានជំងឺអាសន្នរោគ

☐គ. មានទឹកប្រើគ្រប់គ្រាន់ ☐ឃ. ភូមិមួយចំនួនត្រូវលិចលង់

២. តើអ្នកភូមិធ្វើអ្វី ពេលមានទឹកជំនន់? (២ពិន្ទុ)

☐ក. លើកទំនប់ ☐ខ. ត្រៀមសម្ភារៈធ្វើកសិកម្ម

☐គ. រកទីទួលសុវត្ថិភាព ☐ឃ. ត្រៀមសម្ភារៈសម្រាប់នេសាទ

៣. ហេតុអ្វីបានជាប្រជាជនមួយចំនួននៅទីនោះកើតជំងឺរាក? (២ពិន្ទុ)

☐ក. មិនមានថ្នាំលេបគ្រប់គ្រាន់ ☐ខ. ខ្វះអនាម័យ

☐គ. ងូតទឹកមិនស្អាត ☐ឃ. ញ៉ាំបន្លែឆៅ

៤. ពេលមានទឹកជំនន់ តើគេណែនាំប្រជាជនដូចម្ដេចកុំឱ្យកើតជំងឺរាក? (២ពិន្ទុ)

☐ក. ញ៉ាំអាហារឱ្យបានគ្រប់គ្រាន់ ☐ខ. ងូតទឹកជាប្រចាំ

☐គ. ញ៉ាំទឹកឆ្អិនជានិច្ច ☐ឃ. លាងសម្អាតដៃ

៥. តើអត្ថបទខាងលើនិយាយពីអ្វី? (២ពិន្ទុ)

☐ក. ខ្យល់ព្យុះ ☐ខ. គ្រោះរាំងស្ងួត

☐គ. ភ្លើងឆេះព្រៃ ☐ឃ. គ្រោះទឹកជំនន់

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យ " ជំនន់ ឧបត្ថម្ភ មណ្ឌលសុខភាព "។ (៣ពិន្ទុ)

..........................................................................................................................

..........................................................................................................................

..........................................................................................................................

២. ចូរជ្រើសរើសពាក្យក្នុងប្រអប់ ទៅបំពេញល្បះខាងក្រោមឱ្យបានត្រឹមត្រូវ។ (៣ពិន្ទុ)

| ឧបត្ថម្ភ | មហន្តរាយ | ក្នុងភូមិ | លិចលង់ | សង្គ្រោះ |
|---|---|---|---|---|

ក. នៅតាមភូមិមួយចំនួនត្រូវទឹកជំនន់.........................................ស្ទើរតែទាំងអស់។

ខ. ទឹកជំនន់ថ្ងៃនេះបានបង្កគ្រោះ......................ជាច្រើនដល់ប្រជាជន......................។

គ. ក្រោយគ្រោះមហន្តរាយមានក្រុម..................ចុះជួយ......................ស្បៀងអាហារ។

៣. ចូររកសទិសសព្ទនឹងពាក្យ " លិច "។ (២ពិន្ទុ)

..........................................................................................................................

..........................................................................................................................

៤. សំណួរ

ក. ដើម្បីបង្ការមុនពេលមានគ្រោះទឹកជំនន់មកដល់ តើយើងត្រូវត្រៀមអ្វីខ្លះ? (១ពិន្ទុ)

ខ. តើទឹកជំនន់បង្កផលអាក្រក់អ្វីខ្លះ? (១ពិន្ទុ)

..........................................................................................................................

..........................................................................................................................

..........................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៣១ ការស្គាល់ហេតុ និងផល

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស........................................




**អំណាន** ( ១០ ពិន្ទុ )

ក. ចូរគូសបន្ទាត់ពីក្រោមក្រុមពាក្យដែលបង្ហាញពី **ហេតុ** ក្នុងល្បះខាងក្រោម

១. បូណាផឹកទឹកឆៅ ទើបវាឈឺពោះ។

២. ខែនេះសុខារៀនបានលេខ១ ពីព្រោះនាងខំរៀន។

៣. ទឹកលិចភូមិ មកពីមានភ្លៀងធ្លាក់ខ្លាំង។

៤. ភ្លើងឆេះព្រៃ មកពីអាកាសធាតុក្តៅខ្លាំង។

៥. មនុស្សអាចបង្កើតទូរសព្ទបាន ដោយសារវិទ្យាសាស្រ្តរីកចម្រើន។

ខ. ចូរគូសបន្ទាត់ពីក្រោមក្រុមពាក្យដែលបង្ហាញពី **ផល** ក្នុងល្បះខាងក្រោម

៦. ពូសុខមានជីវភាពធូរធារ ពីព្រោះគាត់ខំធ្វើការ។

៧. ស្រូវក្នុងស្រែស្ងួតអស់ មកពីគ្មានទឹក។

៨. បូណាមានសុខភាពរឹងមាំ ពីព្រោះគាត់ហាត់ប្រាណរាល់ព្រឹក។

៩. ព្រះអាទិត្យបញ្ចេញរស្មី ទើបរុក្ខជាតិរីកលូតលាស់បាន។

១០.បូផាខំរៀន ទើបឆ្នាំនេះនាងបានឡើងថ្នាក់។

**សំណេរ** ( ១០ ពិន្ទុ )

១. ដូចម្តេចដែលហៅថា ហេតុ? (២ពិន្ទុ)

.......................................................................................................................

២. ដូចម្តេចដែលហៅថា ផល? (២ពិន្ទុ)

.......................................................................................................................

៣. តើទំនាក់ទំនងរវាងហេតុ និងផលភ្ជាប់គ្នាដោយពាក្យអ្វីខ្លះ? (២ពិន្ទុ)

.......................................................................................................................

៤. ចូរស្រង់ល្បះដែលបង្ហាញពីទំនាក់ទំនងរវាងហេតុ និងផលក្នុងអត្ថបទខាងក្រោម។ (៤ពិន្ទុ)

ប្រជាជនដែលរស់នៅតាមដងទន្លេច្រើនប្រកបរបរដាំដំណាំ និងនេសាទ។ ពួកគាត់ងាយរងគ្រោះណាស់ នៅពេលមានទឹកជំនន់ ។ ដោយខ្លាចទឹកលិច ទើបគាត់នាំគ្នាលើកផ្ទះឱ្យខ្ពស់។

ចម្លើយ

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣
មេរៀនទី៣២ មុខរបរចិញ្ចឹមត្រី

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** (១០ ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

ការជ្រើសរើសអាជីពមួយសម្រាប់ខ្លួន ឬគ្រួសារ គឺជាប្រការល្អដើម្បីអភិវឌ្ឍសេដ្ឋកិច្ចគ្រួសារឱ្យមានជីវភាពធូរធារ។

ពូសុខ មីងយន ក្រៅពីធ្វើស្រែគាត់បានចិញ្ចឹមត្រីក្នុងស្រះមួយក្បែរភូមិ ដែលមានត្រីរាប់ពាន់ក្បាល។ រាល់ព្រឹក និងល្ងាចពួកគាត់ទាំងពីរនាក់តែងតែឱ្យចំណីត្រី ព្រោះទឹកនៅវេលានេះត្រជាក់។ ពូសុខបានរៀនពីរបៀបផលិតចំណីត្រី ដោយយកស្លឹកដំឡូងជ្វា ចក ត្រកួន បាយទា ពោតសណ្ដែកសៀង និងសមាសធាតុផ្សំផ្សេងទៀត ដូចជាកន្ទក់ ចុងអង្ករ កាកសំណល់ផ្ទះបាយ ម្សៅត្រី ឬត្រីជី ។ល។ លាយចូលគ្នា បន្ទាប់មកស្ងោរឱ្យឆ្អិនទុកឱ្យត្រជាក់មុននឹងដាក់ឱ្យត្រីស៊ី។ លើសពីនេះ ពូសុខតែងកាប់ជម្រះស្មៅ និងព្រៃតូចៗ ដើម្បីឱ្យមានខ្យល់អុកស៊ីសែនគ្រប់គ្រាន់ចូលក្នុងស្រះ។ ពេលខ្លះគាត់យកលាមកគោ មាន់ ជ្រូក ដែលស្ងួតដាក់បាតស្រះ រួចបញ្ចូលទឹកត្រាំទុកពី ៣ ទៅ ៥ ថ្ងៃ ដើម្បីឱ្យកើតជាចំណីធម្មជាតិសម្រាប់ឱ្យត្រីស៊ីនឹងឆាប់បានទទួលផល។ ការទិញចំណីត្រីពីផ្សារនាំឱ្យអស់ប្រាក់ច្រើនមិនសូវចំណេញទេ។

មុខរបរចិញ្ចឹមត្រីបានជួយដល់ជីវភាពគ្រួសារពូសុខបានធូរធារ មិនបាច់ខ្ចីបុលប្រាក់គេដែលជាគំរូល្អដល់អ្នកជិតខាងក្នុងភូមិ។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. ក្រៅពីធ្វើស្រែ ពូសុខ មីងយន មានមុខរបរអ្វីបន្ថែមទៀត? (២ពិន្ទុ)

☐ក. ចិញ្ចឹមជ្រូក ☐ខ. ចិញ្ចឹមត្រី

☐គ. ចិញ្ចឹមមាន់ ☐ឃ. ឡើងត្នោត

២. តើរាល់ព្រឹក និងល្ងាចពួកគាត់ទាំងពីរនាក់តែងតែធ្វើអ្វី? (២ពិន្ទុ)

☐ ក. ឱ្យចំណីជ្រូក ☐ ខ. ស្រោចបន្លែ

☐ គ. ឱ្យចំណីត្រី ☐ ឃ. ទៅស្រែ

៣. ហេតុអ្វីបានជាគ្រួសារពូសុខ មីងយនមានជីវភាពធូរធារ? (២ពិន្ទុ)

☐ ក. សល់ទ្រព្យពីឪពុកម្ដាយមក ☐ ខ. ឆើសបានកំណប់

☐ គ. ទទួលបានរង្វាន់ធំ ☐ ឃ. ឧស្សាហ៍ព្យាយាម ចេះបង្កើតរបរបន្ថែម

៤. ហេតុអ្វីបានជាមុខរបរពួកគាត់ឆាប់បានទទួលផល? (២ពិន្ទុ)

☐ ក. ធ្វើទៅតាមបច្ចេកទេសបានល្អ ☐ ខ. មានអ្នកជួយគាំទ្រ

☐ គ. ចេះទំនាក់ទំនង ☐ ឃ. ឧស្សាហ៍

៥. តើអត្ថបទខាងលើមានចំណងជើងដូចម្ដេច? (២ពិន្ទុ)

☐ ក. ការលក់ដូរ ☐ ខ. ទឹកជំនន់នៅភូមិខ្ញុំ

☐ គ. ការពណ៌នាអំពីសត្វ ☐ ឃ. មុខរបរចិញ្ចឹមត្រី

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យ " អាជីព សេដ្ឋកិច្ច អភិវឌ្ឍ " ។ (៣ពិន្ទុ)

.......................................................................................................................

.......................................................................................................................

.......................................................................................................................

២. ចូរស្រង់ នាម ពីក្នុងអត្ថបទខាងលើយ៉ាងតិចឱ្យបាន៥។ (១ពិន្ទុ)

.......................................................................................................................

៣. ចូរស្រង់ល្បះដែលបង្ហាញពីទំនាក់ទំនង រវាងហេតុ និងផលពីអត្ថបទ។ (២ពិន្ទុ)

.......................................................................................................................

.......................................................................................................................

៤. ចូររៀបរាប់ពីរបៀបផលិតចំណីត្រីរបស់ពូសុខ។ (២ពិន្ទុ)

.......................................................................................................................

.......................................................................................................................

.......................................................................................................................

៥. តើអត្ថបទខាងលើចង់អប់រំប្អូនពីអ្វី? (២ពិន្ទុ)

.......................................................................................................................

.......................................................................................................................

.......................................................................................................................

.......................................................................................................................




# កិច្ចការផ្ទះ

# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៣៣ ការរៀបរាប់ពីសុខភាព និងអាកាសធាតុ

សាលាបឋមសិក្សា.................................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរអានការសន្ទនាខាងក្រោម រួចឆ្លើយនឹងសំណួរ។

កញ្ញា : សួស្តីវិបុល! ថ្ងៃនេះ មុខឯងមិនស្រស់សោះ តើឯងមិនស្រួលខ្លួនមែនទេ?

វិបុល : សួស្តីកញ្ញា! ខ្ញុំដូចជាក្តៅមុខ ឈឺក្បាល ហើយក្នុងខ្លួនដូចជាព្រឺរងាៗ។ យប់មិញខ្ញុំគេងមិនសូវលក់ ហើយឧស្សាហ៍កណ្តាស់ទៀតផង។

កញ្ញា : អូ! ឯងប្រហែលជាកើតជំងឺផ្តាសាយហើយមើលទៅ។ នែវិបុល! ខែនេះជារដូវក្តៅ គ្មានភ្លៀងធ្លាក់ ឯអាកាសធាតុមានការប្រែប្រួល មនុស្ស សត្វងាយកើតជំងឺណាស់។ នៅពេលធ្វើដំណើរកណ្តាលថ្ងៃ ឯងត្រូវពាក់មួក ពាក់ម៉ាសដើម្បីបង្ការកម្តៅ និងធូលី។ ពេលនេះ ឯងត្រូវទៅមណ្ឌលសុខភាព ដើម្បីឱ្យគ្រូពេទ្យពិនិត្យ។

វិបុល : អរគុណឯងណាស់កញ្ញា! ខ្ញុំនឹងធ្វើតាមដំបូន្មានរបស់ឯង។ ឥឡូវនេះ ខ្ញុំប្រញាប់ទៅមណ្ឌលសុខភាពសិន។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ (១០ពិន្ទុ)

១. ហេតុអ្វីបានជាកញ្ញាដឹងថាវិបុលមិនស្រួលខ្លួន? (២ពិន្ទុ)

☐ក. វិបុលនិយាយប្រាប់ ☐ខ. មើលឃើញវេជ្ជបញ្ជាពេទ្យ

☐គ. អ្នកគ្រូប្រាប់ ☐ឃ. ឃើញទឹកមុខវិបុលមិនស្រស់

២. តើវិបុលប្រហែលជាមានជំងឺអ្វី? (២ពិន្ទុ)

☐ក. ឈឺធ្មេញ ☐ខ. គ្រុនឈាម

☐គ. គ្រុនផ្តាសាយ ☐ឃ. គ្រុនពោះវៀន

៣. តើកញ្ញាប្រាប់វិបុលឱ្យទៅណា? (២ពិន្ទុ)

☐ក. ទៅកោសខ្យល់ ☐ខ. ទៅមណ្ឌលសុខភាព

☐គ. ទៅទិញថ្នាំខ្លួនឯង ☐ឃ. ទៅជួបគ្រូ

៤. ហេតុអ្វីបានជាមនុស្ស សត្វ ងាយកើតជំងឺនៅរដូវក្តៅ? (២ពិន្ទុ)

☐ក. ដីហុយ ☐ខ. គ្មានចំណី អាហារគ្រប់គ្រាន់

☐គ. គ្មានភ្លៀងធ្លាក់ អាកាសធាតុប្រែប្រួល ☐ឃ. គ្មានអនាម័យ

៥. ដើម្បីថែរក្សាសុខភាព តើកញ្ញានិយាយប្រាប់វិបុលដូចម្តេច? (២ពិន្ទុ)

☐ក. ឧស្សាហ៍ងូតទឹក ☐ខ. បរិភោគអាហារឱ្យបានច្រើន

☐គ. ផឹកទឹកក្តៅឧណ្ហៗ ☐ឃ. ពេលចេញក្រៅ ត្រូវពាក់មួក ពាក់ម៉ាស

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យ " កណ្តាស់ ផ្តាសាយ ដំបូន្មាន "។ (៣ពិន្ទុ)

.......................................................................................................................

.......................................................................................................................

.......................................................................................................................

២. ចូររកវេវចនសព្ទនឹងពាក្យ " គេង "។ (១ពិន្ទុ)

.......................................................................................................................

.......................................................................................................................

៣. ចូរតែងល្បះឱ្យត្រូវនឹងរូបភាព ឱ្យបានពីរល្បះ។ (២ពិន្ទុ)



.......................................................................................

.......................................................................................

២. ចូរសរសេរអត្ថបទសន្ទនារៀបរាប់ពីសុខភាព តាមគំរូអត្ថបទខាងលើ។ (៤ពិន្ទុ)

.......................................................................................................................

.......................................................................................................................

.......................................................................................................................

.......................................................................................................................

.......................................................................................................................

.......................................................................................................................

.......................................................................................................................

.......................................................................................................................

.......................................................................................................................

.......................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៣៤ ការលក់ដូរ

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** (១០ ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

ព្រឹកនេះសុភីទំនេរ នាងបានឆ្លៀតពេលទៅជួយម្ដាយលក់ដូរនៅឯផ្សារ។

សុភី និងម្ដាយក្រោកពីនិទ្រាតាំងពីព្រលឹមអរុ រៀបចំបន្លែ ត្រី សាច់ និងគ្រឿងទេសដាក់លើរទេះដើម្បីយកទៅលក់។ ពេលមកដល់ផ្សារ សុភីស្ទុះស្ទា ជួយរើអីវ៉ាន់ពីរទេះ ដាក់លក់លើតូប។ នៅក្នុងផ្សារ មានមនុស្សច្រើនកុះករ ស្លៀកពាក់ស្អាតបាតខ្លះដើរទិញម្ហូបអាហារប្រចាំថ្ងៃ ខ្លះដើរទិញអីវ៉ាន់ប្រើប្រាស់ផ្សេងៗ។ សុភីមានទឹកមុខញញឹមញញែមអញ្ជើញភ្ញៀវចូលទិញ ព្រមទាំងយកជំនាញគិតលេខដែលបានរៀនមកអនុវត្ត។ តាំងពីព្រលឹមដល់ល្ងាច សុភី និងម្ដាយមមាញឹកនឹងការលក់ដូរ ដោយមានភ្ញៀវចូលទិញជាហូរហែ។ អ្នកភូមិ ប្រុស ស្រីចូលចិត្តទិញអីវ៉ាន់មីងសឿនណាស់ ព្រោះគាត់លក់តម្លៃថោកសមល្មម។

ការប្រកបរបរលក់ដូរ ធ្វើឱ្យគ្រួសារមីងសឿន មានជីវភាពសមរម្យ។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. តើអត្ថបទខាងលើមានចំណងជើងដូចម្ដេច? (២ពិន្ទុ)

☐ក. របរកសិកម្ម ☐ ខ. ការហាត់ប្រាណ

☐គ. មុខរបរចិញ្ចឹមត្រី ☐ឃ. ការលក់ដូរ

២. តើម្ដាយសុភីប្រកបរបរអ្វី? (២ពិន្ទុ)

☐ក. គ្រូបង្រៀន ☐ខ. គ្រូពេទ្យ

☐គ. លក់ដូរនៅផ្សារ ☐ឃ. កសិករ

៣. ពេលទំនេរ តើសុភីតែងតែឆ្លៀតពេលធ្វើអ្វី? (២ពិន្ទុ)

- ☐ក. ដាំបន្លែ
- ☐ខ. ជួយលក់ដូរម្ដាយនៅផ្សារ
- ☐គ. ដើរលេងជាមួយមិត្តភក្ដិ
- ☐ឃ. មើលទូរទស្សន៍

៤. ហេតុអ្វីបានជាគេចូលចិត្តទិញអីវ៉ាន់មីងសឿន? (២ពិន្ទុ)

- ☐ក. មានទំនិញច្រើនមុខ
- ☐ខ. មានទីតាំងនៅមុខគេ
- ☐គ. តម្លៃថោកសមរម្យ
- ☐ឃ. មានទីតាំងធំទូលាយ

៥. ហេតុអ្វីបានជាគ្រួសារមីងសឿនមានជីវភាពធូរធារ? (២ពិន្ទុ)

- ☐ក. ដោយសាររបរនេសាទ
- ☐ខ. ដោយសារប្រកបរបរលក់ដូរ
- ☐គ. ដោយសាររបរកសិកម្ម
- ☐ឃ. ដោយសារឪពុកម្ដាយឱ្យលុយ

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យ " គ្រឿងទេស ភ្ញៀវ និទ្រា "។ (៣ពិន្ទុ)

..........................................................................................................

..........................................................................................................

..........................................................................................................

២. ចូររកសទិសសព្ទនឹងពាក្យ " ផ្សារ "។ (១ពិន្ទុ)

..........................................................................................................

..........................................................................................................

៣. ចូរតែងល្បះតាមរូបភាពខាងក្រោមដោយប្រើពាក្យ " ទិញ លក់ "។ (២ពិន្ទុ)



..........................................................................................................



..........................................................................................................

៤. ចូរប្អូនសរសេរតែងសេចក្តីពណ៌នាអំពីសត្វ “ គោ ” តាមរូបភាព និងគម្រោងខាងក្រោម។ (៤ពិន្ទុ)

គម្រោង

ក. សេចក្តីផ្តើម

តើសត្វនោះមានឈ្មោះអ្វី? ញី ឬឈ្មោល?

ខ. តួសេចក្តី

- តើវាមានមាឌតូច ឬធំ? ស្គម ឬធាត់? ទាប ឬខ្ពស់? សម្បុរអ្វី?
- តើក្បាលវាមានអ្វីខ្លះ? (ភ្នែក ច្រមុះ ត្រចៀក ធ្មេញ ស្នែង...)
- តើដងខ្លួនវាដូចម្តេច? (ជើង ក ខ្លួន ...)
- តើវាមានចរិតលក្ខណៈដូចម្តេច?(ស្លូត ឬកាច ឧស្សាហ៍ ឬខ្ជិល...)
- តើវាផ្តល់ប្រយោជន៍អ្វីខ្លះដល់អ្នក? (កម្លាំងអូសទាញ លាមក...)

គ. សេចក្តីបញ្ចប់

តើប្អូនមានអារម្មណ៍ដូចម្តេចចំពោះ សត្វនោះ? ព្រោះអ្វី? (ស្រឡាញ់ចូលចិត្ត ឬស្អប់)

សេចក្តីអធិប្បាយ

.......................................................................................................................................

.......................................................................................................................................

.......................................................................................................................................

.......................................................................................................................................

.......................................................................................................................................

.......................................................................................................................................

.......................................................................................................................................

.......................................................................................................................................

.......................................................................................................................................

.......................................................................................................................................

.......................................................................................................................................

.......................................................................................................................................

.......................................................................................................................................

.......................................................................................................................................

.......................................................................................................................................

.......................................................................................................................................

.......................................................................................................................................

.......................................................................................................................................

.......................................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣
មេរៀនទី៣៥ អំពីកិរិយា

សាលាបឋមសិក្សា.................................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

១. ចូរអានល្បះខាងក្រោម រួចគូសពីក្រោមពាក្យណាដែលជាកិរិយានៅក្នុងល្បះ។ (៥ពិន្ទុ)

ក. កុមារទៅសាលារៀន។
ខ. ពូសែនភ្ជួរស្រែ។
គ. សុភីលក់បន្លែ។
ឃ. សុខាពប្អូន។
ង. ជីតាខ្ញុំនិទានរឿង។
ច. ទេសចរណ៍ទិញវត្ថុអនុស្សាវរីយ៍។
ឆ. តារាធ្វើលំហាត់ភាសាខ្មែរ។
ជ. គោដើរកណ្ដាលវាលស្រែ។
ឈ. គេសង់អគារខ្ពស់ៗក្នុងទីក្រុង។
ញ. គ្រួសារចិត្រាអង្គុយងមាត់សមុទ្រ។

២. ចូរគូសភ្ជាប់ពីពាក្យទៅថ្នាក់ពាក្យឱ្យបានត្រឹមត្រូវ។ (៥ពិន្ទុ)

| **ពាក្យ** | **ថ្នាក់ពាក្យ** |
|---|---|
| ច្រៀង | |
| ទេសភាព | |
| រៀន | |
| សរសេរ | |
| ជិះ | នាម |
| មើល | |
| សើច | |
| ថ្ម | កិរិយា |
| លេង | |
| ប្រាសាទ | |
| លក់ | |

**សំណេរ** (១០ ពិន្ទុ)

១. ដូចម្ដេចដែលហៅថាកិរិយា? (២ពិន្ទុ)

..........................................................................................................................................

២. ចូរសេរសេរពាក្យជាកិរិយាឱ្យត្រូវរូបភាពខាងក្រោម។ (៣ពិន្ទុ)





........................... .......................... ..........................

៣. ចូរយកកិរិយា " ច្រៀង ធ្វើ អាន ដាំ " ទៅបំពេញល្បះខាងក្រោម។ (២ពិន្ទុ)

ក. ឪពុកខ្ញុំ............បន្លែក្រោយផ្ទះ។

ខ. ខ្ញុំ.............សៀវភៅរាល់ថ្ងៃ។

គ. បងស្រីខ្ញុំ...........ពីរោះណាស់។

ឃ. ម្ដាយខ្ញុំ...........ម្ហូបឆ្ងាញ់ណាស់។

៤. ចូរតែងល្បះដោយប្រើកិរិយា " ជួយ ប្រឹងប្រែង ថែទាំ " ក្នុងមួយពាក្យឱ្យបានមួយល្បះ។ (៣ពិន្ទុ)

..........................................................................................................................................

..........................................................................................................................................

..........................................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៣៦ ការហាត់ប្រាណ




សាលាបឋមសិក្សា.................................

ឈ្មោះសិស្ស........................................

**អំណាន** (១០ ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

ការហាត់ប្រាណ

រាល់ព្រឹក សុខា និងប្អូនក្រោកពីព្រលឹមភ្លឺស្រាងៗមុនព្រះអាទិត្យរះ រៀបចំបត់ភួយ សាមុង មូរកន្ទេល រៀបខ្នើយទុកដាក់យ៉ាងមានរបៀប។ បន្ទាប់មកពួកគេបាននាំគ្នាទៅ ហាត់ប្រាណក្នុងទីធ្លាមុខផ្ទះមុនទៅសាលា។ សុខា និងដារីមានសុខភាពល្អ ពុំដែលឈឺទេ ព្រោះគេទាំងពីរនាក់ហាត់ប្រាណបានទៀងទាត់។

គូសសញ្ញា √ ក្នុងប្រអប់☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១.ពេលក្រោកពីព្រលឹមស្រាងៗ តើសុខា និងប្អូននាំគ្នាធ្វើអ្វីខ្លះ? (២ពិន្ទុ)

☐ក. ញ៉ាំបាយ ហាត់ប្រាណ ☐ខ. ងូតទឹក ស្លៀកពាក់ខោអាវ

☐គ. បោកខោអាវ ដាំបាយ បោសផ្ទះ ☐ឃ. បត់ភួយ សាមុង មូរកន្ទេល រៀបខ្នើយ

២.តើសុខា និងប្អូននាំគ្នាទៅហាត់ប្រាណនៅឯណា? (២ពិន្ទុ)

☐ក. នៅសាលារៀន ☐ខ. នៅក្រោយផ្ទះ

☐គ. នៅទីធ្លាមុខផ្ទះ ☐ឃ. នៅក្លឹបហាត់ប្រាណ

៣.ហេតុអ្វីបានជាសុខា និងដារីមានសុខភាពល្អ? (២ពិន្ទុ)

☐ក. ញ៉ាំអាហារច្រើន ☐ខ. ហាត់ប្រាណទៀងទាត់

☐គ. លាងសម្អាតដៃ ☐ឃ. មានអនាម័យ

៤. ចូររកបដិសព្ទនឹងពាក្យ “ បង ” ឱ្យបានត្រឹមត្រូវ។ (២ពិន្ទុ)

☐ក. មីង ☐ខ. ពូ

☐គ. ប្អូន ☐ឃ. ម្ដាយ

៥. ចូរអានសំណួរពាក្យខាងក្រោម រួចគូសភ្ជាប់ទៅសំណេរពាក្យឱ្យបានត្រឹមត្រូវ (២ពិន្ទុ)

| សំណួរពាក្យ | សំណេរពាក្យ |
|---|---|
| ១. បង់ អួច | ក. បង្ការ |
| ២. ម្ទី - ម្ទា | ខ. បញ្ចេញ |
| ៣. បាញ់ ចេញ | គ. បង្ហើយ |
| ៤. បង់ ការ | ឃ. បង្អួច |
| ៥. បន់ ដើ | ង. ម្ទីម្ទា |
| ៦. បង់ ហើយ | ច. បណ្ដើរ |

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- សុខភាព (   )..........................................................................................................
- សំងំ (   )..........................................................................................................
- ជំងឺ (   )..........................................................................................................

២. ចូរជ្រើសរើសពាក្យ “ បោស ហាត់ប្រាណ ” ទៅសរសេរឱ្យត្រូវនឹងរូបភាពខាងក្រោម។ (0.៥ពិន្ទុ)



............................................

៣. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញក្នុងល្បះខាងក្រោមឱ្យបានត្រឹមត្រូវ។ (២ពិន្ទុ)

ពន្យល់   មិត្តភក្តិ   អាក់ខាន   ពិន្ទុ

បូណាមករៀនទៀងទាត់មិនដែល....................។ គាត់ខិតខំស្ដាប់គ្រូ ................ យ៉ាងយកចិត្តទុកដាក់។ គាត់ទទួលបាន ....................ល្អគ្រប់មុខវិជ្ជា។ ឆ្លៀតពេលទំនេរ បូណាបបួល.......................មករៀននៅផ្ទះរបស់គាត់។ មិនតែប៉ុណ្ណោះ គាត់ជួយពន្យល់មេរៀនដល់មិត្តភក្តិដែលរៀនយឺតទៀតផង។

៤. ចូររៀបពាក្យ ឬកន្សោមពាក្យក្នុងប្រអប់ឱ្យបានជាល្បះត្រឹមត្រូវ (១.៥ពិន្ទុ)

ក.

| | | | | |
|---|---|---|---|---|
| ដើម្បី | ហាត់ប្រាណ | សុខភាព | ល្អ។ | ឱ្យមាន |

..........................................................................................................................

ខ.

| | | | | |
|---|---|---|---|---|
| ព្យាយាម | រៀនសូត្រ។ | បូណា | សិស្ស | ជា |

..........................................................................................................................

គ.

| | | | | |
|---|---|---|---|---|
| ជានិច្ច។ | សាលា | បូណា | វិន័យ | គោរព |

..........................................................................................................................

៥. ចូរតែងល្បះនឹងពាក្យ “ ហាត់ប្រាណ  សុខភាព ស្អប់ស្អល់” ឱ្យបានត្រឹមត្រូវ (៣ពិន្ទុ)

ក..........................................................................................................................

ខ..........................................................................................................................

គ..........................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣
មេរៀនទី៣៧ យើងទៅមណ្ឌលសុខភាព

សាលាបឋមសិក្សា................................
ឈ្មោះសិស្ស........................................




I.**អំណាន** ( ១០ ពិន្ទុ )

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

| | | |
|---|---|---|
| គ្រូសូមផ្ដែផ្ដាំ | កូនត្រូវចងចាំ | ឱ្យបានច្បាស់ថា |
| ទាំងការរស់នៅ | ទាំងញ៉ាំអាហារ | ត្រូវចេះរក្សា |
| ធ្វើអនាម័យ | ត្រូវចេះរក្សា | ធ្វើអនាម័យ។ (បន្ទរ) |
| កូនចៅប្រុសស្រី | ជំងឺសព្វថ្ងៃ | មានច្រើនកន្លង |
| តាមមកឃើញ | ដល់មនុស្សសត្វផង | ដើម្បីចម្លង |
| រោគាដល់យើង | ដើម្បីចម្លង | រោគាដល់យើង។ (បន្ទរ) |
| បើមានបញ្ហា | ចុកចាប់កាយា | ត្រូវឆាប់រូតរះ |
| ទៅមណ្ឌលសុខភាព | ឱ្យបានរហ័យ | ជំងឺជាសះ |
| សុខភាពបវរ | ជំងឺជាសះ | សុខភាពបវរ។ (បន្ទរ) |

គូសសញ្ញា √ ក្នុងប្រអប់☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១.តើពេលមានជំងឺកូនត្រូវរូតរះទៅព្យាបាលឯណា? (២ពិន្ទុ)

☐ក. ផ្ទះអ្នកលក់ថ្នាំពេទ្យ ☐ខ. រោងអ្នកតាដើម្បីបន់ស្រន់

☐គ. នៅផ្ទះកោសខ្យល់ ☐ឃ. មណ្ឌលសុខភាព

២.តើក្នុងការរស់នៅ និងញ៉ាំអាហារ គ្រូបានផ្ដែផ្ដាំឱ្យកូនចងចាំអ្វីខ្លះ? (២ពិន្ទុ)

☐ក. ញ៉ាំអាហារឱ្យបានច្រើន ☐ខ. កុំញ៉ាំរបស់ផ្អែមពេក

☐គ. ត្រូវចេះរក្សា និងធ្វើអនាម័យ ☐ឃ. ត្រូវធ្វើលំហាត់ប្រាណ

៣.ចូរសរសេរលេខ 1 2 ឬ 3 ក្នុង☐ដែលត្រូវនឹងអត្ថន័យនៃចម្រៀងខាងលើតាមលំដាប់លំដោយ (២ពិន្ទុ)

☐ធ្វើអនាម័យ ត្រូវចេះរក្សា ធ្វើអនាម័យ។

☐គ្រូសូមផ្ដែផ្ដាំ កូនត្រូវចងចាំ ឱ្យបានច្បាស់ថា

☐ទាំងការរស់នៅ ទាំងញ៉ាំអាហារ ត្រូវចេះរក្សា

៤.បដិសព្ទនឹងពាក្យ " ឈឺ " (២ពិន្ទុ)

☐ក. អាក្រក់ ☐ខ. ល្អ ☐គ. ទុក្ខ ☐ឃ. ជា

៥. វេវចនសព្ទនឹងពាក្យ " ម្ដាយ " (២ពិន្ទុ)

☐ក. មីង ម៉ាក់ ម៉ែ ញោមស្រី មាតា ☐ខ. យាយ ម៉ាក់ ម៉ែ ញោមស្រី មាតា

☐គ. ម៉ាក់ ម៉ែ ញោមស្រី មាតា ☐ឃ. អ៊ំស្រី ម៉ាក់ ម៉ែ ញោមស្រី មាតា

## II.**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យខាងក្រោម (៣ពិន្ទុ)

- ផ្ដាំ ( )................................................................................................។
- អនាម័យ ( )..........................................................................................។
- រោគា ( )..............................................................................................។

២. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញក្នុងល្បះខាងក្រោមឱ្យបានត្រឹមត្រូវ (២.៥ពិន្ទុ)

សត្វផង សព្វថ្ងៃ សុខភាព កាយា ជាសះ

| | | |
|---|---|---|
| កូនចៅប្រុសស្រី | ជំងឺ............. | មានច្រើនកន្លង |
| តាមមកយីយា | ដល់មនុស្ស............ | ដើម្បីចម្លង |
| រោគាដល់យើង | ដើម្បីចម្លង | រោគាដល់យើង។ (បន្ទរ) |
| បើមានបញ្ហា | ចុកចាប់............. | ត្រូវឆាប់រួតរះ |
| ទៅមណ្ឌល............ | ឱ្យបានរហ័យ | ជំងឺ............ |
| សុខភាពបវរ | ជំងឺជាសះ | សុខភាពបវរ។ (បន្ទរ) |

៣. ចូររៀបពាក្យ ឬកន្សោមពាក្យក្នុងប្រអប់ឱ្យបានជាល្បះត្រឹមត្រូវ (១.៥ពិន្ទុ)

| | | | | | | |
|---|---|---|---|---|---|---|
| ក. | មណ្ឌលសុខភាព។ | នៅ | ម្ដាយខ្ញុំ | ទៅ | ជំងឺ | ពិនិត្យ |

...............................................................................................................

| | | | | | | |
|---|---|---|---|---|---|---|
| ខ. | ជំងឺកូវីដ១៩។ | ជាមួយ | លាងដៃ | សាប៊ូ | ការពារ | ខ្ញុំ |

...............................................................................................................

| | | | | | | |
|---|---|---|---|---|---|---|
| គ. | មណ្ឌល | កូន | សុខភាព។ | ពូសាន | ទៅ | នាំ |

...............................................................................................................

៤.ចូរតែងល្បះតាមរូបភាពខាងក្រោម (៣ពិន្ទុ)



.....................................................................................................




.....................................................................................................



.....................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣
មេរៀនទី៣៨ ពណ៌នាអំពីព្រឹត្តិការណ៍

សាលាបឋមសិក្សា...............................

ឈ្មោះសិស្ស......................................




I.**អំណាន**( ១០ ពិន្ទុ )

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

កាលពីថ្ងៃអាទិត្យមុន មានគ្រោះថ្នាក់ចរាចរណ៍កើតឡើងត្រង់ចំណុចផ្លូវកោងក្បែរសាលារៀនមួយ។

មុនពេលកើតហេតុគេឃើញមានភ្លៀងធ្លាក់យ៉ាងខ្លាំង ហើយមានបុរសម្នាក់បើកបរម៉ូតូពីលិចទៅកើតក្នុងល្បឿនលឿន។ លុះទៅដល់ចំណុចផ្លូវកោង ហើយរអិលផង ម៉ូតូក៏បានជ្រុលចង្កូតធ្លាក់ពីលើផ្លូវ រួចទៅបុកនឹងដើមឈើ។ អ្នករស់នៅក្បែរនោះ រួមទាំងអ្នកធ្វើដំណើរបានស្ទុះទៅមើលហេតុការណ៍នេះ។ ក្រោយពេលកើតហេតុ គេឃើញម៉ូតូត្រូវខូចខាតទាំងស្រុង រីឯអ្នកបើកបរវិញ មានឈាមពេញខ្លួនដោយរងរបួសធ្ងន់ដេកសន្លប់ស្តូកស្តឹង។ មួយសន្ទុះក្រោយមក គេឃើញមានកម្លាំងសមត្ថកិច្ចមកជួយធ្វើអន្តរាគមន៍យកអ្នករបួសទៅកាន់មន្ទីរពេទ្យ។

ដូច្នេះយើងគ្រប់គ្នា ត្រូវប្រុងប្រយ័ត្នជានិច្ច និងគោរពច្បាប់ចរាចរណ៍ឱ្យបានខ្ជាប់ខ្ជួននៅពេលធ្វើដំណើរ។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១.តើអត្ថបទនេះពណ៌នាអំពីអ្វី? (១ពិន្ទុ)

☐ ក. សមត្ថកិច្ចចាប់ជនល្មើស ☐ ខ. មេឃមានភ្លៀងធ្លាក់ខ្លាំង

☐ គ. ផ្លូវរអិលខ្លាំង ☐ ឃ. គ្រោះថ្នាក់ចរាចរណ៍

២.តើអត្ថបទនេះមានប៉ុន្មានកថាខណ្ឌ? (១ពិន្ទុ)

☐ ក. មានមួយកថាខណ្ឌ ☐ ខ. មានពីរកថាខណ្ឌ

☐ គ. មានបីកថាខណ្ឌ ☐ ឃ. មានបួនកថាខណ្ឌ

៣.តើតែងសេចក្ដីមានប៉ុន្មានផ្នែក? (១ពិន្ទុ)

☐ក. មានប្រាំពីរផ្នែក ☐ខ. មានបីផ្នែក

☐គ. មានបួនផ្នែក ☐ឃ.មានប្រាំផ្នែក

៤.តើសេចក្ដីផ្ដើមនៃអត្ថបទនិយាយពីអ្វី? (១ពិន្ទុ)

☐ក. ពេលវេលា ☐ខ. ទីកន្លែង

☐គ. ព្រឹត្តិការណ៍ ☐ឃ. ពេលវេលា ទីកន្លែង ព្រឹត្តិការណ៍

៥.តើតួសេចក្ដីនៃអត្ថបទនិយាយពីអ្វី? (១ពិន្ទុ)

☐ក. មុនពេលកើតហេតុ ☐ខ. ពេលកើតហេតុ

☐គ. ក្រោយពេលកើតហេតុ ☐ឃ.មុនពេល ពេល ក្រោយពេលកើតហេតុ

៦.តើសេចក្ដីបញ្ចប់នៃអត្ថបទនិយាយពីអ្វី? (១ពិន្ទុ)

☐ក. ចំណាប់អារម្មណ៍ ☐ខ. ជូនពរ

☐គ. សេចក្ដីថ្លែងអំណរគុណ ☐ឃ. ការប្ដេជ្ញាចិត្ត

៧.ចូររកបដិសព្ទនឹងពាក្យ " ប្រយ័ត្ន " ។ (២ពិន្ទុ)

☐ក. យឺតៗ ☐ខ. លឿន

☐គ. ប្រញាប់ ☐ឃ. ប្រហែស

៨. ចូររកវេវចនសព្ទនឹងពាក្យ " ខ្លួន " ។ (២ពិន្ទុ)

☐ក. កាយា ☐ខ. ចង្កេះ

☐គ. ជើង ☐ឃ. ពោះ

II.**សំណេរ** (១០ ពិន្ទុ)

១. ចូរពន្យល់ពាក្យខាងក្រោម។ (២ពិន្ទុ)

- ចរាចរណ៍ ( )..............................................................................................
..............................................................................................។

- ប្រយ័ត្ន ( )..............................................................................................។

២. ចូរជ្រើសរើសសំណួរខាងក្រោមទៅបំពេញតាមផ្នែកនីមួយៗ ឱ្យបានត្រឹមត្រូវ។ (៣ពិន្ទុ)

- តើអ្នកមានចំណាប់អារម្មណ៍ដូចម្ដេចចំពោះហេតុការណ៍នេះ?
- តើព្រឹត្តិការណ៍នេះកើតឡើងនៅពេលណា? កន្លែងណា?
- តើវាបង្កឡើងដោយសារអ្វី?
- ក្រោយពេលកើតហេតុ តើមានអ្វីកើតឡើង?
- នៅពេលកើតហេតុ តើមានអ្វីកើតឡើង?

ក. សេចក្ដីផ្ដើម

.....................................................................................................................

.....................................................................................................................

.....................................................................................................................

ខ. តួសេចក្ដី

.....................................................................................................................

.....................................................................................................................

.....................................................................................................................

គ. សេចក្ដីបញ្ចប់

.....................................................................................................................

៣. ចូរសរសេរតែងសេចក្ដីពណ៌នាអំពី **អគ្គិភ័យឆាបឆេះផ្ទះមួយកន្លែង** តាមរយៈរូបភាព និងសំណួរខាងក្រោម (៥ពិន្ទុ)

ក. តើព្រឹត្តិការណ៍នេះកើតឡើងនៅពេលណា? កន្លែងណា?

ខ. តើវាបង្កឡើងដោយសារអ្វី?

គ. នៅពេលកើតហេតុ តើមានអ្វីកើតឡើង?

ឃ. ក្រោយពេលកើតហេតុ តើមានអ្វីកើតឡើង?

ង. តើអ្នកមានអារម្មណ៍ដូចម្ដេច ចំពោះហេតុការណ៍នេះ?



សេចក្ដីអធិប្បាយ

.....................................................................................................................

.....................................................................................................................

.....................................................................................................................

.....................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៣៩ ទោសនៃគ្រឿងញៀន




សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................

I.**អំណាន** ( ១០ ពិន្ទុ )

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

នៅពេលត្រឡប់ពីសាលារៀនវិញ សុភក្ត្របានឃើញនគរបាលកំពុងនាំខ្លួនបុរសម្នាក់ចូលក្នុងសាលាឃុំ។

បុរសនោះ មានរាងកាយស្គមស្គាំង ទឹកមុខស្លេកស្លាំងខុសប្លែកពីអ្នកដទៃ។ គេឮចាស់ៗនៅតាមផ្លូវនិយាយថា បុរសនោះជាអ្នកប្រើប្រាស់គ្រឿងញៀន។ មកដល់ផ្ទះ សុភក្ត្រនិយាយពីហេតុការណ៍នោះប្រាប់ម្ដាយរបស់គេ។ ឮដូច្នោះម្ដាយសុភក្ត្រ ពន្យល់ថា ការប្រើគ្រឿងញៀន មិនល្អទេ! គឺនាំឱ្យអន្តរាយដល់សុខភាព បាត់បង់ការចងចាំ វង្វេងស្មារតី ឆេវឆាវ ពិសេសបំផ្លាញទ្រព្យសម្បត្តិ និងថវិកាគ្រួសារថែមទៀត។ ម៉្យាងទៀត គ្រឿងញៀនបង្កឱ្យមានអំពើចោរកម្ម អំពើហិង្សា បាត់បង់ការងារ។ល។ ដូច្នេះ កូនមិនត្រូវចង់ដឹង ឬចង់សាកគ្រឿងញៀននោះទេ! កូន និងមិត្តភក្តិត្រូវនៅឱ្យឆ្ងាយពីវា។

ក្រោយពីស្ដាប់ការទូន្មានរបស់ឪពុកម្ដាយ លោកគ្រូ អ្នកគ្រូ សុភក្ត្រប្ដេជ្ញាចិត្តខិតខំរៀនសូត្រ និងចៀសឱ្យផុតពីគ្រឿងញៀន។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១.តើអត្ថបទនេះមានចំណងជើងដូចម្ដេច? (១ពិន្ទុ)

☐ក. យើងទៅមណ្ឌលសុខភាព ☐ខ. ទោសនៃគ្រឿងញៀន

☐គ. ពណ៌នាអំពីព្រឹត្តិការណ៍ ☐ឃ. គ្រោះថ្នាក់ចរាចរណ៍

២.តើសុភក្ត្រឃើញអ្វី ពេលត្រឡប់ពីសាលារៀនវិញ? (១ពិន្ទុ)

☐ក. បុរសម្នាក់ប្រើប្រាស់គ្រឿងញៀន ☐ខ. អំពើហិង្សា

☐គ. នគរបាលនាំខ្លួនបុរសម្នាក់ទៅសាលាឃុំ ☐ឃ. គ្រោះថ្នាក់ចរាចរណ៍

៣.តើនៅតាមផ្លូវសុភក្រ្តឮចាស់ៗនិយាយពីរឿងអ្វី? (១ពិន្ទុ)

☐ក. អំពើចោរកម្ម ☐ខ. អំពើហិង្សា

☐គ. ការសេពគ្រឿងស្រវឹង ☐ឃ.បុរសនោះជាអ្នកប្រើប្រាស់គ្រឿងញៀន

៤.តើម្ដាយសុភក្រ្ត បានទូន្មានសុភក្រ្តដូចម្ដេច? (១ពិន្ទុ)

☐ក. ទៅសាលាឱ្យទាន់ពេលវេលា ☐ខ. ខិតខំរៀនសូត្រ

☐គ.ការប្រើប្រាស់គ្រឿងញៀនមិនល្អទេកូន ☐ឃ. កុំដើរលេងផ្ដេសផ្ដាស

៥.តើមូលហេតុចម្បងអ្វីដែលបណ្ដាលឱ្យមនុស្សញៀនថ្នាំ? (១ពិន្ទុ)

☐ក. គ្មានចំណេះដឹង ☐ខ. ភាពក្រីក្រ

☐គ. ចង់ដឹង ចង់សាកគ្រឿងញៀន ☐ឃ.សេពគប់មិត្តភក្តិ

៦.តើសុភក្រ្តបានប្ដេជ្ញាចិត្តដូចម្ដេច? (១ពិន្ទុ)

☐ក. ខិតខំរៀន និងចៀសឱ្យផុតពីគ្រឿងញៀន ☐ខ. មិនសេពគប់មិត្តមិនល្អ

☐គ. មិនឱ្យឪពុកម្ដាយពិបាកចិត្ត ☐ឃ. ប្រឡងឱ្យជាប់

៧.ចូររកបដិសព្ទនឹងពាក្យ " វិនាស " (២ពិន្ទុ)

☐ក. រីកចម្រើន ☐ខ. អន្តរាយ

☐គ. ហិនហោច ☐ឃ.សប្បាយ

៨. ចូររកវេវចនសព្ទនឹងពាក្យ " ហិង្សា " (២ពិន្ទុ)

☐ក. អស្ចារ្យ ☐ខ. ខ្លាំង ពូកែ

☐គ. អហិង្សា ☐ឃ. វាយដំ បៀតបៀន

II.**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យខាងក្រោម (៣ពិន្ទុ)

- ញៀន (   )..............................................................................................................
  ..............................................................................................................
  ..............................................................................................................។
- វិនាស (   )..............................................................................................................។
- ទូន្មាន (  )..............................................................................................................។

២. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញក្នុងល្បះខាងក្រោមឱ្យបានត្រឹមត្រូវ (២.៥ពិន្ទុ)

| អន្តរាយ | ហិង្សា | ស្មារតី | ទ្រព្យសម្បត្តិ | គ្រឿងញៀន |
|---|---|---|---|---|

ការប្រើប្រាស់គ្រឿងញៀននាំឱ្យ............................ដល់សុខភាព បាត់បង់ការចងចាំ វង្វេង..................ឆេវឆាវ ពិសេសបំផ្លាញ..............................និងថវិកាគ្រួសារថែមទៀត។ ម្យ៉ាងទៀតគ្រឿងញៀនបង្កឱ្យមានអំពើចោរកម្ម អំពើ..................បាត់បង់ការងារ។ល។ ដូច្នេះ កូនមិនត្រូវចង់ដឹង ឬចង់សាក.........................នោះទេ កូន និងមិត្តភក្តិត្រូវនៅឱ្យឆ្ងាយពីវា។

៣. ចូររៀបពាក្យ ឬកន្សោមពាក្យក្នុងប្រអប់ឱ្យបានជាល្បះត្រឹមត្រូវ (១.៥ពិន្ទុ)

| | | | | | | |
|---|---|---|---|---|---|---|
| ក. | គ្រឿងញៀន | អ្នក | ធ្វើឱ្យ | ប្រើប្រាស់ | ការចងចាំ។ | បាត់បង់ |

.............................................................................................................................

| | | | | | | |
|---|---|---|---|---|---|---|
| ខ. | នោះទេ។ | មិនត្រូវ | យើង | ចង់ដឹង | គ្រឿងញៀន | ចង់សាក |

.............................................................................................................................

| | | | | | | |
|---|---|---|---|---|---|---|
| គ. | ប្រើប្រាស់ | អ្នក | ជួញដូរ | និង | ត្រូវមានទោស។ | គ្រឿងញៀន |

.............................................................................................................................

៤. ចូរតែងល្បះតាមរូបភាពខាងក្រោម (៣ពិន្ទុ)



.........................................................................................



.........................................................................................



.........................................................................................



# កិច្ចការផ្ទះ

# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៤០ រៀបរាប់ពីសមាជិកគ្រួសារ និងមុខរបរ




សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................

I.**អំណាន** (១០ ពិន្ទុ)

១. ចូរគូសភ្ជាប់ពាក្យទៅនឹងរូបភាពឱ្យបានត្រឹមត្រូវ (៣ពិន្ទុ)




២. ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

| | |
|---|---|
| ចិន្តា | : សួស្តី! ណារិន តើឯងសុខសប្បាយជាទេ? |
| ណារិន | : បាទ! សួស្តីចិន្តា ខ្ញុំសុខសប្បាយជាធម្មតាទេ។ ចិន្តានៅពេលទំនេរ ខ្ញុំតែងឃើញឯងបើកបរម៉ូតូជាមួយម្តាយឯងទៅផ្សារ។ តើក្រុមគ្រួសារឯងប្រកបមុខរបរអ្វី? |
| ចិន្តា | : អូ! ម្តាយខ្ញុំ ជាអ្នកលក់ដូរ។ ចំណែកឪពុកខ្ញុំជាយោធា។ សព្វថ្ងៃ គាត់នៅព្រំដែនឯណោះ! យូរៗទើបគាត់មកលេងផ្ទះម្តង។ ឯជីដូនជីតាខ្ញុំ គាត់នៅផ្ទះជួយមើលថែទាំចៅៗ ព្រោះគាត់ចាស់ៗ ហើយ។ ចុះចំណែកគ្រួសារឯងវិញ ណារិន? |
| ណារិន | : អរគុណចិន្តា! ម្តាយខ្ញុំគាត់ជាគ្រូពេទ្យនៅមណ្ឌលសុខភាពឃុំយើង។ ឪពុកខ្ញុំជាកសិករ។ ចំណែកលោកយាយរបស់ខ្ញុំគាត់ជាអ្នកត្បាញហូល ផាមួង និងក្រមា។ រីឯជីតារបស់ខ្ញុំ គាត់បានស្លាប់យូរឆ្នាំមកហើយ។ |

ចូរគូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ

១.តើអត្ថបទនេះរៀបរាប់ពីអ្វី? (១ពិន្ទុ)

☐ក. គ្រូពេទ្យ និងយោធា ☐ខ. ការធ្វើស្រែចម្ការ

☐គ. សមាជិកគ្រួសារ និងមុខរបរ ☐ឃ. ការលក់ដូរ

២.តើពេលចាប់ផ្ដើមសន្ទនា ចិន្ដាប្រើពាក្យអ្វីទៅកាន់ណារិន? (១ពិន្ទុ)

☐ក. ណារិន ☐ខ. តើឯងសុខសប្បាយជាទេ?

☐គ. អូ! ម្ដាយខ្ញុំជាអ្នកលក់ដូរ ☐ឃ. សួស្ដី! ណារិន

៣.តើណារិនប្រើពាក្យអ្វី ដើម្បីឆ្លើយតបទៅចិន្ដាវិញ? (១ពិន្ទុ)

☐ក. បាទ! សួស្ដីចិន្ដា ☐ខ. អរគុណចិន្ដា

☐គ. បាទ! ចិន្ដា ☐ឃ.ខ្ញុំសុខសប្បាយជាធម្មតាទេ។

៤.តើគ្រួសារចិន្ដាមានសមាជិកប៉ុន្មាននាក់? (១ពិន្ទុ)

☐ក. មាន បីនាក់ ☐ខ. មាន បួននាក់

☐គ.មាន ប្រាំនាក់ ☐ឃ. មាន ប្រាំមួយនាក់

៥.តើម្ដាយឪពុកចិន្ដាប្រកបមុខរបរអ្វី? (១ពិន្ទុ)

☐ក. ម្ដាយលក់ដូរ ឪពុកជាយោធា ☐ខ. ម្ដាយជាមេផ្ទះ ឪពុកជាយោធា

☐គ. ម្ដាយជាគ្រូពេទ្យ ឪពុកជាកសិករ ☐ឃ.ម្ដាយជាគ្រូពេទ្យ ឪពុកជាគ្រូបង្រៀន

៦.តើគ្រួសារណារិនមានសមាជិកប៉ុន្មាននាក់? (១ពិន្ទុ)

☐ក. មាន ពីរនាក់ ☐ខ. មាន បីនាក់

☐គ. មាន បួននាក់ ☐ឃ.មាន ប្រាំនាក់

៧.តើម្ដាយឪពុកណារិនប្រកបមុខរបរអ្វី? (១ពិន្ទុ)

☐ក.ម្ដាយលក់ដូរ ឪពុកជាយោធា ☐ខ. ម្ដាយជាគ្រូពេទ្យ ឪពុកជាគ្រូបង្រៀន

☐គ.ម្ដាយជាមេផ្ទះ ឪពុកជាយោធា ☐ឃ.ម្ដាយជាគ្រូពេទ្យ ឪពុកជាកសិករ

## II.**សំណេរ** (១០ ពិន្ទុ)

១. ចូរបំពេញចន្លោះអំពីសមាជិកគ្រួសារ និងមុខរបររបស់គ្រួសារប្អូន។ (២ពិន្ទុ)

- គ្រួសារខ្ញុំមានសមាជិកចំនួន......................នាក់
- ឪពុកឈ្មោះ................................គាត់ជា............................................................
- ម្ដាយឈ្មោះ................................គាត់ជា............................................................
- បងឈ្មោះ..................................គាត់ជា...........................................................
- ជីតាឈ្មោះ.................................គាត់ជា...........................................................
- ជីដូនឈ្មោះ................................គាត់ជា..........................................................។

២. ចូរបង្កើតការសន្ទនាអំពីសមាជិកគ្រួសារ និងមុខរបររបស់គ្រួសារអ្នក តាមលំនាំខាងលើ។ (៥ពិន្ទុ)

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

៣. ចូរតែងល្បះតាមរូបភាពខាងក្រោម ឱ្យបានយ៉ាងតិចបីល្បះ។ (៣ពិន្ទុ)



..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៤១ ឥទ្ធិពលនៃគ្រឿងស្រវឹង

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




I.**អំណាន** (១០ ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

| | | |
|---|---|---|
| ឯអ្នកប្រមឹក | ប្រមូលកនផឹក | ធ្វើភៀននឹងក្មេង |
| សម្តីច្រើនតឹង | ស្រវឹងវង្វេង | ជំហរអួតក្អេង |
| | មិនចេះក្រខ្សត់។ | |
| អួតទាំងបំពាន | ផឹកម៉្លៃលុយមាន | ផឹកម៉្លៃលុយអត់ |
| ឯងចេះតែកិន | ចិនចេះតែកត់ | ផឹកដល់កំណត់ |
| | យកស្រែបញ្ចាំ។ | |
| សល់ថ្នាលមួយពីរ | វាយគោស្ងោរស៊ី | មិនគិតខ្លាចកម្ម |
| ផឹកជ្រុលហួសបទ | អត់បាយរាល់ឆ្នាំ | អស់ស្រែបញ្ចាំ |
| | បញ្ចាំកូនទៀត។ | |

(ដកស្រង់ចេញពីច្បាប់ក្រមង៉ុយ)

ចូរគូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ

១. តើអត្ថបទនេះនិយាយពីអ្វី? (១ពិន្ទុ)

☐ក. ជីវភាពក្រីក្ររបស់អ្នកស្រុក ☐ខ. របររកស៊ី លក់ដូរ

☐គ. ឥទ្ធិពលនៃគ្រឿងស្រវឹង ☐ឃ. មិត្តភក្តិគូកន

២. តើអត្ថន័យមួយណាត្រូវនឹងមេសូត្រខាងលើ? (១ពិន្ទុ)

☐ក. អ្នកប្រមឹកមានប្រយោជន៍ដល់គ្រួសារ ☐ខ. អ្នកប្រមឹកតែងជួយដល់ជនក្រីក្រ

☐គ. អ្នកប្រមឹកធ្វើឱ្យគ្រួសារជួបការលំបាក ☐ឃ. អ្នកប្រមឹកធ្វើឱ្យគ្រួសារមានសុភមង្គល

៣. តើស្រាមានផ្ទុកសារធាតុអ្វី? (១ពិន្ទុ)

☐ក. សារធាតុបំប៉នកម្លាំង ☐ខ. សារធាតុជួយដល់សុខភាពល្អ

☐គ. ជាថ្នាំព្យាបាលជំងឺ ☐ឃ.សារធាតុញៀន

៤. តើអ្នកផឹកស្រាច្រើនប្រើសម្តីដូចម្តេច? (១ពិន្ទុ)

☐ក. សម្តីសុភាពទន់ភ្លន់ ☐ខ. សម្តីថ្លៃថ្នូរគួរឱ្យគោរព

☐គ.សម្តីតឹង អួតក្អេងក្អាង វង្វេងភាន់ភាំង ☐ឃ.សម្តី រួសរាយគួរឱ្យស្រឡាញ់

៥. តើអ្នកផឹកស្រាដល់កំណត់ បើអត់លុយផឹក គាត់ធ្វើបែបណា? (១ពិន្ទុ)

☐ក. យកស្រែ និងកូនទៅបញ្ចាំ ☐ខ. ឈប់ផឹក

☐គ. រកការងារធ្វើ ☐ឃ.ដេកនៅផ្ទះ

៦. តើអត្ថបទមេសូត្រខាងលើ ចង់អប់រំអ្វីដល់អ្នក? (១ពិន្ទុ)

☐ក. យកគំរូតាម ☐ខ. ខិតខំរៀនសូត្រ

☐គ. ចៀសឆ្ងាយពីគ្រឿងស្រវឹង ☐ឃ.ស្តាប់តាមដំបូន្មានឪពុកម្តាយ

៧. ចូររកបដិសព្ទនឹងពាក្យ “ ខ្លាច ” (១ពិន្ទុ)

☐ក.ភ័យ ☐ខ. ហ៊ាន

☐គ.មិនខ្លាច ☐ឃ.ខ្វះខាត

៨. ចូររកវេវចនសព្ទនឹងពាក្យ “ ក្លើ ” (១ពិន្ទុ)

☐ក.បងប្អូន ☐ខ. ខ្លាំង

☐គ.ភឿន ☐ឃ.សត្រូវ

៩. ចូររកពាក្យចួននៅក្នុងអត្ថបទខាងលើក្នុងវគ្គទី៣ (២ពិន្ទុ)

តើពាក្យ “ ពីរ ” ចួននឹងពាក្យអ្វី?

☐ក.កម្ម ☐ខ. វាយ

☐គ.ខ្លាច ☐ឃ. ស៊ី

តើពាក្យ “ កម្ម ” ចួននឹងពាក្យអ្វីខ្លះ? (១ពិន្ទុ)

☐ក. បទ និង អត់ ☐ខ. ពីរ និង ស៊ី

☐គ.ឆ្នាំ និង បញ្ចាំ ☐ឃ. អត់ និង អស់

## II.**សំណេរ** (១០ **ពិន្ទុ**)

១. ចូរពន្យល់ពាក្យខាងក្រោម (៣ពិន្ទុ)

- កម្ម ( )........................................................................................................................
- សុរា ( )........................................................................................................................
- ប្រមឹក ( )....................................................................................................................

២. ចូររៀបពាក្យ កន្សោមពាក្យក្នុងប្រអប់ឱ្យបានជាល្បះត្រឹមត្រូវ (២ពិន្ទុ)

| | | | | | |
|---|---|---|---|---|---|
| ធ្វើឱ្យ | វង្វេង | សុរា | ស្មារតី។ | អ្នកសេព | តែង |

........................................................................................................................

| | | | | | |
|---|---|---|---|---|---|
| ហិង្សា | គ្រឿងស្រវឹង | សេព | ក្នុងគ្រួសារ។ | អំពើ | នាំឱ្យមាន |

........................................................................................................................

៣. ចូរសរសេរតែងសេចក្ដីពណ៌នាពី “ **ការផឹកគ្រឿងស្រវឹងបង្កឱ្យមាន អំពើហិង្សាក្នុងគ្រួសារ** ” តាមរយៈគម្រោងខាងក្រោម (៥ពិន្ទុ)



គម្រោង

១.សេចក្ដីផ្ដើម

- ពេលវេលា
- ទីកន្លែង
- ឈ្មោះព្រឹត្តិការណ៍។

២.តួសេចក្ដី

- មុនពេលកើតហេតុ
    - សកម្មភាពមនុស្សមុនពេលកើតព្រឹត្តិការណ៍
- ពេលកើតហេតុ
    - ព្រឹត្តិការណ៍ចាប់ផ្ដើមកើតឡើង ( ហេតុអ្វីបានជាមានព្រឹត្តិការណ៍នោះ? )
    - ព្រឹត្តិការណ៍កំពុងកើតឡើង ( តើព្រឹត្តិការណ៍នោះប្រព្រឹត្តិទៅដូចម្ដេច? )

- ក្រោយពេលកើតហេតុ
  - ការខូចខាត
  - សកម្មភាពអ្នកទៅមើលព្រឹត្តិការណ៍
  - សកម្មភាពកម្លាំងសមត្ថកិច្ច(ប៉ូលិស)។

៣.សេចក្ដីបញ្ចប់

ចំណាប់អារម្មណ៍ : បង្ហាញពីចំណាប់អារម្មណ៍ និងការប្ដេជ្ញាចិត្ត។

សេចក្ដីអធិប្បាយ

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................



# កិច្ចការផ្ទះ

# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៤២ សញ្ញាសួរ " ? " ដល់ មេរៀន៤៣ សិប្បកម្មថ្មកែវ

សាលាបឋមសិក្សា...............................

ឈ្មោះសិស្ស.......................................



២០

**អំណាន** (១០ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

សិប្បកម្មជាកន្លែងផលិតកម្មធុនតូច។ សិប្បកម្មចម្លាក់ថ្មកែវនៅខេត្តពោធិ៍សាត់ មានកេរ្តិ៍ឈ្មោះល្បីល្បាញតាំងពីយូរលង់ណាស់មកហើយ។ អ្នកទេសចរដែលបានទៅកម្សាន្តនៅទីនោះ តែងតែចាប់អារម្មណ៍ និងស្ងើចសរសើរចំពោះស្នាដៃដ៏មានក្បូរក្បាច់រចនាល្អផូរផង់ជាមរតកជូនតាយើង។

នៅប្រទេសកម្ពុជា ថ្មកែវភាគច្រើនមាននៅភ្នំតាសែ ភ្នំយ៉ន និងភ្នំស្ពង់ ក្នុងស្រុកភ្នំក្រវាញ នៃទឹកដីខេត្តពោធិ៍សាត់។ ថ្មកែវ ជាប្រភេទថ្មធម្មជាតិម្យ៉ាងដែលមានពណ៌ចម្រុះភ្លឺរលោង អាចយកមកឆ្លាក់ធ្វើជារូបសំណាកផ្សេងៗ ដូចជាវត្ថុសិល្បៈ វត្ថុអនុស្សាវរីយ៍ វត្ថុជាទីសក្ការៈបានច្រើនបែបយ៉ាងសម្រាប់តាំងលម្អ និងគោរពបូជា។ ថ្មកែវ ជាធនធានធម្មជាតិមានសារៈសំខាន់ចំពោះប្រទេសកម្ពុជាយើង។

សិប្បកម្មថ្មកែវ បានលើកស្ទួយកម្រិតជីវភាពប្រជាជនក្នុងស្រុកភ្នំក្រវាញ នៃខេត្តពោធិ៍សាត់ឱ្យកាន់តែ សម្បូរធូរធារ។

ចូរគូសសញ្ញា √ ក្នុងប្រអប់☐ចម្លើយមួយដែលត្រឹមត្រូវ

១. តើអត្ថបទនេះមានចំណងជើងដូចម្តេច? (១ពិន្ទុ)

☐ក. សិប្បកម្មថ្មកែវ ☐ខ. ប្រវត្តិខេត្តពោធិ៍សាត់

☐គ. រមណីយដ្ឋាន ☐ឃ. ជាងចម្លាក់

២. តើនៅប្រទេសកម្ពុជា ថ្មកែវភាគច្រើនមាននៅក្នុងខេត្តណា? (១ពិន្ទុ)

☐ក. ខេត្តប៉ៃលិន ☐ខ. ខេត្តកំពង់ស្ពឺ

☐គ. ខេត្តមណ្ឌលគិរី ☐ឃ. ខេត្តពោធិ៍សាត់

៣. តើថ្មកែវមានពណ៌ដូចម្តេច? (១ពិន្ទុ)

☐ក. ពណ៌សរលោង ☐ខ. ពណ៌ខ្មៅរលោង

☐គ. ពណ៌ចម្រុះភ្លឺរលោង ☐ឃ.ពណ៌ខៀវភ្លឺ

៤. តើគេយកថ្មកែវមកធ្វើអ្វី? (១ពិន្ទុ)

☐ក. ធ្វើជារបស់ប្រើប្រាស់ ☐ខ. ឆ្លាក់ធ្វើជារូបសំណាកផ្សេងៗ

☐គ. ធ្វើជាថ្មសំលៀងកាំបិត ☐ឃ.ធ្វើជាគ្រឿងអលង្ការ

៥. តើភ្នំតាសែ ភ្នំយ៉ន និងភ្នំស្តង់ ស្ថិតក្នុងស្រុកណា នៃខេត្តពោធិ៍សាត់? (១ពិន្ទុ)

☐ក. ស្រុកក្រគរ ☐ខ. ស្រុកភ្នំក្រវាញ

☐គ. ស្រុកកណ្តៀង ☐ឃ.ស្រុកបាកាន

៦. ក្នុងចំណោមល្បះខាងក្រោម តើល្បះមួយណាដែលជាគំនិតសំខាន់របស់អត្ថបទ? (១ពិន្ទុ)

☐ក. ថ្មកែវជាប្រភេទថ្មធម្មជាតិម្យ៉ាងគ្មានតម្លៃ។

☐ខ. ត្បូងថ្មអាចយកមកឆ្លាក់ជារូបសំណាក់ផ្សេងៗ។

☐គ. ចម្លាក់ថ្មកែវ ធ្វើឱ្យជីវភាពប្រជាជនសម្បូរធូរធារ។

☐ឃ.ថ្មធម្មជាតិមានសារប្រយោជន៍។

៧. ចូរគូសភ្ជាប់ពាក្យដែលជានាម គុណនាម និងកិរិយាសព្ទឱ្យបានត្រឹមត្រូវ។ (២ពិន្ទុ)

| **ក** | **ខ** |
|---|---|
| នាម<br>គុណនាម<br>កិរិយា | តូច<br>សក្ការៈ<br>ចម្លាក់<br>ស្ទើច |

៨. ចូរគូសភ្ជាប់ពីតារាង“ **ក** ” ទៅ “ **ខ** ”ឱ្យបានជាល្បះត្រឹមត្រូវ។ (២ពិន្ទុ)

| **ក** | **ខ** |
|---|---|
| ១.ថ្មកែវជាប្រភេទថ្មធម្មជាតិមានតម្លៃ......<br>២.តើគេយកថ្មកែវមកឆ្លាក់ធ្វើអ្វី......<br>៣.តើសិប្បកម្មថ្មកែវជួយលើកស្ទួយជីវភាពប្រជាជនមែនឬទេ......<br>៤.តើថ្មកែវភាគច្រើនមាននៅឯណា....... | ?<br>។ |

**សំណេរ** ( ១០ ពិន្ទុ)

១. ចូរពន្យល់ពាក្យខាងក្រោម (៣ពិន្ទុ)

- សិប្បកម្ម ( )....................................................................................................
- ធនធាន ( )....................................................................................................
- ធម្មជាតិ ( )....................................................................................................

២. ចូររកសទិសសព្ទនឹងពាក្យ “ ជន ” (២ពិន្ទុ)

..........................................................................................................................

..........................................................................................................................

...................................................................................................................................

...................................................................................................................................

៣. តើគេប្រើសញ្ញាសួរ “ ? ” ដើម្បីអ្វី? គេដាក់សញ្ញាសួរនៅបន្ទាប់ពីពាក្យអ្វីខ្លះ? ចូរបង្កើតល្បះសំណួរឱ្យបានពីរ (២ពិន្ទុ)

...................................................................................................................................

...................................................................................................................................

...................................................................................................................................

...................................................................................................................................

...................................................................................................................................

...................................................................................................................................

៤. ចូរតែងល្បះឱ្យត្រូវនឹងរូបភាពខាងក្រោម ដោយប្រើសញ្ញាសួរ “ ? ” និង សញ្ញា “ ។ ” (៣ពិន្ទុ)



...................................................................................................................................

...................................................................................................................................

...................................................................................................................................

...................................................................................................................................

...................................................................................................................................

...................................................................................................................................

...................................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣
មេរៀនទី៤៤ ដំណាំដំឡូងមី

សាលាបឋមសិក្សា...............................

ឈ្មោះសិស្ស.......................................




**អំណាន** (១០ ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

ដំឡូងមី គឺជាដំណាំដែលប្រជាពលរដ្ឋខ្មែរនិយមដាំនៅតាមភូមិដ្ឋានសម្រាប់ជាអាហារបន្ទាប់បន្សំ និងតាមចម្ការសម្រាប់ឧស្សាហកម្ម។

បច្ចុប្បន្ននេះ ដំឡូងមីកំពុងមានតម្រូវការខ្ពស់។ គេយកមើមដំឡូងមីទៅបញ្ចូលក្នុងរោងចក្រដើម្បីកែច្នៃផលិតជាម្សៅមី និងចំណីសត្វ។ លើសពីនេះ ម្សៅដំឡូងមីមានសារៈសំខាន់បំផុតក្នុងការធ្វើជានំចំណីសម្រាប់បរិភោគដូចជា នំប៉័ង នំប៉ាវ មី ។ល។ មុខរបរដាំដំឡូងមី ជាជម្រើសមួយរបស់កសិករយើងដើម្បីបង្កើនប្រាក់ចំណូលរបស់ពួកគេ។ ទីផ្សារដំឡូងមីកំពុងផ្តល់ឱកាសដ៏មានសារៈសំខាន់ ដល់ប្រជាជនគ្រប់តំបន់។ គេនាំគ្នាដាំដំឡូងមី នៅពេលដែលមានចលនានាំចេញទៅទីផ្សារក្រៅប្រទេស។ ការកាត់ដើមដំឡូងមីដើម្បីដាំត្រង់ នាំឱ្យបានមើមច្រើនជាងការដាំចំហៀង។ ដើម្បីទុកដំឡូងមីឱ្យបានយូរ គេត្រូវការឡចំហុយសម្ងួតមើមវា។

ដំឡូងមី ជាដំណាំយ៉ាងសំខាន់ដែលបានលើកកម្ពស់ជីវភាពប្រជាជន និងសេដ្ឋកិច្ចជាតិឱ្យកាន់តែប្រសើរថែមមួយកម្រិតទៀត។

១. ចូរគូសភ្ជាប់ពាក្យទៅនឹងរូបភាពឱ្យបានត្រឹមត្រូវ (៣ពិន្ទុ)

| | |
|---|---|
| ដំឡូងមី | |
| ដំឡូងជ្វា | |
| ដំឡូងដូង | |

២. ចូរគូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ

ក. តើគេដាំដំឡូវមីដើម្បីធ្វើអ្វី? (១ពិន្ទុ)

☐ ក. ជាការហាត់ប្រាណបង្កើនសុខភាព ☐ ខ. ជាការកម្សាន្តសប្បាយ

☐ គ. ជាសួនលម្អ ☐ ឃ. បង្កើនប្រាក់ចំណូល

ខ. តើប្រជាជនខ្មែរនិយមដាំដំឡូវមីនៅឯណា? (១ពិន្ទុ)

☐ ក. នៅតាមតំបន់វាលខ្សាច់ ☐ ខ. នៅលើកំពូលភ្នំ

☐ គ. នៅតាមភូមិដ្ឋាន និងចម្ការ ☐ ឃ. នៅតាមកសិដ្ឋាន

គ. តើគេយកដំឡូងមីបញ្ចូលក្នុងរោងចក្រដើម្បីកែច្នៃធ្វើអ្វី? (១ពិន្ទុ)

☐ ក. ផលិតជាភេសជ្ជៈ ☐ ខ. ផលិតជាស្ករស

☐ គ. ផលិតជាថ្នាំពេទ្យ ☐ ឃ.ផលិតជាម្សៅមី និងចំណីសត្វ

ឃ. ដើម្បីរក្សាទុកដំឡូវមីឱ្យបានយូរ តើគេត្រូវធ្វើដូចម្ដេច? (១ពិន្ទុ)

☐ ក. ត្រូវការឡចំហុយសម្ងួតមើមវា ☐ ខ. វេចខ្ចប់ឱ្យបានល្អ

☐ គ. រក្សាសីតុណ្ហភាពមធ្យម ☐ ឃ.បាញ់ថ្នាំសម្លាប់សត្វល្អិត

ង. តើការកាត់ដើមដំឡូងមីដើម្បីដាំត្រង់ និងការដាំចំហៀង មួយណាបានមើមច្រើនជាង? (១ពិន្ទុ)

☐ ក. ការដាំផ្ដេក ☐ ខ. ការដាំត្រង់

☐ គ. ការដាំចំហៀង ☐ ឃ.ការដាំបញ្ឆិត

ច. ចូររកបដិសព្ទនឹងពាក្យ “ នាំចេញ ”។ (១ពិន្ទុ)

☐ ក. ចំណូល ☐ ខ. ចំណេញ

☐ គ. នាំចូល ☐ ឃ.ចំណាយ

ឆ. ចូររកវេវចនសព្ទនឹងពាក្យ “ ឆាន់ ”។ (១ពិន្ទុ)

☐ ក. បរិភោគ ☐ ខ. ចំណី

☐ គ. ដំឡូងមី ☐ ឃ. ទិញ

**សំណេរ** (១០ ពិន្ទុ)

១. ចូរពន្យល់ពាក្យខាងក្រោម (៣ពិន្ទុ)

- ចំណី ( )......................................................................................................
- កសិករ ( )....................................................................................................
- ដំឡូង ( )......................................................................................................

២. ចូររៀបពាក្យ កន្សោមពាក្យក្នុងប្រអប់ឱ្យបានជាល្បះត្រឹមត្រូវ (២ពិន្ទុ)

| | | | | | | |
|---|---|---|---|---|---|---|
| ដាំ | ដំឡូងមី | ប្រជាជនខ្មែរ | ជា | ចូលចិត្ត | គ្រួសារ។ | លក្ខណៈ |

.......................................................................................................................

| | | | | | | |
|---|---|---|---|---|---|---|
| ចំណែក | សេដ្ឋកិច្ច | ដំឡូងមី | បានរួម | ជាតិ។ | អភិវឌ្ឍ | ដំណាំ |

.......................................................................................................................

៣.ចូរតែងល្បះតាមរូបភាពខាងក្រោម (៣ពិន្ទុ)



.........................................................................................



.........................................................................................



.........................................................................................

៤. ចូរប្អូនរៀបរាប់ពីវិធីដាំដំឡូងមី។ (២ពិន្ទុ)

ចម្លើយ

.........................................................................................................................................

.........................................................................................................................................

.........................................................................................................................................

.........................................................................................................................................

.........................................................................................................................................

.........................................................................................................................................

.........................................................................................................................................

.........................................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៤៥ ការពណ៌នាពីទីកន្លែង

សាលាបឋមសិក្សា...............................

ឈ្មោះសិស្ស.......................................




**អំណាន**( ១០ ពិន្ទុ )

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

កាលពីថ្ងៃអាទិត្យមុន ខ្ញុំបានទៅទស្សនាសារមន្ទីរជាតិជាមួយឪពុកម្ដាយ។

សារមន្ទីរជាតិមានទីតាំងស្ថិតនៅទិសខាងជើងព្រះបរមរាជវាំង នៃរាជធានីភ្នំពេញ។ សារមន្ទីរជាតិនេះ ជាកន្លែងប្រមូលផ្ដុំដាក់តាំង បង្ហាញសម្បត្តិវប្បធម៌ និងប្រវត្តិសាស្ត្រសំខាន់ៗរបស់ប្រទេសធំជាងគេនៅកម្ពុជា។ នៅទីនោះមានដាក់តាំង និងរក្សាទុករូបចម្លាក់ ព្រមទាំងឈុតសម្លៀកបំពាក់របាំ ទូក គ្រែស្នែងរបស់ស្ដេច និងវត្ថុបុរាណជាច្រើនទៀតដាក់តម្រៀបតាំងក្នុងទូដោយមានរបៀបរៀបរយ។ ខ្ញុំឃើញមានភ្ញៀវទេសចរជាតិ និងអន្តរជាតិបានចូលទស្សនាយ៉ាងច្រើនកុះករ។ ទីនេះមានបង្ហាញនូវមរតកវប្បធម៌ដ៏មានតម្លៃរបស់ជាតិតាំងពីបុរាណកាលមក។

ខ្ញុំសប្បាយចិត្តណាស់ដែលបានទៅទស្សនាសារមន្ទីរជាតិ ព្រោះទីនោះសម្បូរវត្ថុបុរាណរបស់ខ្មែរយើង ព្រមទាំងធ្វើឱ្យយើងបានរៀនសូត្រអំពីប្រវត្តិសាស្ត្ររបស់ជាតិខ្មែរយើងក្នុងអតីតកាលផង។

គូសសញ្ញា √ ក្នុងប្រអប់☐ ចម្លើយមួយដែលត្រឹមត្រូវ

១. តើអត្ថបទនេះពណ៌នាអំពីអ្វី? (១ពិន្ទុ)

☐ក. ភ្ញៀវទេសចរ ☐ខ. ព្រះបរមរាជវាំង

☐គ. រាជធានីភ្នំពេញ ☐ឃ. សារមន្ទីរជាតិ

២. តើសារមន្ទីរជាតិស្ថិតនៅខាងណាព្រះបរមរាជវាំង? (១ពិន្ទុ)

☐ក. ទិសខាងកើត ☐ខ. ទិសខាងលិច

☐គ. ទិសខាងត្បូង ☐ឃ. ទិសខាងជើង

៣. តើសារមន្ទីរជាតិជាកន្លែងអ្វី? (១ពិន្ទុ)

☐ក. កន្លែងគោរពបូជា ☐ខ. កន្លែងសម្ដែងសិល្បៈ

☐គ. កន្លែងប្រមូលផ្ដុំដាក់តាំងវត្ថុបុរាណផ្សេងៗ☐ឃ. កន្លែងកម្សាន្តសប្បាយ

៤. ហេតុអ្វីបានជាភ្ញៀវទេសចរចូលចិត្តមកទស្សនាសារមន្ទីរជាតិ? (១ពិន្ទុ)

- [ ] ក. ចង់ឃើញមរតកវប្បធម៌ពីបុរាណ
- [ ] ខ. ចង់សប្បាយ
- [ ] គ. ចង់មកគោរពបូជា
- [ ] ឃ.ចង់ថតរូបលេង

៥. តើអត្ថបទនេះចែកចេញជាប៉ុន្មានផ្នែក? (១ពិន្ទុ)

- [ ] ក. ពីរផ្នែក
- [ ] ខ. បីផ្នែក
- [ ] គ. បួនផ្នែក
- [ ] ឃ.ប្រាំផ្នែក

៦. តើសារមន្ទីរជាតិមានន័យដូចម្ដេច? (១ពិន្ទុ)

- [ ] ក. មន្ទីរវប្បធម៌
- [ ] ខ. មន្ទីរសិក្សាស្រាវជ្រាវ
- [ ] គ. មន្ទីរដាក់វត្ថុមានតម្លៃរបស់ជាតិ
- [ ] ឃ.មន្ទីរឃុំឃាំងមនុស្ស

៧. “ ការផ្សាំបណ្ដុះចំណេះវិជ្ជា និងប្រាជ្ញាស្មារតីឱ្យបានលូតលាស់ចម្រើនដោយវិទ្យាសាស្ត្រ ឬដោយសិល្បៈ ផ្សេងៗជាដើម ” ។ ក្នុងចំណោមពាក្យខាងក្រោម តើពាក្យមួយណាមានន័យត្រូវនឹងល្បះនេះ? (១ពិន្ទុ)

- [ ] ក. ប្រវត្តិសាស្ត្រ
- [ ] ខ. សិល្បៈ
- [ ] គ. មរតក
- [ ] ឃ. វប្បធម៌

៨. “ ភាពនៃអ្វីៗដែលគេបានឃើញ ” ។ ក្នុងចំណោមពាក្យខាងក្រោម តើពាក្យមួយណាមានន័យត្រូវនឹងល្បះនេះ? (១ពិន្ទុ)

- [ ] ក. សមភាព
- [ ] ខ. ទិដ្ឋភាព
- [ ] គ. លទ្ធភាព
- [ ] ឃ. ទេសភាព

៩. ចូររកបដិសព្ទនឹងពាក្យ “ បុរាណ ” (១ពិន្ទុ)

- [ ] ក. ចាស់
- [ ] ខ. ទំនើប
- [ ] គ. ថ្មី
- [ ] ឃ. ក្មេង

១០. ចូររកវេវចនសព្ទនឹងពាក្យ “ ទស្សនា ” (១ពិន្ទុ)

- [ ] ក. កម្សាន្ត
- [ ] ខ. រៀនសូត្រ
- [ ] គ. សប្បាយ
- [ ] ឃ. មើល

**សំណេរ**( ១០ ពិន្ទុ )

១. តើតែងសេចក្ដីពណ៌នាពីទីកន្លែង ចែកចេញជាប៉ុន្មានផ្នែក? អ្វីខ្លះ? (១ពិន្ទុ)

..........................................................................................................................................

..........................................................................................................................................

២. តើផ្នែកនីមួយៗនិយាយពីអ្វី? (៣ពិន្ទុ)

..........................................................................................................................................

..........................................................................................................................................

..........................................................................................................................................

.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................

៣. ចូរសរសេរតែងសេចក្ដីពណ៌នាអំពី**សាលារៀនរបស់ប្អូន** តាមរយៈសំណួរខាងក្រោម។ (៦ពិន្ទុ)

ក. តើសាលារៀននោះឈ្មោះអ្វី? ស្ថិតនៅឯណា?

ខ. មើលពីចម្ងាយ តើសាលារៀននោះមានទិដ្ឋភាពដូចម្ដេចខ្លះ?

គ. ពេលចូលទៅជិត តើសាលារៀននោះមានទិដ្ឋភាពដូចម្ដេចខ្លះ?

ឃ. តើនៅខាងក្នុងសាលារៀននោះមានទិដ្ឋភាពដូចម្ដេចខ្លះ?

ង. តើប្អូនមានចំណាប់អារម្មណ៍ដូចម្ដេចចំពោះសាលារៀននោះ?

សេចក្ដីអធិប្បាយ

.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................
.....................................................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៤៦ សុជីវធម៌តាមទីសាធារណៈ ដល់មេរៀនទី៤៧ មូសិកទន្ត ឬធ្មេញកណ្ដុរ " ុ "

សាលាបឋមសិក្សា...............................

ឈ្មោះសិស្ស.......................................




**អំណាន**( ១០ ពិន្ទុ )

ចូរច្រៀងចម្រៀងខាងក្រោម រួចឆ្លើយនឹងសំណួរ។

ចម្រៀង : លំនាំបទ កន្ទុបម៉ែមួយ

| | | |
|---|---|---|
| ឱ! មិត្តអឹងអឺយប្រុសស្រី | ត្រូវចេះគួរសមរាក់ទាក់ | (ពីរដង) |
| មិនត្រូវដើរឱ្យពារប៉ះ | ឬក៏ជម្ពះស្ត្រីមានផ្ទៃពោះ។ | (ពីរដង) |
| ពេលមិត្តឃើញចាស់ជរា | គ្រាំគ្រាតូចធំទាបខ្ពស់ | (ពីរដង) |
| មិនគួរមិនសមធ្វើសោះ | ប៉ះពាល់កិត្តិយសនាំឱ្យថ្នាំងថ្នាក់។ | (ពីរដង) |
| កុមារាកុមារី | ឃ្នាតខ្ចីរួសរាយរាក់ទាក់ | (ពីរដង) |
| ទើបក្លាយជាពលរដ្ឋម្នាក់ | មានសុជីវធម៌ជាក់ក្នុងសង្គមខ្មែរ។ | (ពីរដង) |

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ

១. តើអត្ថបទនេះនិយាយពីអ្វី? (១ពិន្ទុ)

☐ក. ការគួរសមរាក់ទាក់ ☐ខ. ការធ្វើដំណើរទីសាធារណៈ

☐គ. សុជីវធម៌តាមទីសាធារណៈ ☐ឃ. ការចេះជួយគ្នា

២. តើកុមារត្រូវមានទម្លាប់ល្អដូចម្ដេចពេលជួបមនុស្សចាស់? (១ពិន្ទុ)

☐ក. សម្លឹងមុខ ☐ខ. ចាប់ដៃ

☐គ. លើកដៃសំពះ ☐ឃ. ធ្វើមិនឃើញ

៣. តើពេលប្អូនដើរជិតស្ត្រីមានផ្ទៃពោះ គួរធ្វើដូចម្ដេច? (១ពិន្ទុ)

☐ក. ដើរប្រជ្រៀត ☐ខ. រុញចេញដើម្បីទៅមុន

☐គ. ដើរប៉ះ ឬបុក ☐ឃ. មិនដើរប្រជ្រៀត ឬទន្ទិច

៤. ពេលប្អូនឃើញចាស់ជរា ឬជនមានពិការភាព តើត្រូវធ្វើដូចម្តេច? (១ពិន្ទុ)

☐ ក. ស្អប់ ខ្ពើម មិននិយាយជាមួយ ☐ ខ. មិនចង់នៅក្បែរ

☐ គ. គួរសម និងយកអាសា ☐ ឃ. ពេបជ្រាយ

៥. តើដើម្បីក្លាយជាពលរដ្ឋមានសុជីវធម៌ក្នុងសង្គម តើប្អូនគួរធ្វើដូចម្តេច? (១ពិន្ទុ)

☐ ក. រួសរាយរាក់ទាក់ គួរសម យកអាសា ☐ ខ. ខិតខំរៀនសូត្រ

☐ គ. ខិតខំធ្វើការងារ ☐ ឃ. មិនផឹកស្រា លេងល្បែង

៦. ចូររកបដិសព្ទនឹងពាក្យ “ មាំមួន ”។ (១ពិន្ទុ)

☐ ក. ខ្សោយ ☐ ខ. ខ្លាំង

☐ គ. រឹងប៉ឹង ☐ ឃ.ទ្រុឌទ្រោម

៧. ចូររកវេវចនសព្ទនឹងពាក្យ “ និមន្ត ”។ (១ពិន្ទុ)

☐ ក. គង់ ☐ ខ. សឹក

☐ គ. យាង ☐ ឃ. សិង

៨. ចូរជ្រើសរើសអក្សរតំណាងរូបភាពទៅបំពេញក្នុងប្រអប់ពីមុខឃ្លាឱ្យបានត្រឹមត្រូវ។ (៣ពិន្ទុ)

ក



ខ



គ



☐ ១. ខ្ញុំសូមជម្រាបសួរលោកតា។

☐ ២. មីងសូមអញ្ជើញអង្គុយចុះ។

☐ ៣. សួស្តី! មិត្ត តើឯងតែងតែមកអានសៀវភៅនៅទីនេះឬ?

**សំណេរ**( ១០ ពិន្ទុ )

១. តើគេប្រើសញ្ញាមូសិកទន្ត ឬធ្មេញកណ្តុរ “ ៉ ” សម្រាប់ធ្វើអ្វី? (២ពិន្ទុ)

..........................................................................................................

..........................................................................................................

..........................................................................................................

២. តើសញ្ញាមូសិកទន្ត ឬធ្មេញកណ្តុរ “ ៉ ” ប្តូរជាបុកជើង “ ុ ” វិញនៅពេលណា? (២ពិន្ទុ)

..........................................................................................................

..........................................................................................................

..........................................................................................................

៣. ចូរស្រង់ពាក្យដែលមានមូសិកទន្ត ឬធ្មេញកណ្ដុរ “ ៉ ” ក្នុងអត្ថបទខាងក្រោម។ (៣ពិន្ទុ)

តាម៉ុកអង្គុយផ្អិបុំ ក្រោយដើមចម្ប៉ា នៅលើកោះរ៉ុង។ រសៀលម៉ោងបី ខ្យល់បក់ប៉ិរៗ ប៉ើង សក់មីងយ៉ាំដែលកំពុងលក់ម៉ាំល្ហុងក្នុងភូមិកោះរ៉ុង។ អ្នកភូមិនាំគ្នាទិញរញ៉ីករញ៉ៃ ព្រោះគាត់ប៉ិន កំប្លែងក្រមិចក្រមើម និងចេះធ្វើឫកម៉ិកម៉ក់ ទាក់ចិត្តអ្នកទិញឱ្យសប្បាយ។ តាម៉ែតដឹកដៃយាយ យ៉ាត ដើរង៉ុកៗទៅទិញនំប៉ាវធ្វើចៅរ៉ែនឈើរ៉ាំរ៉ៃដេកចាំនៅផ្ទះ។

....................................................................................................................................

....................................................................................................................................

....................................................................................................................................

....................................................................................................................................

៤. ចូរជ្រើសរើសពាក្យក្នុងប្រអប់ យកទៅបំពេញល្បះខាងក្រោមឱ្យបានត្រឹមត្រូវ (៣ពិន្ទុ)

| | | |
|---|---|---|
| សុជីវធម៌ | គោរព | ទង្គិច |

១. កូនល្អត្រូវចេះ....................ចាស់ទុំ។

២. ពលរដ្ឋល្អត្រូវមាន........................ក្នុងការរស់នៅ។

៣. ពេលយើងដើរជួបមនុស្សចាស់ ឬស្ត្រីមានផ្ទៃពោះយើងមិនត្រូវដើរ.................គាត់ឡើយ។



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៤៨ បកស្រាយភ្លើង និងផ្លាកសញ្ញាចរាចរណ៍ និងមេរៀនទី៤៩ ផ្លាកសញ្ញាសុវត្ថិភាពនានា

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

ភ្លើងសញ្ញាចរាចរណ៍ គេដាក់ត្រង់ចំណុចផ្លូវខ្វែងគ្នាច្រើនតាមទីប្រជុំជន ពិសេសនៅ រាជធានីភ្នំពេញ។

ពេលភ្លើងសញ្ញានេះ មានភ្លើងពណ៌បៃតងមានន័យថា ត្រូវចេញដំណើរ។ ពេលភ្លើងសញ្ញានេះ មានពណ៌ក្រហមមានន័យថា ត្រូវឈប់។ ភ្លើងសញ្ញាពណ៌លឿងបញ្ជាក់ថា ជាសញ្ញាប្រុងប្រយ័ត្ន។ គេប្រើសញ្ញាទាំងនេះ ដើម្បីការពារការកកស្ទះចរាចរណ៍ ឬគ្រោះថ្នាក់។

ផ្លាកសញ្ញាមានច្រើនដូចជាផ្លាកសញ្ញាបញ្ជា ផ្លាកសញ្ញាបម្រាម ផ្លាកសញ្ញាអាសន្ន និងផ្លាកសញ្ញាគ្រោះថ្នាក់ជាដើម។

ផ្លាកសញ្ញាគ្រោះថ្នាក់មានច្រើនប្រភេទទៀតដូចជាសញ្ញាក្បាលខ្មោច សញ្ញាការដ្ឋានសំណង់ សញ្ញាគូសខ្វែង។ល។ ផ្លាកសញ្ញានីមួយៗ មានន័យខុសៗគ្នា។ នៅលើផ្ទៃដី បើមានដាក់សញ្ញាក្បាលខ្មោច មានន័យថាទីនោះមានមីន ឬគ្រាប់មិនទាន់ផ្ទុះ។ ម្យ៉ាងទៀត បើនៅតាមផ្លូវមានដាក់សញ្ញាការដ្ឋាន បញ្ជាក់ឱ្យអ្នកដំណើរប្រុងប្រយ័ត្ន ព្រោះទីនោះមានការជួសជុលផ្លូវ ឬប្រព័ន្ធលូជាដើម។ ផ្លាកសញ្ញាទាំងនោះ ធ្វើឱ្យយើងដឹងពីចំណុចគ្រោះថ្នាក់ផ្សេងៗ។

ដូច្នេះ ដើម្បីចៀសវាងគ្រោះថ្នាក់ផ្សេងៗ យើងត្រូវស្វែងយល់ពីផ្លាកសញ្ញាទាំងនោះឱ្យបានច្បាស់លាស់ ដើម្បីរស់នៅប្រកបដោយសុខសុវត្ថិភាព។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ

១. តើភ្លើងសញ្ញាចរាចរណ៍គេច្រើនដាក់នៅកន្លែងណា? (១ពិន្ទុ)

☐ ក. តាមផ្លូវជាតិ
☐ ខ. គ្រប់ផ្លូវទាំងអស់
☐ គ. ផ្លូវខ្វែងគ្នាតាមទីក្រុង ឬទីប្រជុំជន
☐ ឃ. កន្លែងមានការឆ្លងកាត់

២. តើភ្លើងសញ្ញាចរាចរណ៍មានប៉ុន្មានពណ៌? (១ពិន្ទុ)

☐ក. មានពីរពណ៌ ☐ខ. មានបីពណ៌

☐គ. មានបួនពណ៌ ☐ឃ. មានប្រាំពណ៌

៣. ពេលភ្លើងសញ្ញាចរាចរណ៍មានពណ៌បៃតង តើយើងត្រូវធ្វើដូចម្ដេច? (១ពិន្ទុ)

☐ក. ត្រូវឈប់ ☐ខ. ត្រូវចេញដំណើរ

☐គ. ត្រូវប្រុងប្រយ័ត្ន ☐ឃ. ត្រូវបង្កើនល្បឿន

៤. ពេលភ្លើងសញ្ញាចរាចរណ៍មានពណ៌ក្រហម តើយើងត្រូវធ្វើដូចម្ដេច? (១ពិន្ទុ)

☐ក. ត្រូវឈប់ ☐ខ. ត្រូវចេញដំណើរ

☐គ. ត្រូវប្រុងប្រយ័ត្ន ☐ឃ. ត្រូវបង្កើនល្បឿន

៥. ពេលភ្លើងសញ្ញាចរាចរណ៍មានពណ៌លឿង តើយើងត្រូវធ្វើដូចម្ដេច? (១ពិន្ទុ)

☐ក. ត្រូវឈប់ ☐ខ. ត្រូវចេញដំណើរ

☐គ. ត្រូវប្រុងប្រយ័ត្ន ☐ឃ. ត្រូវបង្កើនល្បឿន

៦. តើគេប្រើ ភ្លើង និងផ្លាកសញ្ញាចរាចរណ៍ទាំងនេះដើម្បីអ្វី? (១ពិន្ទុ)

☐ក. ឃាត់រថយន្តផាកពិន័យ ☐ខ. កុំឱ្យបើកបរលឿនពេក

☐គ. ការពារការកកស្ទះចរាចរណ៍ ឬគ្រោះថ្នាក់ ☐ឃ. ត្រួតពិនិត្យរថយន្ត

៧. តើផ្លាកសញ្ញាសុវត្ថិភាពនានាមានអ្វីខ្លះ? (១ពិន្ទុ)

☐ក. បញ្ជា បម្រាម អាសន្ន គ្រោះថ្នាក់ ☐ខ. ក្រហម ខៀវ លឿង បៃតង

☐គ. ក្បាលខ្មោច ការដ្ឋានសំណង់ គូសខ្វែង ☐ឃ. ជ្រុង មូល ទ្រវែង ត្រីកោណ

៨. តើផ្លាកសញ្ញាក្បាលខ្មោចនៅលើផ្ទៃដីមានន័យដូចម្ដេច? (១ពិន្ទុ)

☐ក. តំបន់កប់ខ្មោច ☐ខ. មានមីន ឬគ្រាប់មិនទាន់ផ្ទុះ

☐គ. វាលពិឃាត ☐ឃ. ប្រយ័ត្នគ្រោះថ្នាក់

៩. តើផ្លាកសញ្ញាការដ្ឋានមានន័យដូចម្ដេច? (១ពិន្ទុ)

☐ក. ជួសជុលផ្លូវ ឬប្រព័ន្ធលូ ☐ខ. បោសសំអាតផ្លូវ

☐គ. មានទួលខាងមុខ ☐ឃ. រលំអគារ

១០.ដើម្បីចៀសវាងគ្រោះថ្នាក់ចរាចរណ៍ផ្សេងៗ តើយើងត្រូវស្វែងយល់ពីអ្វី? (១ពិន្ទុ)

☐ក. ចេះបើកបរស្ទាត់ ☐ខ. បើកបរយឺតៗ

☐គ. យល់ពីភ្លើង និងផ្លាកសញ្ញាឱ្យបានច្បាស់ ☐ឃ. ស្ថានភាពអាកាសធាតុ

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យខាងក្រោម។ (១.៥ពិន្ទុ)

- ប្រយ័ត្ន ( )......................................................................................................
- សុវត្ថិភាព ( )....................................................................................................
- ចរាចរណ៍ ( )......................................................................................................

២. ចូរពន្យល់ពីភ្លើងសញ្ញាចរាចរណ៍ខាងក្រោម។ (១.៥ពិន្ទុ)



- ពណ៌ក្រហម : ............................................................................................

- ពណ៌លឿង : ...............................................................................................

- ពណ៌បៃតង : ..............................................................................................

៣. ចូរបំពេញឈ្មោះ ឬអត្ថន័យនៃផ្លាកសញ្ញាទាំងនេះ។ (៤ពិន្ទុ)











.................................... ..................................... ................................. ..........................................

៤. ចូរតែងល្បះនឹងពាក្យ " ស្រវឹង   បារី   ល្បឿន " ឱ្យបានត្រឹមត្រូវ។ (៣ពិន្ទុ)

ក. .........................................................................................................................

ខ. .........................................................................................................................

គ. .........................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣
មេរៀនទី៥០ សមិទ្ធផលថ្មីៗ

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ។

មេសូត្រ : បទកាកគតិ

ខ្មែររាជបុរី ស្នាដៃថ្មីៗ ពេញផ្ទៃរដ្ឋា
ផ្លូវជាតិផ្លូវលំ កាត់ភ្នំថ្មដា ផ្ទះថ្មវីឡា
អគារស្កឹមស្កៃ។

វិស្ពានអាកាស ភ្លើងពណ៌ដេរដាស តាមដងវិថី
ស្ពានឆ្លងទន្លេ បានសាងសង់ថ្មី វិមានស្កឹមស្កៃ
ឈ្មោះសន្តិភាព។

អគ្គិសនី ដើរដោយវារី រាយដល់វាលរាប
សួនកសិដ្ឋាន ប្រឡាយទឹកព្រៀប តំបន់ទំនាប
ស្រូវស្រែបវរ។

គូសសញ្ញា √ ក្នុងប្រអប់☐ ចម្លើយមួយដែលត្រឹមត្រូវ

១. តើមេសូត្រខាងលើនិយាយអំពីសមិទ្ធផលពេលណា? (១ពិន្ទុ)

☐ក. ពីបុរាណ ☐ខ. បច្ចុប្បន្ន

☐គ. អនាគត ☐ឃ. ពីអតីតកាល

២. តើអ្នកកសាងសមិទ្ធផលថ្មីៗក្នុងអត្ថបទខាងលើជាជនជាតិអ្វី? (១ពិន្ទុ)

☐ក. ជនជាតិខ្មែរ ☐ខ. ជនជាតិចិន

☐គ. ជនជាតិបារាំង ☐ឃ.ជនជាតិអង់គ្លេស

៣. តើវិមានដែលគេសាងសង់ថ្មីមានឈ្មោះអ្វី? (១ពិន្ទុ)

☐ក. វត្តភ្នំ ☐ខ. ឈ្នះ ឈ្នះ

☐គ. ឯករាជ្យ ☐ឃ. សន្តិភាព

៤. តើមេសូត្រខាងលើមានប៉ុន្មានវគ្គ? (១ពិន្ទុ)

☐ក. បីវគ្គ ☐ខ. ប្រាំវគ្គ

☐គ. ប្រាំមួយវគ្គ ☐ឃ. ប្រាំពីរវគ្គ

៥. តើវគ្គទីមួយនៃមេសូត្រខាងលើនិយាយពីអ្វី? (១ពិន្ទុ)

☐ក. ការកសាងស្ពានអាកាស ☐ខ. ការកសាងវត្តអារាម មន្ទីរពេទ្យ

☐គ. ការកសាងផ្លូវជាតិ ផ្លូវលំ ផ្ទះថ្មវីឡា អគារ ☐ឃ. ការកសាងវារីអគ្គិសនី

៦. តើវគ្គទីពីរនៃមេសូត្រខាងលើនិយាយពីអ្វី? (១ពិន្ទុ)

☐ក.ការកសាងស្ពាន វិមានសន្តិភាព ភ្លើងពណ៌ ☐ខ. ការកសាងវារីអគ្គិសនី

☐គ. ការកសាងផ្លូវជាតិ ផ្លូវលំ ផ្ទះថ្មវីឡា អគារ ☐ឃ. ការកសាងប្រឡាយទឹក សួនកសិដ្ឋាន

៧. តើវគ្គទីបីនៃមេសូត្រខាងលើនិយាយពីអ្វី? (១ពិន្ទុ)

☐ក.ការកសាងស្ពាន វិមានសន្តិភាព ភ្លើងពណ៌ ☐ខ. ការកសាងផ្លូវជាតិ ផ្លូវលំ ផ្ទះថ្មវីឡា

☐គ. វារីអគ្គិសនី ប្រឡាយទឹក ដំណាំស្រូវ ☐ឃ. ការកសាងបុរី វិមាន អគារ វត្ត សាលា

៨. តើវគ្គទីពីរពាក្យ "អាកាស" ចួននឹងពាក្យអ្វី? (១ពិន្ទុ)

☐ក. ភ្លើង ☐ខ. វិថី

☐គ. ពណ៌ ☐ឃ. ដេរដាស

៩. តើវគ្គទីពីរពាក្យ " វិថី " ចួននឹងពាក្យអ្វី? (១ពិន្ទុ)

☐ក. វារី និងអគ្គិសនី ☐ខ. សន្តិភាព

☐គ. ថ្មី និងស្ដឹមស្ដៃ ☐ឃ. សាងសង់

១០. ចូររកវេវចនសព្ទនឹងពាក្យ " វិថី "។ (១ពិន្ទុ)

☐ក. រុក្ខជាតិ ☐ខ. អគារ

☐គ. ផ្លូវ ☐ឃ. ភ្នំ

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- សន្តិភាព ( )......................................................................................................

- វារី ( )......................................................................................................

- សមិទ្ធផល( )......................................................................................................

២. ចូររកបដិសព្ទនឹងពាក្យ “ សង្គ្រាម   ជឿនលឿន ”។ (២ពិន្ទុ)

.....................................................................................................................

.....................................................................................................................

៣. ចូររកវេវចនសព្ទនឹងពាក្យ “ ផ្លូវ ”។ (១ពិន្ទុ)

.....................................................................................................................

.....................................................................................................................

៤. ចូររកសទិសសព្ទនឹងពាក្យ “ ព្រៀប ”។ (១ពិន្ទុ)

.....................................................................................................................

.....................................................................................................................

.....................................................................................................................

៥. ចូរតែងល្បះតាមរូបភាពខាងក្រោម។ (៣ពិន្ទុ)


.....................................................................................................


.....................................................................................................


.....................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៥១ រឿងទឹកចិត្តប៉ូលិស

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

រៀងរាល់ថ្ងៃ តារា និងស្រីពេជ្រធ្វើដំណើរទៅសាលារៀនដោយថ្មើរជើង។ ពួកគេដើរលើចិញ្ចើមផ្លូវ និងប្រកាន់ស្ដាំជានិច្ច។ អ្នកទាំងពីរបានដើរឆ្លងកាត់មហាវិថីមួយទើបទៅដល់សាលារៀន។ គេតែងដើរឆ្លងកាត់តាមគំនូសពណ៌សដែលមានភ្លើងសញ្ញាចរាចរណ៍។ នៅពេលមានភ្លើងសញ្ញាពណ៌ក្រហម ពួកគេបានឈប់។

ល្ងាចមួយពួកគេទាំងពីរបានចេញពីសាលារៀនដើរទៅផ្ទះដូចសព្វមួយដង។ ពេលនោះ មានត្រីចក្រយាន ទោចក្រយានយន្ត រថយន្ត កំពុងបើកបរតាមដងវិថី។ ចៃដន្យរំពេចនោះភ្លើងស្តុបបានដាច់។ កុមារទាំងពីរមិនហ៊ានឆ្លងផ្លូវទេ ព្រោះឡានម៉ូតូបើកបរលឿនៗបន្តគ្នាច្រើនពេក។ កុមារទាំងពីរឈរទ្រឹងយ៉ាងយូរ ដោយទឹកមុខព្រួយបារម្ភ។

គ្រានោះ ប៉ូលិសចរាចរណ៍ក៏មកដល់ បានជួយដឹកដៃកុមារទាំងពីរឆ្លងផ្លូវ។ អ្នកទាំងពីរត្រេកអរណាស់ រួចសំពះអរគុណមន្ត្រីប៉ូលិសនោះ។ គាត់ញញឹម ហើយនិយាយថា៖ “ ក្មួយទាំងពីរធ្វើដូច្នេះត្រូវហើយ ថ្ងៃក្រោយបើមានរឿងបែបនេះទៀត ក្មួយត្រូវរកប៉ូលិស ឬមនុស្សធំឱ្យជួយទើបល្អ ”។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. តើតារា និងស្រីពេជ្រធ្វើដំណើរទៅសាលារៀនដោយមធ្យោបាយអ្វី? (១ពិន្ទុ)

☐ក. ជិះកង់ ☐ខ. ជិះម៉ូតូ

☐គ. ថ្មើរជើង ☐ឃ. ជិះឡាន

២. តើតារា និងស្រីពេជ្រចេញពីសាលារៀននៅពេលណា? (១ពិន្ទុ)

☐ក. ពេលរសៀល ☐ខ. ពេលយប់

☐គ. ពេលព្រឹក ☐ឃ. ពេលល្ងាច

៣. តើពេលធ្វើដំណើរលើដងផ្លូវ ពួកគេតែងប្រកាន់ខាងណា? (១ពិន្ទុ)

☐ ក. ឆ្វេង ☐ ខ. ស្តាំ

☐ គ. កណ្តាលទ្រូងផ្លូវ ☐ ឃ. ឆ្វេងផង ស្តាំផង

៤. តើពួកគេធ្វើដូចម្តេច នៅពេលឃើញភ្លើងសញ្ញាចរាចរណ៍ពណ៌ក្រហម? (១ពិន្ទុ)

☐ ក. ឈប់ ☐ ខ. បន្តដំណើរ

☐ គ. បន្ថយល្បឿន ☐ ឃ. បង្កើនល្បឿន

៥. ដើម្បីឆ្លងផ្លូវប្រកបដោយសុវត្ថិភាព តើពួកគេតែងតែធ្វើដូចម្តេច? (១ពិន្ទុ)

☐ ក.រត់ឆ្លងយ៉ាងលឿន ☐ ខ. ដើរកាន់ដៃគ្នា

☐ គ.ដើរលើគំនូសពណ៌សពេលមានភ្លើងសញ្ញា ☐ ឃ. ដើរយឺតៗ

៦. តើមូលហេតុអ្វី ដែលធ្វើឱ្យពួកគេមិនហ៊ានឆ្លងផ្លូវដូចសព្វមួយដង? (១ពិន្ទុ)

☐ ក. ភ្លើងស្តុបដាច់ ☐ ខ. ខ្លាចគេចាប់

☐ គ. មានគ្រោះថ្នាក់ចរាចរណ៍នៅខាងមុខ ☐ ឃ. ខ្លាចប៉ូលិសចរាចរណ៍ផាកពិន័យ

៧. តើនរណាជាអ្នកជួយពួកគេឆ្លងផ្លូវ? (១ពិន្ទុ)

☐ ក. ពូម្នាក់ ☐ ខ. អ្នករត់ម៉ូតូឌុប

☐ គ. លោកគ្រូពួកគេ ☐ ឃ. ប៉ូលិសចរាចរណ៍

៨. តើអ្នកទាំងពីរបានធ្វើដូចម្តេចដើម្បីជាការអរគុណដល់អ្នកដែលជួយពួកគេ? (១ពិន្ទុ)

☐ ក. ឱ្យលុយ ☐ ខ. លើកដៃសំពះអរគុណ

☐ គ. ញញឹមដាក់ ☐ ឃ. ចាកចេញទៅដោយមិននិយាយស្តី

៩. តើអត្ថបទនេះ ចង់អប់រំពីអ្វី? (១ពិន្ទុ)

☐ ក. អប់រំឱ្យមានសេចក្តីក្លាហាន ☐ ខ. អប់រំឱ្យដើរលើចិញ្ចើមផ្លូវ

☐ គ. អប់រំឱ្យចេះជួយគ្នាទៅវិញទៅមក ☐ ឃ. អប់រំឱ្យយល់ដឹងពីភ្លើងសញ្ញាចរាចរណ៍

១០. ប្រសិនបើប្អូនធ្វើដំណើរមកទីក្រុងហើយមិនស្គាល់ផ្លូវ ឬវង្វេងផ្លូវ តើប្អូនត្រូវធ្វើដូចម្តេច? (១ពិន្ទុ)

☐ ក. ព្យាយាមរកដោយខ្លួនឯង ☐ ខ. អង្គុយរង់ចាំគេមកជួយ

☐ គ. ទៅរកប៉ូលិសឱ្យជួយឬអ្នកដែលទុកចិត្ត ☐ ឃ. ទៅតាមមនុស្សដែលយើងមិនស្គាល់

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- ភ្លើងស្តុប ( )..........................................................................................................
..........................................................................................................
..........................................................................................................
- ចៃដន្យ ( )..........................................................................................................
- ឈរទ្រឹង ( )..........................................................................................................

២. ចូរស្រង់ពាក្យជា នាម គុណនាម កិរិយា ក្នុងអត្ថបទខាងលើឱ្យបានមួយមុខចំនួន៣។ (២ពិន្ទុ)

| នាម | គុណនាម | កិរិយា |
|---|---|---|
| ១. ............................ | ១. .......................... | ១. ........................... |
| ២. ............................ | ២. .......................... | ២. ........................... |
| ៣. ............................ | ៣. .......................... | ៣. ........................... |

៣. ចូរគូសពីក្រោមពាក្យដែលខុស រួចសរសេរឱ្យបានត្រឹមត្រូវឡើងវិញ (៣ពិន្ទុ)

គ្រានោះ <u>ប៉ូលីស</u>ចរាចរណ៍ក៏មកដលបានជួយដឹតដៃកុមាទាំងពីរឆ្លងផ្លូវ។ អ្នកទាំងពីរត្រេចអរណាស់ រួចសំពះអរគុណមន្ត្រីប៉ូលិសនោះ។ គាត់ញញែម ហើយនិយាយៈ “ ក្មួយទាំងពី ធ្វើដូច្នេះត្រូវហើយ ថៃក្រោយបើមានរឿងបែបនេះទៀត ក្មួយត្រូវរកប៉ូលិស ឬមនុសធំឱ្យជួយទើបល្អ ”។

| ពាក្យត្រូវ | |
|---|---|
| ប៉ូលិស | ............. |
| ............... | ............. |
| ............... | ............. |
| ............... | ............. |
| ............... | ............. |

៤. ចូរតែងល្បះតាមរូបភាពខាងក្រោម។ (២ពិន្ទុ)





................................................................ ................................................................

................................................................ ................................................................

................................................................ ................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៥២ ត្រីសព្ទ ឬសញ្ញាសក់ ក “ ៊ ” និងមេរៀនទី ៥៣ បុណ្យសមុទ្រ

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

ឆ្នេរអូរឈើទាលជាទឹកដីដ៏ស្រស់បំព្រង និងជាឋានសួគ៌ទេសចរណ៍ក្នុងខេត្តព្រះសីហនុ នៃព្រះរាជាណាចក្រកម្ពុជា។ ឆ្នេរនេះស្ថិតនៅភាគនិរតីនៃប្រទេស ជាកន្លែងដ៏ល្អប្រណីតសម្រាប់រៀបចំពិធីបុណ្យសមុទ្រលើកដំបូងនៅក្នុងប្រទេសកម្ពុជា។

ព្រះរាជាណាចក្រកម្ពុជា មានកិត្តិយសបានចូលជាសមាជិកក្លឹបនៃប្រទេសដែលមានឆ្នេរសមុទ្រស្អាតជាងគេលើសកលលោក។ ការប្រារព្ធបុណ្យសមុទ្រនេះធ្វើឡើងនៅថ្ងៃទី៣១ ខែធ្នូ ឆ្នាំ២០១១ ដោយមានភ្ញៀវជាតិ អន្តរជាតិចូលរួមប្រមាណជិតដប់ម៉ឺននាក់។ បុណ្យនេះផ្តោតទៅលើអត្ថន័យសំខាន់បួនគឺ ការផ្សព្វផ្សាយតំបន់ទេសចរណ៍ លើកកម្ពស់ឧស្សាហកម្មទេសចរណ៍ អប់រំ និងថែរក្សាឆ្នេរឱ្យមានសម្រស់ស្រស់ស្អាត។ នៅក្នុងពិធីបុណ្យនេះមានការប្រគំតន្ត្រី ការសម្តែងក្បាច់គុណបុរាណខ្មែរ ការតាំងលក់ផលិតផល និងការដុតកាំជ្រួច។ កម្មវិធីនេះ ឆ្លងរហូតដល់ថ្ងៃទី០១ ខែមករា ឆ្នាំ២០១២ ទើបចប់កម្មវិធី។

គូសសញ្ញា √ ក្នុងប្រអប់☐ ចម្លើយមួយដែលត្រឹមត្រូវ

១. តើឆ្នេរអូរឈើទាលស្ថិតនៅក្នុងខេត្តណា? (១ពិន្ទុ)

☐ក. កំពង់ស្ពឺ ☐ខ. តាកែវ

☐គ. កំពត ☐ឃ. ព្រះសីហនុ

២. តើគេរៀបចំពិធីបុណ្យសមុទ្រក្នុងប្រទេសកម្ពុជាដំបូងគេបង្អស់នៅឯណា? (១ពិន្ទុ)

☐ក. ឆ្នេររាម ☐ខ. ឆ្នេរឯករាជ្យ

☐គ. ឆ្នេរអូរឈើទាល ☐ឃ. ឆ្នេរអូរត្រេស

៣. តើគេប្រារព្ធបុណ្យសមុទ្រនេះនៅថ្ងៃ ខែ ឆ្នាំណា? (១ពិន្ទុ)

☐ក. ៣១ ធ្នូ ២០១១ ☐ខ. ៣១ វិច្ឆិកា ២០១១

☐គ. ៣១ ធ្នូ ២០១២ ☐ឃ. ៣០ មករា ២០១២

៤. តើកម្មវិធីបុណ្យនេះមានរយៈពេលប៉ុន្មានថ្ងៃ? (១ពិន្ទុ)

☐ក. រយៈពេល២ថ្ងៃ ☐ខ. រយៈពេល១ថ្ងៃ

☐គ. រយៈពេល៤ថ្ងៃ ☐ឃ. រយៈពេល៣ថ្ងៃ

៥. តើមានភ្ញៀវជាតិ អន្តរជាតិចូលរួមប៉ុន្មាននាក់? (១ពិន្ទុ)

☐ក. ប្រមាណជិតប្រាំម៉ឺននាក់ ☐ខ. ប្រមាណជិតមួយម៉ឺននាក់

☐គ. ប្រមាណជិតប្រាំមួយម៉ឺននាក់ ☐ឃ. ប្រមាណជិតដប់ម៉ឺននាក់

៦. តើបុណ្យនេះផ្តោតទៅលើអត្ថន័យសំខាន់ៗប៉ុន្មានយ៉ាង? (១ពិន្ទុ)

☐ក.អត្ថន័យសំខាន់បី ☐ខ. អត្ថន័យសំខាន់បួន

☐គ.អត្ថន័យសំខាន់ប្រាំ ☐ឃ. អត្ថន័យសំខាន់ប្រាំមួយ

៧. ចូរគូសរង្វង់ជុំវិញពាក្យដែលមានប្រើត្រីសព្ទ “ ៊ ” ក្នុងប្រអប់ខាងក្រោមឱ្យបានត្រឹមត្រូវ។ (៤ពិន្ទុ)

| |
|---|
| ចាប៉ី ស៊ី នំប៉័ង ហ៊ាន ប៊ិន សាប៊ូ ញ៉ាំ កៅស៊ូ ទាហាន អ៊្វ អុំ ប៊ីចេង ប៊ើង អ៊ំ ង៉ិកង៉ក់ ភាស៊ី ទូអ៊ូ គំរូ អ៊ូអរ ឧស្សាហ៍ ហ៊ឹង ម៉ាំ ហ៊ុន ស៊ុត អាស៊ីត |

**សំណេរ** ( ១០ ពិន្ទុ )

១. តើសញ្ញាត្រីសព្ទ ឬសក់ក “ ៊ ” គេប្រើសម្រាប់ធ្វើអ្វី? (២ពិន្ទុ)

.......................................................................................................................

.......................................................................................................................

.......................................................................................................................

២. តើសញ្ញាត្រីសព្ទ ឬសក់ក “ ៊ ” ប្តូរជាបុកជើង “ ុ ” វិញ នៅពេលប្រើជាមួយស្រៈអ្វីខ្លះ? (៣ពិន្ទុ)

.......................................................................................................................

.......................................................................................................................

.......................................................................................................................

.......................................................................................................................

៣. ដោយអនុវត្តតាមគម្រោងតែងខាងក្រោម ចូរសរសេរតែងសេចក្តីពណ៌នាអំពីមិត្តភក្តិរបស់ប្អូនម្នាក់ដែលប្អូនបានស្គាល់ (៥ពិន្ទុ)

គម្រោង

ក. សេចក្តីផ្តើម

បង្ហាញពីមនុស្សនោះដោយប្រាប់៖ ឈ្មោះ ភេទ អាយុ ទីលំនៅសព្វថ្ងៃ។

ខ. តួសេចក្ដី

- រូបរាង៖ មាឌ (តូច ធំ ស្គម ធាត់...) កម្ពស់ (ទាប ខ្ពស់...) សម្បុរ (ស ខ្មៅ ស្រអែម...) មុខមាត់ ត្រចៀក សក់ ទឹកមុខ...) ជើង ដៃ (មាំមួន សមនឹងដងខ្លួន វែងខ្លី...)។
- អាកប្បកិរិយា៖ សកម្មភាពផ្សេងៗដូចជា ការស្លៀកពាក់ ការនិយាយស្ដី ការធ្វើការងារផ្សេងៗ។
- ចិត្តគំនិត
  - ចំណុចល្អ៖

    + ឧស្សាហ៍ព្យាយាម យកចិត្តទុកដាក់ធ្វើកិច្ចការផ្ទះ និងការរៀនសូត្រ...

    + មានសណ្ដាប់ធ្នាប់ ផ្ចិតផ្ចង់...

    + ឆ្លាតវាងវៃ ឆាប់យល់ ចេះចាំ...

    + ក្លាហាន ហ៊ានទទួលខុសត្រូវ...

    + ចិត្តទូលាយ ជួយទុក្ខធុរៈអ្នកដទៃ សាច់ញាតិជិតខាង...។
  - ចំណុចមិនល្អ ៖ ឡេះឡោះ និយាយច្រើន ឆាប់ខឹង...។

គ. សេចក្ដីបញ្ចប់

- វាយតម្លៃ ៖ ជាមនុស្សល្អ ចេះជួយគ្នាក្នុងគ្រាក្រ មានចំណេះដឹង...។
- ចំណាប់អារម្មណ៍ ៖ បង្ហាញមនោសញ្ចេតនាចំពោះមនុស្សនោះ ដូចជា អាណិត ស្រឡាញ់ ចូលចិត្ត គោរពរាប់អាន ឬក៏យកតម្រាប់តាម... ។

សេចក្ដីអធិប្បាយ

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................

..............................................................................................................................................



# កិច្ចការផ្ទះ
## ភាសាខ្មែរ ថ្នាក់ទី៣
មេរៀនទី៥៤ រឿងភាពស្មោះត្រង់

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................

| |
|---|
| |
| ២០ |

**អំណាន** (១០ ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

នៅក្រុងឡុងដ៏ ប្រទេសអង់គ្លេសសម័យមុន មានសួនចិញ្ចឹមសត្វមួយ។ បើនរណាចង់ចូលទស្សនាត្រូវទិញសំបុត្រ ឬគ្មានប្រាក់ទិញអាចយកឆ្កែ ឆ្មាជាចំណីសម្រាប់សត្វធំៗជំនួសវិញ។

ថ្ងៃមួយ មានបុរសកម្សត់ម្នាក់ចង់ចូលមើលសត្វ តែគ្មានប្រាក់ទិញសំបុត្រក៏ចាប់ឆ្កែតឿតាមផ្លូវប្ដូរថ្លៃសំបុត្រចូលក្នុងសួនសត្វ។ ឆ្មាំទ្វារបានឱ្យគាត់ចូល រួចយកឆ្កែនោះបោះចូលទៅក្នុងទ្រុងសិង្ហ។ ឆ្កែឃើញសិង្ហទម្លាក់កន្ទុយ វាក៏ដើរទៅកៀនទ្រុងសិង្ហ។ សិង្ហដើរហិតឆ្កែយ៉ាងយូរ ឯឆ្កែក៏ផ្ដួលខ្លួន រួចផ្ងារលើកជើងបួនឡើងលើ និងបក់កន្ទុយ។ សិង្ហលើកជើងស្ទាបខ្លួនឆ្កែបង្វេរចុះឡើង រួចទាញឱ្យក្រោក។ សិង្ហ និងឆ្កែតឿ លោតហក់លេងសម្ដែងភាពស្និទ្ធស្នាលបំផុត។ ថ្ងៃមួយ ឆ្មាំបានបោះសាច់ឱ្យវាស៊ី វាហែកចែកឱ្យឆ្កែស៊ីដែរ។ សត្វទាំងពីររស់នៅជាមួយគ្នាយ៉ាងសុខស្រួលអស់រយៈពេលជិតមួយឆ្នាំ។ ក្រោយមក ឆ្កែមានជំងឺរហូតដល់ងាប់។ សិង្ហស្រែករោទ៍ហក់លោតក្នុងទ្រុងចុះឡើង រហូតអស់កម្លាំងហើយមិនព្រមឱ្យឆ្មាំយកសពឆ្កែចេញពីទ្រុងសោះ។ ក្រោយមក ឆ្មាំទ្វារក៏យកឆ្កែតឿមួយទៀតបោះចូលក្នុងទ្រុង សិង្ហហក់ខាំឆ្កែថ្មីរហូតងាប់។

សិង្ហកើតទុក្ខមិនស៊ីចំណីប្រាំថ្ងៃ ដល់ថ្ងៃទីប្រាំមួយ វាក៏ងាប់បាត់ទៅ។

គូសសញ្ញា √ ក្នុងប្រអប់☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. បើចង់ចូលមើលសួនសត្វក្រៅពីទិញសំបុត្រ តើគេត្រូវធ្វើដូចម្ដេច? (១ពិន្ទុ)

☐ក. យកឆ្កែ ឆ្មា ទៅប្ដូរ ☐ខ. រង់ចាំដល់ថ្ងៃបុណ្យ

☐គ. លួចចូល ☐ឃ. សុំគេចូល

២. តើបុរសកម្សត់យកអ្វីទៅប្ដូរថ្លៃសំបុត្រចូលមើលក្នុងសួនសត្វ?(១ពិន្ទុ)

☐ក. ឆ្មា ☐ខ. ឆ្កែតឿ

☐គ. មាន់ ☐ឃ. ជ្រូក

៣. តើឆ្នាំទ្វារយកសត្វនោះទៅណា? (១ពិន្ទុ)

☐ក. ចិញ្ចឹម ☐ខ. លក់ឱ្យគេ

☐គ. បោះចូលក្នុងទ្រុងសិង្ហ ☐ ឃ. ធ្វើម្ហូប

៤. តើនរណាបោះសត្វឱ្យសិង្ហស៊ីជាអាហារ? (១ពិន្ទុ)

☐ក. អ្នកចូលទស្សនា ☐ខ. ម្ចាស់សួនសត្វ

☐គ. ឆ្មាំសួន ☐ឃ. អ្នកលក់សត្វ

៥. ហេតុអ្វីបានជាសិង្ហមិនស៊ីឆ្កែតឿ? (១ពិន្ទុ)

☐ក. ខាំមិនឈ្នះឆ្កែតឿ ☐ខ. ឆ្កែតឿចេះសម្តែងអាការៈជាមិត្ត

☐គ. មិនទាន់ឃ្លាន ☐ឃ. ឆ្កែតឿគួរឱ្យខ្ពើមរអើមពេក

៦. តើសិង្ហជាសត្វដូចម្តេច? (១ពិន្ទុ)

☐ក. កាចសាហាវ ☐ខ. អាងអំណាច

☐គ. រើសអើង មិនស្មោះត្រង់ ☐ឃ. យោគយល់ ស្មោះត្រង់

៧. ហេតុអ្វីបានជាឆ្កែតឿជាមិត្តរបស់សិង្ហងាប់? (១ពិន្ទុ)

☐ក. សិង្ហខាំសម្លាប់ ☐ខ. ម្ចាស់សួនសម្លាប់

☐គ. ឆ្មាំសួនសម្លាប់ ☐ឃ. មានជំងឺ

៨. ហេតុអ្វីបានជាសិង្ហស្រែករោទ៍ និងហក់លោតក្នុងទ្រុងចុះឡើង? (១ពិន្ទុ)

☐ក. ចង់ចេញមកក្រៅ ☐ខ. ឃ្លាន

☐គ. ជាទម្លាប់ ☐ឃ. សោកស្តាយព្រោះឆ្កែជាមិត្តងាប់

៩. ហេតុអ្វីបានជាសិង្ហងាប់? (១ពិន្ទុ)

☐ក. ម្ចាស់សួនសម្លាប់ ☐ខ. ឆ្មាំសួនសម្លាប់

☐គ. អត់មានចំណីស៊ី ☐ឃ. កើតទុក្ខ មិនស៊ីចំណី

១០. តើរឿងសិង្ហ និងឆ្កែតឿអប់រំយើងដូចម្តេច? (១ពិន្ទុ)

☐ក. ចេះស្មោះត្រង់នឹងគ្នា ដោយមិនរើសអើង ☐ខ. ចេះស្រឡាញ់រាប់អានគ្នា

☐គ. ចេះស្រឡាញ់ស្មោះត្រង់ និងយោគយល់ ☐ឃ.មានអធ្យាស្រ័យល្អចំពោះគ្នា

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- ឆ្មាំ ( )..........................................................................................................
- ស្មោះសរ ( )..........................................................................................................
- ជំងឺ ( )..........................................................................................................

២. ចូររកវេវចនសព្ទនឹងពាក្យ “ សិង្ហ ”។ (១ពិន្ទុ)

- ..........................................................................................................
- ..........................................................................................................

៣. ចូររៀបពាក្យ ឬកន្សោមពាក្យខាងក្រោមឱ្យទៅជាល្បះត្រឹមត្រូវ (២ពិន្ទុ)

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| ងាប់។ | ស៊ី | រហូត | ចំណី | កើត | ទុក្ខ | មិន | សិង្ហ | ដល់ |

.សិង្ហ.................................................................................................................

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| លោត | ឆ្កែតឿ | ស្និទ្ធស្នាល។ | សម្ដែង | ហាក់ | សិង្ហ | លេង | ភាព | និង |

សិង្ហ.................................................................................................................

៤. ចូរតែងល្បះតាមរូបភាពខាងក្រោម (២ពិន្ទុ)





.................................................................. ..................................................................

.................................................................. ..................................................................

៥. ចូរប្អូនកែតម្រូវពាក្យខុសដែលមានគូសបន្ទាត់ពីក្រោមឱ្យបានត្រឹមត្រូវឡើងវិញ។ (២ពិន្ទុ)

ថ្ងៃមួយ មានបុរសកំសត់ម្នាក់ចង់ចូលមើលសត្វ តែគ្មានប្រាក់ទេញសំបុត្រក៏ចាប់ឆ្កែទៀតាមផ្លូវប្ដូរថ្លៃសំបុត្រចូលក្នុងសួនសាត់។ ឆ្មាំទ្វារបានឱ្យគាត់ចូល រួចយកឆ្កែនោះបស់ចូលទៅក្នុងទ្រង់សិង្ហ។ ឆ្កែឃើញសិង្ហទម្លាក់កន្ទុយ វាក៏ដើរទៅកៀនទ្រុងសិង្ហ។ សិង្ហដើរហឹតឆ្កែយ៉ាងយូរ ឯឆ្កែក៏ផ្ទួលខ្លួន រួចផ្ងារលើកជើងបួនឡើងលើ និងបកកន្ទុយ។ សឹង្ហលើកជើងស្ទាប់ខ្លួនឆ្កែបង្វែរចុះឡើង រួចទាញឱ្យក្រោក។

កំណែពាក្យត្រូវ

កម្សត់ .................. .................. .................. ..................

.................. .................. .................. .................. ..................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៥៥ បកស្រាយរូបភាព " ការសម្អាតបរិស្ថាន "

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរអានអត្ថបទសន្ទនាខាងក្រោម រួចឆ្លើយនឹងសំណួរ។

ថ្ងៃមួយ ដារ៉ា បានកាន់រូបភាពមួយសន្លឹក ដើរមកជិតសុភាព។

សុភាព : ដារ៉ា ! តើឯងបានរូបភាពអ្វី ខ្ញុំសុំមើលផងបានទេ?

ដារ៉ា : នេះជារូបភាពដែលទាក់ទងនឹង " ការសម្អាតបរិស្ថាន " នៅទីសាធារណៈ។

សុភាព : អូ ! រូបភាពនេះល្អប្រសើរណាស់។

ដារ៉ា : សុភាព ! តើឯងអាចបកស្រាយរូបភាពនេះបានឬទេ?

សុភាព : ពិតជាបាន ! រូបភាពនេះ មានយុវជនចំនួនប្រាំនាក់កំពុងនាំគ្នាឱនរើសសំរាមដាក់ថង់។

ដារ៉ា : ត្រឹមត្រូវណាស់ ! ពួកគេកំពុងសម្អាតបរិស្ថាននៅតាមដងផ្លូវមួយ។

សុភាព : ល្អណាស់ ! រូបភាពនេះ បានផ្ដល់គំនិតសំខាន់ដល់យើងឱ្យចេះសម្អាតបរិស្ថានភូមិ ឃុំ ឱ្យមានសោភណភាព និងផ្ដល់សុខភាពដល់ប្រជាជនយើង។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. តើរឿងនេះមានតួអង្គប៉ុន្មាននាក់? (១ពិន្ទុ)

☐ក. ពីរនាក់ ☐ខ. ប្រាំនាក់

☐គ. ប្រាំពីរនាក់ ☐ឃ. ដប់នាក់

២. តើដារ៉ាកាន់រូបភាពអ្វីនៅនឹងដៃ? (១ពិន្ទុ)

☐ក. ការកសាងអគារ ☐ខ. បម្រាមការជក់បារី

☐គ. ការសម្អាតបរិស្ថាន ☐ឃ. បម្រាមការប៉ះពាល់បក្សីងាប់

៣. តើសុភាព និងដារ៉ា កំពុងធ្វើអ្វី? (១ពិន្ទុ)

☐ក. ឈ្លោះប្រកែកគ្នា ☐ខ. សន្ទនាគ្នា

☐គ. លេងល្បែងកម្សាន្ត ☐ឃ. សម្អាតបរិស្ថាន

៤. តើអ្នកទាំងពីរនិយាយគ្នាពីរឿងអ្វី? (១ពិន្ទុ)

- ក. ដំណើរកម្សាន្ត
- ខ. ថ្ងៃវិស្សមកាល
- គ. ពិធីបុណ្យសមុទ្រ
- ឃ. រូបភាពមួយនៃការសម្អាតបរិស្ថាន

៥. តើសុភាពយល់ឃើញដូចម្ដេចចំពោះរូបភាពរបស់ដារ៉ា? (១ពិន្ទុ)

- ក. មានប្រយោជន៍ ឱ្យចេះសម្អាតបរិស្ថាន
- ខ. មិនមានប្រយោជន៍
- គ. គ្មានអ្វីគួរឱ្យចាប់អារម្មណ៍នោះទេ
- ឃ. ស្អាតណាស់

៦. ហេតុអ្វីបានជាយើងត្រូវសម្អាតបរិស្ថាន? (១ពិន្ទុ)

- ក. មានសោភណភាព និងសុខភាពល្អ
- ខ. កុំឱ្យមានសំរាមនៅមុខផ្ទះ
- គ. កុំឱ្យមានក្លិនស្អុយ
- ឃ. មានភាពស្រស់ស្អាត

៧. ដើម្បីឱ្យបរិស្ថានស្អាត តើវាជាភារកិច្ច ឬតួនាទីរបស់អ្នកណា? (១ពិន្ទុ)

- ក. រាជរដ្ឋាភិបាល
- ខ. ក្រសួងបរិស្ថាន
- គ. យើងទាំងអស់គ្នា
- ឃ. ក្រុមហ៊ុនដឹកសំរាម

៨. ចូររកបដិសព្ទនឹងពាក្យ “ សាធារណៈ ”។ (១ពិន្ទុ)

- ក. សាធារណជន
- ខ. ឥតប្រយោជន៍
- គ. អសន្តិសុខ
- ឃ. អសាធារណៈ

៩. ចូររកវេវចនសព្ទនឹងពាក្យ “ ប្រជាជន ”។ (១ពិន្ទុ)

- ក. ប្រជាភិបាល
- ខ. ប្រជាករ
- គ. ប្រជាភិថុតិ
- ឃ. ប្រជាធិបតេយ្យ

១០. តើពាក្យខាងក្រោមមួយណា ត្រូវនឹងអត្ថន័យនេះ “ភាពប្រសើរក្រៃលែង”។ (១ពិន្ទុ)

- ក. ទេសភាព
- ខ. ទិដ្ឋភាព
- គ. វឌ្ឍនភាព
- ឃ. សោភណភាព

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យខាងក្រោម (៣ពិន្ទុ)

- សម្អាត ( )..........................................................................................................
- សុខភាព ( )........................................................................................................
- សន្ទនា ( )..........................................................................................................

២. ចូររៀបពាក្យខាងក្រោមឱ្យទៅជាល្បះត្រឹមត្រូវ។ (២ពិន្ទុ)

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| ល្អ។ | បរិស្ថាន | ល្អ | អនាម័យ | ស្អាត | នាំ | សុខភាព | នូវ | មក |

..........................................................................................................................

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| គ្នា។ | ផ្ដើម | យើង | ពី | អស់ | ស្អាត | បរិស្ថាន | ទាំង | ចេញ |

..............................................................................................................................

៣. ចូរតែងល្បះតាមរូបភាពខាងក្រោម។ (២ពិន្ទុ)




..............................................................................................................................

៤. ចូរសង្កេតរូបភាពខាងក្រោម រួចតែងអត្ថបទសន្ទនាតាមគំរូអត្ថបទខាងលើ។ (៣ពិន្ទុ)



..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................

..............................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៥៦ កន្លែងទេសចរណ៍ក្នុងប្រទេសកម្ពុជា និងមេរៀនទី៥៧ បន្តក់ " ់ "

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ។

កម្ពុជារដ្ឋ សម្បូរប្រាកដ កន្លែងទេសចរណ៍
បុរាណប្រាសាទ អង្គរបវរ ព្រះខ័នសែនល្អ
ទាំងបន្ទាយក្ដី។

បាពួននាគព័ន្ធ បាគងបាយ័ន ល្អបន្ទាយស្រី
បក្សីចាំក្រុង មេបុណ្យប្រែពៃ ព្រះបណ្ណាល័យ
បារាយណ៍ស្រះស្រង់។

ជ្រោះសែនមនោរម្យ ប៊ូស្រាអូរជុំ យក្សឡោមផូរផង់
សមុទ្រឈើខ្ពស់ កោះកេរត្រចង់ ព្រះវិហារសង់
តាំងពីដូនតា។

រីឆ្នេរសមុទ្រ លាតសន្ធឹងផុត ពីខ្សែនេត្រា
ជាសម្បត្តិខ្មែរ ប្រជាខេមរា យើងត្រូវរក្សា
ឱ្យបានគង់វង្ស។

គូសសញ្ញា √ ក្នុងប្រអប់☐ ចម្លើយមួយដែលត្រឹមត្រូវ

១. តើអត្ថបទមេសូត្រខាងលើនិយាយអំពីអ្វី? (១ពិន្ទុ)

☐ក. រមណីយដ្ឋានទឹកធ្លាក់ ☐ខ. ប្រាសាទបុរាណខ្មែរ

☐គ. ទឹកជ្រោះ ☐ឃ. កន្លែងទេសចរណ៍

២. តើមេសូត្រខាងលើមានប៉ុន្មានវគ្គ? (១ពិន្ទុ)

☐ក. មួយវគ្គ ☐ខ. ពីរវគ្គ

☐គ. បីវគ្គ ☐ឃ. បួនវគ្គ

៣. តើវគ្គទីមួយ និងទីពីរ នៃមេសូត្ររៀបរាប់អំពីអ្វី? (១ពិន្ទុ)

☐ក. ទឹកជ្រោះ ☐ខ. ឆ្នេរសមុទ្រ

☐គ. ប្រាសាទបុរាណ ☐ឃ. ព្រៃភ្នំ

៤. តើវគ្គទីបីនៃមេសូត្ររៀបរាប់អំពីអ្វី? (១ពិន្ទុ)

☐ក. ទឹកជ្រោះ បឹង ព្រៃឈើ ប្រាសាទ ☐ខ. ឆ្នេរសមុទ្រដ៏ស្រស់ស្អាត

☐គ. ភ្ញៀវទេសចរណ៍មកកម្សាន្ត ☐ឃ. ការថែរក្សាបរិស្ថាន

៥. តើវគ្គទីបួននៃមេសូត្ររៀបរាប់អំពីអ្វី? (១ពិន្ទុ)

☐ក. ការការពារសម្បត្តិធម្មជាតិ ☐ខ. ការថែរក្សាប្រាសាទបុរាណ

☐គ. ការថែរក្សាព្រៃឈើ ☐ឃ. ឆ្នេរសមុទ្រ និងការចូលរួមថែរក្សា

៦. តើមេសូត្របទកាកគតិខាងលើ ក្នុងមួយវគ្គមានប៉ុន្មានឃ្លា? (១ពិន្ទុ)

☐ក. មានបួនឃ្លា ☐ខ. មានបីឃ្លា

☐គ. មានប្រាំមួយឃ្លា ☐ឃ. មានប្រាំពីរឃ្លា

៧. តើឃ្លានីមួយៗ មានប៉ុន្មានព្យាង្គ? (១ពិន្ទុ)

☐ក. មានបួនព្យាង្គ ☐ខ. មានប្រាំពីរ

☐គ. មានប្រាំព្យាង្គ ☐ឃ. ប្រាំមួយព្យាង្គ

៨. តើពាក្យ “ ប្រាកដ ” ក្នុងវគ្គទីមួយចួននឹងពាក្យអ្វី? (១ពិន្ទុ)

☐ក. ទេសចរណ៍ ☐ខ. ប្រាសាទ

☐គ. បវរ ☐ឃ. រដ្ឋ

៩. ចូររកវេវចនសព្ទនឹងពាក្យ “ ខេមរា ”។ (១ពិន្ទុ)

☐ក. ប្រាសាទបុរាណ ☐ខ. ប្រទេសខ្មែរ

☐គ. យុវជន ☐ឃ. ជនជាតិខ្មែរ

១០. តើពាក្យ “ ប្រពៃ ” មានន័យដូចម្តេច? (១ពិន្ទុ)

☐ក. ល្អ ល្អហ្មត់ហ្មង ☐ខ. ខ្ពង់ខ្ពស់

☐គ. កេរ្តិ៍ឈ្មោះ ☐ឃ. ទូលំទូលាយ

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យខាងក្រោម។ (២ពិន្ទុ)

- មនោរម្យ ( )......................................................................................................
- សមុទ្រ ( )........................................................................................................

......................................................................................................

២. តើសញ្ញាបន្តក់(៉) ប្រើសម្រាប់ធ្វើអ្វី? (២ពិន្ទុ)

......................................................................................................

......................................................................................................

៣. ចូរស្រង់ពាក្យដែលមានបន្តក់ (់) ពីក្នុងអត្ថបទមេសូត្រខាងលើ។ (២ពិន្ទុ)

.................................................................................................................................

.................................................................................................................................

៤. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញក្នុងអត្ថបទមេសូត្រខាងក្រោមឱ្យបានត្រឹមត្រូវ។ (២ពិន្ទុ)

| | | | | | |
|---|---|---|---|---|---|
| បទ | កម្លាំង | មួន | ឆៅ | ប្រាប់ | តម្រិះ |

| | | |
|---|---|---|
| បើចង់ស្រាលខ្លួន | រៀនសូត្រឱ្យ....... | ឱ្យមាំឱ្យស្ទាត់ |
| កុំចេះស្ទាក់ស្ទើរ | ល្ងីល្ងើឥត.......... ប្រាក់រត់តាមហៅ។ | បើចេះប្រាកដ |
| កុំថ្នម........... | កាប់ជីកចូកចាំង | កុំថារងាក្តៅ |
| រៀនអ្វីឱ្យឆ្អិន | កុំឱ្យខ្លោច......... ក្រក្រៅសណ្តាប់។ | កុំដេកតែខ្ចៅ |
| បើល្ងង់ឱ្យចេះ | រករៀន.......... | រិះរកតម្រាប់ |
| ឥន្ទ្រិយឆ្វេងស្តាំ | កុំចាំគេ......... រៀនមើលឱ្យស្ទែង។ | រៀនស្តីរៀនស្តាប់ |

៥. ចូរតែងល្បះតាមរូបភាពខាងក្រោមឱ្យបានពីរល្បះ។ (២ពិន្ទុ)



.................................................................................................................................

.................................................................................................................................

.................................................................................................................................

.................................................................................................................................

.................................................................................................................................

.................................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៥៨ ធនធានធម្មជាតិ

សាលាបឋមសិក្សា.................................

ឈ្មោះសិស្ស........................................




**អំណាន** ( ១០ ពិន្ទុ )

ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ។

| | | |
|---|---|---|
| មាតុភូមិកម្ពុជា | ធនធាននានា | គ្រប់ទីកន្លែង |
| សមុទ្រព្រៃភ្នំ | ទន្លេធំវែង | គួរឱ្យស្ញប់ស្ញែង |
| | គ្រប់ប្រជាជាតិ។ | |
| តំបន់ព្រៃភ្នំ | រ៉ៃឈើតូចធំ | ជំរំសត្វទៀត |
| ម្រឹគីម្រឹគា | បក្សាព្រោងព្រាត | រស់តាមក្រុមញាតិ |
| | អឺងកងពេញព្រៃ។ | |
| តំបន់ខ្ពង់រាប | ស្ទឹងបឹងទំនាប | ដំណាំច្រើនក្រៃ |
| ស្រែស្រូវចម្ការ | ផលាប្រពៃ | ដោយសារអ្នកថ្លៃ |
| | ជាតិបានថ្កើងថ្កាន។ | |

គូសសញ្ញា √ ក្នុងប្រអប់☐ ចម្លើយមួយដែលត្រឹមត្រូវ

១. តើអត្ថបទមេសូត្រខាងលើនិយាយអំពីអ្វី? (១ពិន្ទុ)

☐ក. ធនធានធម្មជាតិ ☐ខ. របរកសិកម្ម

☐គ. ការបរបាញ់ ☐ឃ. របរនេសាទ

២. តើប្រទេសកម្ពុជា មានធនធានធម្មជាតិនៅកន្លែងណាខ្លះ? (១ពិន្ទុ)

☐ក. លើដី ☐ខ. ក្នុងទឹក

☐គ. ក្រោមដី ☐ឃ. គ្រប់ទីកន្លែង

៣. តើនៅវគ្គទីពីរនៃមេសូត្រនិយាយអំពីអ្វី? (១ពិន្ទុ)

☐ក. បឹងបួ ទន្លេ សមុទ្រ ☐ខ. ព្រៃឈើ និងសត្វព្រៃគ្រប់ប្រភេទ

☐គ. ការដាំដុះគ្រប់ប្រភេទ ☐ឃ. ការថែរក្សាធនធានធម្មជាតិ

៤. តើវគ្គទីបីនៃមេសូត្រនិយាយអំពីអ្វី? (១ពិន្ទុ)

☐ក. រ៉ែត្បូង ☐ខ. សត្វព្រៃ

☐គ. ដំណាំដាំដុះផ្សេងៗ ☐ឃ. ព្រៃឈើ

៥. ហេតុអ្វីបានជាយើងត្រូវថែរក្សាព្រៃឈើ? (១ពិន្ទុ)

☐ក. ដើម្បីទុកធ្វើផ្ទះ ☐ខ. ជាទីជម្រកពេលក្ដៅ

☐គ.ជាទីជម្រកសត្វព្រៃ និងរបាំងការពារគ្រោះធម្មជាតិ ☐ឃ. ដើម្បីទាក់ទាញភ្ញៀវទេសចរណ៍

៦. តើមេសូត្របទកាកគតិខាងលើ ក្នុងមួយវគ្គមានប៉ុន្មានឃ្លា? (១ពិន្ទុ)

☐ក. មានបួនឃ្លា ☐ខ. មានបីឃ្លា

☐គ. មានប្រាំមួយឃ្លា ☐ឃ. មានប្រាំពីរឃ្លា

៧. តើមេសូត្រខាងលើ ក្នុងមួយឃ្លាមានប៉ុន្មានព្យាង្គ? (១ពិន្ទុ)

☐ក. មានបួនព្យាង្គ ☐ខ. មានប្រាំពីរព្យាង្គ

☐គ. មានប្រាំព្យាង្គ ☐ឃ. មានប្រាំមួយព្យាង្គ

៨. តើពាក្យ “ កម្ពុជា ” ក្នុងឃ្លាទីមួយ វគ្គទីមួយ ចួននឹងពាក្យអ្វី? (១ពិន្ទុ)

☐ក. វែង ☐ខ. នានា

☐គ. ស្វែង ☐ឃ. ភ្នំ

៩. ចូររកវេវចនសព្ទនឹងពាក្យ “ ម្រឹគីម្រឹគា ”។ (១ពិន្ទុ)

☐ក. អ្នកបរបាញ់សត្វ ☐ខ. អ្នកថែរក្សាព្រៃភ្នំ

☐គ. ព្រៃព្រឹក្សា ☐ឃ. សត្វចតុប្បាទព្រៃញីឈ្មោល

១០. ចូររកបដិសព្ទនឹងពាក្យ “ ថ្កើងថ្កាន ”។ (១ពិន្ទុ)

☐ក. រីកចម្រើន ☐ខ. ខ្ពង់ខ្ពស់

☐គ. ស្ងប់ស្ងែង ☐ឃ. ដុនដាប

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- ធនធាន ( )........................................................................................
- ធម្មជាតិ ( )........................................................................................
- ស្ងប់ស្ងែង ( )........................................................................................

២. ចូរតែងល្បះតាមរូបភាពខាងក្រោមឱ្យបានពីរល្បះ (២ពិន្ទុ)



..........................................................................

..........................................................................

..........................................................................

..........................................................................

៣. ចូរសរសេរតែងសេចក្ដីពណ៌នាអំពីផ្ទះរបស់ប្អូន  តាមគម្រោងតែងខាងក្រោម។ (៥ពិន្ទុ)

### គម្រោងតែង

ក. សេចក្ដីផ្ដើម

ពេលវេលាសាងសង់  ទីកន្លែង  ប្រភេទផ្ទះ។

ខ. តួសេចក្ដី

- ទិដ្ឋភាពរួម (ជាកន្លែងប្រមូលផ្ដុំ...)
- ទិដ្ឋភាពខាងក្នុង (រៀបរាប់ពីអ្វីដែលមើលឃើញនៅក្នុងផ្ទះ...)

គ. សេចក្ដីបញ្ចប់

បង្ហាញពីចំណាប់អារម្មណ៍របស់ប្អូនចំពោះផ្ទះនោះ។

### សេចក្ដីអធិប្បាយ

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................

..........................................................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៥៩ បំណងខ្ញុំ

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ។

| | |
|---|---|
| ខ្ញុំនឹកមមៃចង់បានផ្ទះ | មួយតូចស្រឡះក្បែរជើងភ្នំ |
| សង់ប្រហមាត់ស្ទឹងមានឈើធំ | បែកមែកត្រសុំម្លប់សាខា។ |
| នៅជុំជិតផ្ទះខ្ញុំនឹងដាំ | អស់ទាំងដំណាំធ្វើសួនច្បារ |
| ខ្ញុំព្រោះបណ្ដុះឈើផ្លែផ្កា | ទុកធ្វើអាហាររៀងរាល់ថ្ងៃ។ |
| រួចខ្ញុំចិញ្ចឹមឆ្កែសេះគោ | មាន់ទាមាន់ទោរយកកម្រៃ |
| ថែទាំឱ្យធាត់លក់យកថ្លៃ | បន្តកែខៃរៀងរាល់ឆ្នាំ។ |

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ

១. តើអត្ថបទមេសូត្រខាងលើនិយាយអំពីអ្វី? (១ពិន្ទុ)

☐ក. ការសាងសង់ផ្ទះ ☐ខ. បំណងប្រាថ្នា

☐គ. ការដាំបន្លែ ☐ឃ. ការចិញ្ចឹមសត្វ

២. តើនៅក្នុងអត្ថបទមេសូត្រខាងលើ គេនឹកមមៃចង់បានអ្វី? (១ពិន្ទុ)

☐ក. ដីដាំបន្លែ ☐ខ. សួនច្បារ

☐គ. កសិដ្ឋានចិញ្ចឹមសត្វ ☐ឃ. ផ្ទះក្បែរជើងភ្នំជិតមាត់ស្ទឹង

៣. តើវគ្គទីមួយ នៃអត្ថបទមេសូត្រនិយាយអំពីអ្វី? (១ពិន្ទុ)

☐ក. មុខរបរចិញ្ចឹមជីវិត ☐ខ. ចិញ្ចឹមសត្វដើម្បីលក់

☐គ. នឹកស្រមៃចង់បានផ្ទះមួយ ☐ឃ. ការដាំដំណាំ បន្លែផ្សេងៗ

៤. តើវគ្គទីពីរ នៃអត្ថបទមេសូត្រនិយាយអំពីអ្វី? (១ពិន្ទុ)

☐ក. ដាំបន្លែ និងដើមឈើហូបផ្លែ ☐ខ. រៀបចំផ្ទះសម្បែង

☐គ. កែខៃមុខរបរបន្ថែម ☐ឃ. ចិញ្ចឹមសត្វផ្សេងៗ

៥. តើវគ្គទីបី នៃអត្ថបទមេសូត្រនិយាយអំពីអ្វី? (១ពិន្ទុ)

- [ ] ក. ការការពារសម្បត្តិធម្មជាតិ
- [ ] ខ. ការដាំបន្លែ និងដំណាំផ្សេងៗ
- [ ] គ. ការចិញ្ចឹមសត្វលក់យកកម្រៃ
- [ ] ឃ.ការសាងសង់ផ្ទះក្បែរជើងភ្នំជិតមាត់ស្ទឹង

៦. តើមេសូត្របទពាក្យប្រាំពីរខាងលើ ក្នុងមួយវគ្គមានប៉ុន្មានឃ្លា? (១ពិន្ទុ)

- [ ] ក. មានបួនឃ្លា
- [ ] ខ. មានបីឃ្លា
- [ ] គ. មានប្រាំឃ្លា
- [ ] ឃ. មានប្រាំពីរឃ្លា

៧. តើមេសូត្របទពាក្យប្រាំពីរខាងលើ ក្នុងមួយឃ្លាមានប៉ុន្មានព្យាង្គ? (១ពិន្ទុ)

- [ ] ក. មានបួនព្យាង្គ
- [ ] ខ. មានប្រាំពីរព្យាង្គ
- [ ] គ. មានប្រាំព្យាង្គ
- [ ] ឃ. មានប្រាំមួយព្យាង្គ

៨. តើពាក្យ " ផ្ទះ " ក្នុងវគ្គទីមួយចួននឹងពាក្យអ្វី? (១ពិន្ទុ)

- [ ] ក. មួយ
- [ ] ខ. ភ្នំ
- [ ] គ. ស្រទន្ទ
- [ ] ឃ. ធំ

៩. តើពាក្យ " ភ្នំ "ក្នុងវគ្គទីមួយចួននឹងពាក្យអ្វីខ្លះ? (១ពិន្ទុ)

- [ ] ក. សង់ ស្ទឹង
- [ ] ខ. ផ្ទះ ស្រទន្ទ
- [ ] គ. ធំ ត្រសុំ
- [ ] ឃ. ម្លប់ សាខា

១០. ចូររកវេវចនសព្ទនឹងពាក្យ " ប្រប "។ (១ពិន្ទុ)

- [ ] ក. ជិត ក្បែរ
- [ ] ខ. ស្រប
- [ ] គ. បាក់
- [ ] ឃ. ប្រក់

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- បំណង ( )..........................................................................................................
- កម្រៃ ( )..........................................................................................................
- បណ្តុះ ( )..........................................................................................................

២. ចូរជ្រើសរើសពាក្យក្នុងប្រអប់ ទៅបំពេញចន្លោះវគ្គមេសូត្រខាងក្រោម។ (២ពិន្ទុ)

| ត្រសុំ | អាហារ | សាខា | ស្រទន្ទ | ធំ | ដំណាំ |
|---|---|---|---|---|---|

ខ្ញុំនឹកមមៃចង់បានផ្ទះ មួយតូច..............ក្បែរជើងភ្នំ
សង់ប្របមាត់ស្ទឹងមានឈើ.......... បែកមែក............ម្លប់.........។
នៅជុំជិតផ្ទះខ្ញុំនឹងដាំ អស់ទាំង............ធ្វើសួនច្បារ
ខ្ញុំព្រោះបណ្តុះឈើផ្លែផ្កា ទុកធ្វើ...........រៀងរាល់ថ្ងៃ។

៣. ចូរធ្វើកំណែពាក្យខុសដែលមានគូសបន្ទាត់ពីក្រោមឱ្យបានត្រឹមត្រូវឡើងវិញ។ (៣ពិន្ទុ)

| | |
|---|---|
| រួចខ្ញុំចឹញ្ចឹមឆ្កែសេសគោ | មាន់ទាមាន់ទោរយកកំរ៉ៃ |
| ថែទាំឱ្យធៀត់លក់យកថ្លៃ | បន្តកែខៃរាងរាល់ឆ្នាំ។ |
| ជីវភាពធូរធារព្រោះគុំនិត | ចេះឆ្នៃប្រឌិតផល់ដំណាំ |
| ឧស្សាដាំដុះមិនរង់ចាំ | បានផលរាល់ឆ្នាំលក់ទីផ្សារ។ |

កំណែពាក្យត្រូវ

............ ........... ..........

............ ........... ..........

............ ........... ..........

៤. ចូរតែងល្បះតាមរូបភាពខាងក្រោម។ (២ពិន្ទុ)





.................................................................................................................................................

.................................................................................................................................................

.................................................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៦០ រឿង ភូមិ ឃុំមានសុវត្ថិភាព

សាលាបឋមសិក្សា.................................

ឈ្មោះសិស្ស........................................



២០

**អំណាន** (១០ ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

[...] ស៊ីថាសួរទៅមីងម្នាក់ ៖

" សូមទោសមីង! តើគេកំពុងធ្វើអ្វី? " មីងឆ្លើយ ៖ " អូ ! ក្មួយ គេកំពុងមើលសេចក្តីប្រកាសព័ត៌មានថ្មី ដែលលោកមេឃុំទើបតែបិទផ្សាយឱ្យប្រជាជនឃុំយើងដឹង " ។ ប្រុញសួរបន្ត ៖ " តើព័ត៌មានអំពីអ្វីទៅមីង? " មីងឆ្លើយ ៖ " គឺជាព័ត៌មានស្តីពីភូមិ ឃុំមានសុវត្ថិភាព " ។ ស៊ីថាឆ្ងល់សួរទៀត ៖ " តើភូមិ ឃុំមានសុវត្ថិភាពនោះមានន័យដូចម្តេចទៅមីង? " មីងពន្យល់ ៖ " អូ! ល្អណាស់ក្មួយៗចេះឆ្ងល់នេះល្អហើយ " ។ ភូមិ ឃុំមានសុវត្ថិភាព មានន័យថា ភូមិ ឃុំ ដែលគ្មានប្រាំបួនប្រការដែលតម្រូវឱ្យមេភូមិ ប្រជាការពារ និងសហគមន៍យើងត្រូវរួបរួមសាមគ្គីគ្នា ដើម្បីថែរក្សាភូមិ ឃុំ ឱ្យបានសុខសាន្ត។ ប្រាំបួនប្រការនោះគឺ ៖ ១. គ្មានអំពើលួច ឆក់ប្លន់ ២. គ្មានការផលិត ចែកចាយ និងប្រើប្រាស់គ្រឿងញៀនខុសច្បាប់ ៣. គ្មានអំពើអនាចារ ការជួញដូរស្ត្រី កុមារ និងអំពើហិង្សាក្នុងគ្រួសារ ៤. គ្មានក្មេងទំនើង ៥. គ្មានការលេងល្បែងស៊ីសង គ្មានការប្រើប្រាស់អាវុធខុសច្បាប់ និងបទល្មើសគ្រប់ប្រភេទ ៦. គ្មានគ្រោះថ្នាក់ចរាចរណ៍ ៧. គ្មានគ្រោះថ្នាក់ដោយសារគ្រាប់យុទ្ធភ័ណ្ឌមិនទាន់ផ្ទុះ ៨. មានវិធានការទប់ស្កាត់ គ្រប់គ្រង និងឆ្លើយតបចំពោះគ្រោះមហន្តរាយប្រកបដោយប្រសិទ្ធភាព ៩. គ្មានការត្រួតពិនិត្យខុសច្បាប់។

ក្មេងទាំងពីរភ្ញាក់ព្រើត ញាក់មុខដាក់គ្នារួចឆ្លើយ ៖ " អូ ! ពួកខ្ញុំយល់ច្បាស់ហើយមីង ! អរគុណមីងច្រើន " ។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. តើមនុស្សជាច្រើនកំពុងប្រជ្រៀតគ្នាមើលអ្វី? (១ពិន្ទុ)

☐ក. សេចក្តីប្រកាសព័ត៌មាន ☐ខ. អ្នកទោសប្រើប្រាស់គ្រឿងញៀន

☐គ. គ្រោះថ្នាក់ចរាចរណ៍ ☐ឃ. ការប្រើប្រាស់អំពើហិង្សា

២. តើគេបិទសេចក្តីប្រកាសព័ត៌មាននោះនៅឯណា? (១ពិន្ទុ)

- ☐ក. នៅសាលារៀន ☐ខ. នៅមន្ទីរពេទ្យ
- ☐គ. នៅសាលាឃុំ ☐ឃ. នៅឯផ្សារ

៣. តើសេចក្តីប្រកាសព័ត៌មាននោះនិយាយអំពីអ្វី? (១ពិន្ទុ)

- ☐ក. ការទប់ស្កាត់អំពើហិង្សាក្នុងគ្រួសារ ☐ខ. ការទប់ស្កាត់ការលេងល្បែងស៊ីសង
- ☐គ. ភូមិ ឃុំមានសុវត្ថិភាព ☐ឃ. ការទប់ស្កាត់ការប្រើប្រាស់គ្រឿងញៀន

៤. តើភូមិ ឃុំមានសុវត្ថិភាពមានន័យដូចម្តេច? (១ពិន្ទុ)

- ☐ក. ភូមិ ឃុំ មានការយាមកាមត្រឹមត្រូវ ☐ខ. ភូមិ ឃុំ មានជីវភាពធូរធារ
- ☐គ. ភូមិ ឃុំ ដែលមិនមានចោរកម្ម ☐ឃ. ភូមិ ឃុំដែលគ្មានប្រាំបួនប្រការ

៥. ដើម្បីឱ្យភូមិ ឃុំ មានសុវត្ថិភាព តើត្រូវធ្វើដូចម្តេច? (១ពិន្ទុ)

- ☐ក. កុំប្រើប្រាស់គ្រឿងញៀន ☐ខ. មេឃុំត្រូវរឹតបន្តឹង
- ☐គ. មេភូមិ ប្រជាការពារ សហគមន៍រួមសាមគ្គីគ្នា ☐ឃ. ប៉ូលិសត្រូវយាមល្បាត

៦. តើកត្តាចម្បងណាមួយ ដែលធ្វើឱ្យមនុស្សញៀនថ្នាំ? (១ពិន្ទុ)

- ☐ក. ក្រីក្រ ☐ខ. ស្ថានភាពសង្គមបង្ខំ
- ☐គ. ចង់ដឹង ចង់សាក ☐ឃ. រាប់អានមិត្តភក្តិ

៧. តើការផលិតចែកចាយ និងប្រើប្រាស់គ្រឿងញៀនជាអំពើដូចម្តេច? (១ពិន្ទុ)

- ☐ក. ជួយសង្គមជាតិ ☐ខ. ជួយដល់គ្រួសារ
- ☐គ. អំពើមនុស្សធម៌ ☐ឃ. អំពើខុសច្បាប់

៨. តើ " ក្មេងទំនើង " មានន័យដូចម្តេច? (១ពិន្ទុ)

- ☐ក. ក្មេងស្តាប់បង្គាប់ ☐ខ. ក្មេងខិតខំរៀនសូត្រ
- ☐គ. ក្មេងរពឹស ☐ឃ. ក្មេងដែលធ្វើអ្វីតាមទំនើងចិត្តរបស់ខ្លួន

៩. ចូររកបដិសព្ទនឹងពាក្យ " ទុក្ខភ័យ "។ (១ពិន្ទុ)

- ☐ក. សុខសាន្ត ☐ខ. ព្រួយបារម្ភ
- ☐គ. ឈឺចាប់ ☐ឃ. មហន្តរាយ

១០. ចូររកវេវចនសព្ទនឹងពាក្យ " មហន្តរាយ "។ (១ពិន្ទុ)

- ☐ក. សេចក្តីសុខ ☐ខ. សេចក្តីវិនាស
- ☐គ. វឌ្ឍនភាព ☐ឃ. សុវត្ថិភាព

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- ហិង្សា ( )......................................................................................................
- អនាចារ ( )....................................................................................................
- ទំនើង ( )......................................................................................................

២. ចូរធ្វើកំណែពាក្យខុសដែលមានគូសបន្ទាត់ពីក្រោមឱ្យបានត្រឹមត្រូវឡើងវិញ។ (៣ពិន្ទុ)

| | |
|---|---|
| យើងរួមគ្នា<u>លប់</u>បំបាត់អំពើ<u>ចោរកាំ</u> ឆក់ប្លន់ ល្បែង<u>ស៊ីសង់</u>គ្រប់ប្រភេទ ការប្រើ<u>អាវុទ្ធ</u>ខុសច្បាប់ ការ<u>ផលឹត</u>ចែកចាយ <u>ប្រើប្រាស</u> <u>គ្រឿងញាន</u> ក្មេងទំនើង ការជួញដូស្ត្រី និងកុមារ និងអំពើ<u>ហឹង្សា</u>ក្នុងគ្រួសារ។ | <u>កំណែពាក្យត្រូវ</u><br>………… ………… ……….<br>………… ………… ……….<br>………… ………… ………. |

៣. ចូរយកពាក្យ ឬកន្សោមពាក្យក្នុងប្រអប់ខាងក្រោម ទៅរៀបជាល្បះ ឱ្យបានត្រឹមត្រូវ (២ពិន្ទុ)

| | | | | | | |
|---|---|---|---|---|---|---|
| សុវត្ថិភាព | ចូលរួម | រក្សា | ត្រូវ | យើង | ទាំងអស់គ្នា។ | ភូមិយើង |

……………………………………………………………………………………………………………

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| ប្រើប្រាស់ | ចែកចាយ | ផលិត | អ្នក | គ្រឿងញៀន | ទោស។ | និង | មាន | ត្រូវ |

……………………………………………………………………………………………………………

៤. ចូរតែងល្បះតាមរូបភាពខាងក្រោមឱ្យបានពីរល្បះ (២ពិន្ទុ)




……………………………………………………………………………………………………………

……………………………………………………………………………………………………………

……………………………………………………………………………………………………………

……………………………………………………………………………………………………………

……………………………………………………………………………………………………………

……………………………………………………………………………………………………………



# កិច្ចការផ្ទះ
## ភាសាខ្មែរ ថ្នាក់ទី៣
មេរៀនទី៦១ ឧបករណ៍តន្ត្រីខ្មែរ

សាលាបឋមសិក្សា................................
ឈ្មោះសិស្ស.......................................




**អំណាន** (១០ ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

តូរ្យតន្ត្រីខ្មែរ ជាសិល្បៈបុរាណ ដែលកើតឡើងអស់កាលដ៏យូរលង់មកហើយ។ បុព្វបុរសខ្មែរបានបង្កើតឧបករណ៍ភ្លេង និងនិពន្ធបទភ្លេងជាច្រើន ។

គ្រឿងភ្លេងបុរាណខ្មែររួមមាន ទ្រ ស្គរ តាខេ ឃឹម រនាត គង ស្រឡៃ ចាប៉ី សាដៀវ ឈិង ឆាប ក្រាប ។ល។ ឧបករណ៍ទាំងនេះងាយស្រួលធ្វើ ពុំលំបាកដូចគ្រឿងភ្លេងបរទេសទំនើបឡើយ ហើយក៏មិនចំណាយថវិកាច្រើនសម្រាប់ផលិតដែរ ។ ឧបករណ៍តន្ត្រីខ្មែរត្រូវបានប្រគំឡើងតាមរយៈ ការដេញ ដំ ផ្លុំ កូត ហើយការប្រគំបទភ្លេងស្របតាមពិធីបុណ្យប្រពៃណីផ្សេងៗ។រីឯបទភ្លេង បុរាណខ្មែរ អ្នកនិពន្ធរៀបចំតាមលំនាំធម្មជាតិដែលមានសំនៀងពីរោះលន្លង់លន្លោច ទន់ភ្លន់ ។ ឧបករណ៍ និងបទភ្លេងខ្មែរបុរាណគេយកទៅប្រើប្រាស់ក្នុងពិធីបុណ្យផ្សេងៗទៅតាមវង់ប្រគំ ដូចជាពិណពាទ្យ មហោរី ប្រពៃណី ឆៃយ៉ាំ យីកេ ល្ខោនជាដើម ។

យើងជាកូនខ្មែរត្រូវចេះស្រឡាញ់ និងថែរក្សាតូរ្យតន្ត្រីខ្មែរឱ្យបានគង់វង្ស នូវស្នាដៃខ្មែរជំនាន់ដើមដ៏ល្អវិសេសវិសាលសម្រាប់តម្កល់ទុកជាអត្តសញ្ញាណជាតិខ្មែរ។

“ វប្បធម៌ពណ្ណរាយ ជាតិថ្កើងថ្កាន ”

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវជាងគេ

១. តើអត្ថបទខាងលើនិយាយពីអ្វី? (១ពិន្ទុ)

☐ ក. ការថែរក្សាទំនៀមទម្លាប់ប្រពៃណី ☐ ខ. ការថែរក្សាអក្សរសាស្ត្រជាតិ

☐ គ. សិល្បៈខ្មែរ ☐ ឃ. ឧបករណ៍តន្ត្រីខ្មែរ

២. តើនរណាជាអ្នកបង្កើតឱ្យមានតូរ្យតន្ត្រីខ្មែរ? (១ពិន្ទុ)

☐ ក. ជនជាតិឥណ្ឌា ☐ ខ.ជនជាតិចិន

☐ គ. ជនជាតិថៃ ☐ ឃ. បុព្វបុរសខ្មែរ

៣. តើឧបករណ៍តន្ត្រីខ្មែរគេប្រគំឡើងតាមរបៀបប៉ុន្មានយ៉ាង? (១ពិន្ទុ)

☐ក. ពីររបៀប ☐ខ. បីរបៀប

☐គ. បួនរបៀប ☐ឃ. ប្រាំរបៀប

៤. តើបទភ្លេងបុរាណខ្មែរ ភាគច្រើននិពន្ធឡើងតាមលំនាំអ្វី? (១ពិន្ទុ)

☐ក. របាំសួគ៌ា ☐ខ. អាទិទេពក្នុងលទ្ធិព្រាហ្មណ៍

☐គ. ធម្មជាតិ ☐ឃ. ចម្លងតាមបរទេស

៥. តើភ្លេងពិណពាទ្យជារបស់ប្រទេសណា? (១ពិន្ទុ)

☐ក. ប្រទេសថៃ ☐ខ. ប្រទេសវៀតណាម

☐គ. ប្រទេសចិន ☐ឃ. ប្រទេសកម្ពុជា

៦ ចូរគូសភ្ជាប់ពាក្យទៅនឹងរូបភាពឱ្យបានត្រឹមត្រូវ។ (៥ពិន្ទុ)






ស្គរធំ ស្គរដៃ ស្រទៃ្ល ស្គរសម្ភោរ ខ្លុយ ស្គរឆៃយ៉ាំ រនាតដែក ទ្រសោ






**សំណេរ**( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- អត្តសញ្ញាណជាតិ ( )......................................................................................
- យីកេ ( )..........................................................................................................
- ឆៃយ៉ាំ ( )........................................................................................................

២. ចូរកែតម្រូវពាក្យខុសដែលមានគូសបន្ទាត់ពីក្រោមឱ្យបានត្រឹមត្រូវ (៣ពិន្ទុ)

| | |
|---|---|
| ដូរតន្ត្រីខ្មែរ ជាសិល្បះដែលបុព្វបុរសបានបង្កើតឧបករណ៍ជាច្រើន។ បតភ្លេងខ្មែរមានដូចជា បទបាខុនចងដៃ និងបទមហោរី។ បទភ្លេងខ្មែរ ភាគច្រើននិព័ន្ធឡើងតាមលំនាំធម្មជាត ហើយមានសំនាងពីរោះលន្ទុងលន្លោច មានភាពទុនភ្លន់។ វាទាក់ទងទៅនិងប្រវត្តសាស្រ្ត និងសង្គមសាសន៍។ | កំណែពាក្យត្រូវ<br>............ ........... ..........<br>............ ........... ..........<br>............ ........... ..........<br>............ ........... .......... |

៣. ចូររៀបល្បះខាងក្រោមឱ្យបានត្រឹមត្រូវ (២ពិន្ទុ)

| | | | | | | | |
|---|---|---|---|---|---|---|---|
| វប្បធម៌ | រលត់ | ជាតិ | ថ្លៃងថ្លានៗ | ពណ្ណរាយ | វប្បធម៌ | ជាតិ | រលាយ |

.................................................................................................................................

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| ពិត | ពិណពាទ្យ | ភ្លេង | ខ្មែរ | របស់ | ប្រាកដៗ | ជា | ភ្លេង | យ៉ាង |

.................................................................................................................................

៤. ចូរតែងល្បះទាក់ទងនឹងរូបភាពខាងក្រោមឱ្យបានពីរល្បះ (២ពិន្ទុ)



.................................................................................................................................
.................................................................................................................................
.................................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៦២ ខ្ញុំស្រឡាញ់ទឹកដីខ្មែរ

សាលាបឋមសិក្សា...............................

ឈ្មោះសិស្ស.......................................




**អំណាន** ( ១០ ពិន្ទុ )

ចូរច្រៀងចម្រៀងខាងក្រោម រួចឆ្លើយនឹងសំណួរ។

ដែនដីខ្មែរប្រែថាសុវណ្ណភូមិ
ជាដរាបតមកតាំងពីបុរាណ
ថ្ងៃមួយមានសត្រូវប្រទូសរ៉ាយ
សឹកសង្គ្រាមឈាមស្រស់លើប្រឹថពី
កម្ពុជាឯករាជ្យបានឃ្លាតពីទុក្ខ
សូមទេវតាឱ្យពរសព្វសាធុការ

ខ្មែរគ្រប់ភូមិរមណីយដ្ឋាន
ខ្មែរគ្រប់ប្រាណស្វាគមន៍សាមគ្គី។
ខ្មែរគ្រប់កាយសុខចិត្តប្តូរជីវី
ឱ! ព្រះភូមិឫទ្ធិវង្សគង្គា។
ខ្មែរបានសុខទាំងអស់គ្រប់អាត្មា
មហាក្សត្រយើងគ្រប់គ្រងផែនដី។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ (១០ពិន្ទុ)

១. តើដែនដីខ្មែរប្រែថាដូចម្តេច? (១ពិន្ទុ)

☐ ក. អាណាចក្រ
☐ ខ. សុវណ្ណភូមិ
☐ គ. មហានគរ
☐ ឃ. ទីទួលខ្ពស់

២. ពេលមានសត្រូវមកឈ្លានពាន តើប្រជាជនខ្មែរប្តេជ្ញាដូចម្តេច? (១ពិន្ទុ)

☐ ក. ចុះចាញ់
☐ ខ.ភៀសខ្លួន
☐ គ. ប្តូរជីវិត
☐ ឃ. ចុះចូល

៣. ចូរប្អូនផ្គូផ្គងពាក្យទៅនឹងអត្ថន័យនៃពាក្យឱ្យបានត្រឹមត្រូវ (៣ពិន្ទុ)

| ពាក្យ | អត្ថន័យ | ចម្លើយ |
|---|---|---|
| ១. ប្រឹថពី | ក. ភូមិមាស ដែនដីមាស។ | ១ → |
| ២. ប្រទូសរ៉ាយ | ខ. ផែនដី ផ្ទៃដីទាំងមូល។ | ២ → |
| ៣. សុវណ្ណភូមិ | គ. បៀតបៀន រករឿង រកហេតុធ្វើឱ្យអាក្រក់ឱ្យវិនាស។ | ៣ → |

៤. ចូរគូសភ្ជាប់ពី (ក) ទៅ (ខ) ទៅតាមថ្នាក់ពាក្យ នាម គុណនាម កិរិយាសព្ទ។ (៥ពិន្ទុ)

| ក | ខ |
|---|---|
| នាម | សុវណ្ណភូមិ<br>ប្រទូសរ៉ាយ<br>ដែនដី<br>ប្រយុទ្ធ<br>រមណីយដ្ឋាន |
| គុណនាម | ឈាម<br>ស្រស់<br>សាមគ្គី<br>ខ្ពស់<br>គ្រប់ |
| កិរិយាសព្ទ | សត្រូវ<br>ប្រទូសរ៉ាយ<br>ជីវិត<br>ប្តូរ<br>ប្រយុទ្ធ |

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- សត្រូវ (   )......................................................................................................
- សន្តិភាព (   )....................................................................................................
- សាមគ្គី (   )......................................................................................................

២. ចូរបំពេញវគ្គចម្រៀងខាងក្រោមឱ្យបានពេញលេញ។ (២ពិន្ទុ)

ដែនដីខ្មែរប្រែថា......................    ខ្មែរ......................រមណីយដ្ឋាន

ជាដរាបតមកតាំងពី................    ខ្មែរគ្រប់ប្រាណស្វាគមន៍.................។

ថ្ងៃមួយមានសត្រូវ...................    ខ្មែរគ្រប់កាយ........................ជីវី

.................ឈាមស្រស់លើប្រឹថពី    ឱ ! ព្រះភូមិ....................គង្គា។

៣.ចូរសរសេរតែងសេចក្តីពណ៌នាពីទីកន្លែងកម្សាន្តណាមួយដែលប្អូនធ្លាប់បានទៅលេងតាមគម្រោងខាងក្រោម។

គម្រោង

១. សេចក្តីផ្តើម

- ពេលវេលា
- ឈ្មោះទីកន្លែង

២. តួសេចក្តី

- ទិដ្ឋភាពរួម(ជាកន្លែងប្រមូលផ្តុំ.....)
- ទិដ្ឋភាពខាងក្នុង(រៀបរាប់ពីអ្វីដែលមើលឃើញនៅទីនោះ...)
- ភាពទាក់ទាញពីទីកន្លែងដែលបានឃើញឬទៅទស្សនា

៣.សេចក្តីបញ្ចប់

បង្ហាញពីចំណាប់អារម្មណ៍របស់ប្អូន និងអ្នកទៅទស្សនានៅទីនោះ។

សេចក្តីអធិប្បាយ

..................................................................................................................................................

..................................................................................................................................................

..................................................................................................................................................

..................................................................................................................................................

..................................................................................................................................................

..................................................................................................................................................

..................................................................................................................................................

..................................................................................................................................................

..................................................................................................................................................

..................................................................................................................................................

..................................................................................................................................................

..................................................................................................................................................

..................................................................................................................................................

..................................................................................................................................................

..................................................................................................................................................

..................................................................................................................................................

..................................................................................................................................................

..................................................................................................................................................

..................................................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៦៣ ផលប្រយោជន៍នៃបច្ចេកវិទ្យាព័ត៌មាន

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** (១០ ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

បច្ចេកវិទ្យាគមនាគមន៍ និងព័ត៌មានវិទ្យាតាមប្រព័ន្ធកុំព្យូទ័រ ឬទូរសព្ទដៃជាមធ្យោបាយមួយសម្រាប់ទាក់ទងគ្នាតាមបែបទំនើប និងរហ័សទាន់ចិត្ត។

បច្ចេកវិទ្យាគមនាគមន៍ និងព័ត៌មានវិទ្យាបានផ្តល់ និងចែករំលែកនូវចំណេះដឹង បទពិសោធជំនាញបច្ចេកទេស និងបំណិនជីវិតផ្សេងៗ រួមទាំងការរកឃើញថ្មីៗបំពេញឱ្យគ្នាទៅវិញទៅមក។ វាមិនចាំបាច់ចំណាយពេលវេលាដើម្បីបញ្ជូនតាមប្រៃសណីយ៍ រថយន្ត ឬអ្នកនាំសារនោះទេ។ ការបញ្ជូនសារ និងព័ត៌មានគ្រប់ប្រភេទនេះ មិនគ្រាន់តែរហ័សទាន់ចិត្តប៉ុណ្ណោះទេ ថែមទាំងជាមធ្យោបាយដ៏ប្រសើរដែលអាចរក្សាការសម្ងាត់ហើយភាគច្រើន គឺបានទៅដល់អ្នកទទួល ជាពិសេសទូរសព្ទដៃ។ សិស្សអាចទទួលព័ត៌មានតាមរយៈទូរសព្ទទំនើប។

ការរីកចម្រើននៃបច្ចេកវិទ្យាថ្មីៗនេះ មានសារប្រយោជន៍ដល់មនុស្សគ្រប់រូបលើពិភពលោក ក្នុងការផ្តល់ និងទទួលព័ត៌មានថ្មីៗ ដើម្បីរួមចំណែកអភិវឌ្ឍសមត្ថភាព។

គូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ

១. តើបច្ចេកវិទ្យាព័ត៌មានគេប្រើសម្រាប់ធ្វើអ្វី? (១ពិន្ទុ)

☐ ក. បង្អួតគ្នា ☐ ខ. ភាពស៊ីវិល័យ

☐ គ. កម្សាន្តសប្បាយ ☐ ឃ. ទាក់ទងគ្នា

២. តើបច្ចេកវិទ្យាព័ត៌មានមានលក្ខណៈពិសេសដូចម្តេច? (១ពិន្ទុ)

☐ ក. ងាយស្រួលប្រើ ☐ ខ. ងាយទុកដាក់

☐ គ. ចំណេញពេល និងរហ័សទាន់ចិត្ត ☐ ឃ. ចំណេញប្រាក់

៣. តើបច្ចេកវិទ្យាព័ត៌មាន មានសារប្រយោជន៍ដល់មនុស្សដូចម្តេច? (១ពិន្ទុ)

☐ក. បង្កើនប្រាក់ចំណូល ☐ខ. ផ្តល់ និងទទួលព័ត៌មាន

☐គ. សម្រួលដល់ការរស់នៅ ☐ឃ. បំបាត់ការអផ្សុក

៤. ហេតុអ្វីបានជាការនាំសារបច្ចុប្បន្នមានភាពឆាប់រហ័សជាងមុន? (១ពិន្ទុ)

☐ក. ដោយសារប្រព័ន្ធបច្ចេកវិទ្យា ☐ខ. ដោយសារផ្លូវគមនាគមន៍

☐គ. មានប្រៃសណីយ៍ ☐ឃ. មធ្យោបាយដឹកជញ្ជូនទំនើប

៥. ចូរគូសភ្ជាប់ពាក្យទៅនឹងអត្ថន័យរបស់ពាក្យ។ (៣ពិន្ទុ)

| ពាក្យ | អត្ថន័យ |
|---|---|
| - ប្រយោជន៍<br>- បច្ចេកវិទ្យាព័ត៌មាន<br>- រហ័ស | - ដែលឆាប់រួសរាន់ ដែលមិនយឺត។<br>- ដំណើរដែលគួរប្រកប ផលដែលសម្រេចអំពីការប្រកប។<br>- បច្ចេកទេសតាមបែបវិទ្យាសាស្ត្រ ដែលប្រើសម្រាប់បង្កើត ទទួល រក្សាទុក ប្រតិបត្តិ និងចែករំលែកព័ត៌មាន តាមរយៈគ្រឿងអេឡិចត្រូនិក រាប់បញ្ចូលទាំងកុំព្យូទ័រ ទូរសព្ទ ទូរទស្សន៍ វិទ្យុជាដើម។ |

៦. តាមរយៈតារាងខាងក្រោម ចូរគូសវង់ពាក្យ នាម គុណនាម និងកិរិយាសព្ទ។ (៣ពិន្ទុ)

| នាម | គុណនាម | កិរិយាសព្ទ |
|---|---|---|
| គមនាគមន៍ | ថ្មី | រថយន្ត |
| ប្រព័ន្ធ | ទូរសព្ទ | បញ្ជូន |
| កុំព្យូទ័រ | ទំនើប | ព័ត៌មាន |
| ប្រយោជន៍ | ទទួល | ជំនាញ |
| យឺត | ប្រសើរ | ទាក់ទង |

**សំណេរ** ( ១០ ពិន្ទុ )

១. ចូររកបដិសព្ទនឹងពាក្យ " បញ្ជូន ថ្មី លឿន "។ (៣ពិន្ទុ)

- បញ្ជូន.......................................................................................................
- ថ្មី.............................................................................................................
- លឿន........................................................................................................

២. ចូររកវេវចនសព្ទនឹងពាក្យ " ទាន់សម័យ "។ (១ពិន្ទុ)

.......................................................................................................................

៣. ចូររកសទិសសព្ទនឹងពាក្យ " វា "។ (២ពិន្ទុ)

.......................................................................................................................

.......................................................................................................................

.......................................................................................................................

៤. ចូររៀបពាក្យ ឬ កន្សោមពាក្យខាងក្រោមឱ្យបានជាល្បះត្រឹមត្រូវ។ (២ពិន្ទុ)

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| ការរស់នៅ | ដល់ | សម្រួល | ជួយ | បច្ចេកវិទ្យា | របស់ | បច្ចុប្បន្ន។ | នាសម័យ | មនុស្ស |

..........................................................................................................................

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| ព័ត៌មាន | យើង | ទំនើប។ | ទូរសព្ទដៃ | រៀន | តាមរយៈ | និង | ទទួល | អាច |

..........................................................................................................................

៥. ចូរតែងល្បះនឹងពាក្យខាងក្រោមឱ្យបានក្នុងមួយពាក្យ មួយល្បះ។ (២ពិន្ទុ)

គមនាគមន៍ : ..........................................................................................................

..........................................................................................................................

ទូរសព្ទដៃ : ..........................................................................................................

..........................................................................................................................



# កិច្ចការផ្ទះ
# ភាសាខ្មែរ ថ្នាក់ទី៣

មេរៀនទី៦៤ សមាគមអាស៊ាន

សាលាបឋមសិក្សា................................

ឈ្មោះសិស្ស.......................................




**អំណាន** (១០ ពិន្ទុ)

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ។

អាស៊ានជាសមាគមនៃប្រជាជាតិអាស៊ីអាគ្នេយ៍ដែលមានដប់ប្រទេសជាសមាជិក។ សមាគមអាស៊ានត្រូវបានបង្កើតឡើងនៅថ្ងៃទី០៨ ខែសីហា ឆ្នាំ១៩៦៧។

ប្រទេសជាសមាជិកអាស៊ានមាន ឥណ្ឌូណេស៊ី ម៉ាឡេស៊ី ហ្វីលីពីន សិង្ហបុរី ថៃ ប្រ៊ុយណេ ឡាវ មីយ៉ាន់ម៉ា វៀតណាម និងព្រះរាជាណាចក្រកម្ពុជា។ អាស៊ានមានទង់និមិត្តសញ្ញាទៅតាមលក្ខណៈនៃប្រទេសក្នុងតំបន់។ ទង់ប្រជាជាតិអាស៊ានតំណាងឱ្យសមាគមអាស៊ានមួយ ដែលមានស្ថិរភាព សន្តិភាព រួបរួមគ្នាប្រកបដោយថាមពល។ សមាគមនេះបង្កើតឡើង ដើម្បីលើកកម្ពស់វិស័យវប្បធម៌ សេដ្ឋកិច្ច វឌ្ឍនភាពនយោបាយ និងពង្រឹងទំនាក់ទំនងនៅតំបន់អាស៊ីអាគ្នេយ៍។

នៅឆ្នាំ ២០១២ ព្រះរាជាណាចក្រកម្ពុជា គឺជាប្រធានអាស៊ាន ។ តួនាទីនេះជាមោទនភាពជាតិមួយ ដ៏ឧត្តុង្គឧត្តមរបស់ជាតិខ្មែរយើង។

ចូរគូសសញ្ញា √ ក្នុងប្រអប់ ☐ ចម្លើយមួយដែលត្រឹមត្រូវ

១. តើអាស៊ានមានប្រទេសជាសមាជិកចំនួនប៉ុន្មាន? (១ពិន្ទុ)

☐ក. ប្រាំប្រទេស ☐ខ. ប្រាំពីរប្រទេស

☐គ. ប្រាំបួនប្រទេស ☐ឃ. ដប់ប្រទេស

២. តើសមាគមអាស៊ានត្រូវបានបង្កើតឡើងនៅថ្ងៃ ខែ ឆ្នាំណា? (១ពិន្ទុ)

☐ក. ០៨ សីហា ១៩៧៦ ☐ខ. ០៨ សីហា ១៩៦៧

☐គ. ០៨ សីហា ១៩៩៧ ☐ឃ. ០៨ សីហា ១៩៦៩

៣. តើអាស៊ានមានទង់និមិត្តសញ្ញាដូចម្ដេច? (១ពិន្ទុ)

☐ក. រូបផ្កាយ ☐ខ. រូបអង្គរវត្ត

☐គ. តាមលក្ខណៈនៃប្រទេសក្នុងតំបន់ ☐ឃ. រូបចាប់ដៃគ្នា

៤. តើនិមិត្តសញ្ញា និងទង់អាស៊ានមានប៉ុន្មានពណ៌? (១ពិន្ទុ)

☐ក. បីពណ៌ ☐ខ. បួនពណ៌

☐គ. ពីរពណ៌ ☐ឃ. ប្រាំពណ៌

៥. តើសមាគមនៃប្រជាជាតិអាស៊ីអាគ្នេយ៍ដែលមានដប់ប្រទេសជាសមាជិកហៅកាត់ថាអ្វី? (១ពិន្ទុ)

☐ក. សមាគម ☐ខ. អាស៊ីអាគ្នេយ៍

☐គ. សហប្រជាជាតិ ☐ឃ. អាស៊ាន

៦. តើព្រះរាជាណាចក្រកម្ពុជា ធ្វើជាប្រធានអាស៊ាននៅឆ្នាំណា? (១ពិន្ទុ)

☐ក. ២០១២ ☐ខ. ២០១៤

☐គ. ២០១៥ ☐ឃ. ២០១៣

៧. ចូរគូសភ្ជាប់ ពណ៌ ទៅនឹងអត្ថន័យ នៃពណ៌និមិត្តសញ្ញា និងទង់អាស៊ាន។ (៤ពិន្ទុ)

| ពណ៌ | អត្ថន័យ |
|---|---|
| - ពណ៌ខៀវ | - តំណាងឱ្យវិបុលភាព ភាពសម្បូរសប្បាយ។ |
| - ពណ៌ក្រហម | - តំណាងឱ្យភាពបរិសុទ្ធ ស្អាតស្អំ។ |
| - ពណ៌ស | - តំណាងឱ្យសេចក្ដីក្លាហាន និងភាពស្វាហាប់ ថាមពល។ |
| - ពណ៌លឿង | - តំណាងឱ្យសន្តិភាព និងស្ថិរភាព។ |

**សំណេរ** ( ១០ ពិន្ទុ )

១. ចូរពន្យល់ពាក្យខាងក្រោម។ (៣ពិន្ទុ)

- សមាគម ( ).................................................................................................
- សមាជិក ( ).................................................................................................
- វឌ្ឍនភាព ( )...............................................................................................

២. ចូររៀបរាប់ឈ្មោះប្រទេសជាសមាជិកអាស៊ានទាំងដប់។ (២ពិន្ទុ)

.........................................................................................................................

.........................................................................................................................

.........................................................................................................................

៣. តើទង់ប្រជាជាតិអាស៊ានតំណាងឱ្យអ្វី? (២ពិន្ទុ)

.........................................................................................................................

.........................................................................................................................

.........................................................................................................................

ព្រះរាជាណាចក្រកម្ពុជា

ជាតិ សាសនា ព្រះមហាក្សត្រ

ក្រសួងអប់រំ យុវជន និងកីឡា

អគ្គនាយកដ្ឋានអប់រំ

នាយកដ្ឋានបឋមសិក្សា

## បញ្ជីសន្លឹកកិច្ចការភាសាខ្មែរ ថ្នាក់ទី៣

| ល.រ | ខ្លឹមសារកិច្ចការផ្ទះ | ចំនួនកិច្ចការ |
|---|---|---|
| សរុបរួម | | 59 |
| ឆមាសទី១ | | 35 |
| 1 | មេរៀនទី១ សាលាកុមារមេត្រី | 1 |
| 2 | មេរៀនទី២ វេចនសព្ទ | 1 |
| 3 | មេរៀនទី៣ សិស្សឧស្សាហ៍ | 1 |
| 4 | មេរៀនទី៤ ការសម្អាតថ្នាក់រៀន | 1 |
| 5 | មេរៀនទី៥ ពាក្យចួន | 1 |
| 6 | មេរៀនទី៦ ពេលគោរពទង់ជាតិ | 1 |
| 7 | មេរៀនទី៧ ការប្រាប់ព័ត៌មានផ្ទាល់ខ្លួន | 1 |
| 8 | មេរៀនទី៨ រឿងទឹកចិត្តដ៏ប្រពៃ | 1 |
| 9 | មេរៀនទី៩ សិស្សគំរូ | 1 |
| 10 | មេរៀនទី១០ សមាជិកគ្រួសារខ្ញុំ | 1 |
| 11 | មេរៀនទី១១ បដិសព្ទ | 1 |
| 12 | មេរៀនទី១២ គុណម្ដាយឪពុក | 1 |
| 13 | មេរៀនទី១៣ ការពណ៌នាអំពីមនុស្ស | 1 |
| 14 | មេរៀនទី១៤ រឿងគោ ក្របីគ្មានធ្មេញលើ | 1 |
| 15 | មេរៀនទី១៥ អំពីនាម | 1 |
| 16 | មេរៀនទី១៦ អ្នកមានគុណ | 1 |
| 17 | មេរៀនទី១៧ អនាម័យ | 1 |
| 18 | មេរៀនទី១៨ កិច្ចការយើងនៅផ្ទះ | 1 |
| 19 | មេរៀនទី១៩ តួអង្គ | 1 |
| 20 | មេរៀនទី២០ មេរៀនកូនចាំ | 1 |

| | | |
|---|---|---|
| 21 | មេរៀនទី២១ សញ្ញាខណ្ឌ " ។ " | 1 |
| 22 | មេរៀនទី២២ រឿង កុមារចេះសន្សំសំចៃ | 1 |
| 23 | មេរៀនទី២៣ ការពណ៌នាអំពីសត្វ | 1 |
| 24 | មេរៀនទី២៤ អ្នកជិតខាងល្អ | 1 |
| 25 | មេរៀនទី២៥ សទិសសព្ទ | 1 |
| 26 | មេរៀនទី២៦ ពិធីបុណ្យដារលាននៅភូមិខ្ញុំ | 1 |
| 27 | មេរៀនទី២៧ អំពីគុណនាម | 1 |
| 28 | មេរៀនទី២៨ ល្បែងបោះអង្គញ់ | 1 |
| 29 | មេរៀនទី២៩ ការណែនាំទីកន្លែងទេសចរណ៍ក្នុងភូមិ | 1 |
| 30 | មេរៀនទី៣០ ទឹកជំនន់នៅភូមិខ្ញុំ | 1 |
| 31 | មេរៀនទី៣១ ការស្គាល់ហេតុ និងផល | 1 |
| 32 | មេរៀនទី៣២ មុខរបរចិញ្ចឹមត្រី | 1 |
| 33 | មេរៀនទី៣៣ ការរៀបរាប់ពីសុខភាព និងអាកាសធាតុ | 1 |
| 34 | មេរៀនទី៣៤ ការលក់ដូរ | 1 |
| 35 | មេរៀនទី៣៥ អំពីកិរិយា | 1 |
| **ឆមាសទី២** | | **24** |
| 1 | មេរៀនទី៣៦ ការហាត់ប្រាណ | 1 |
| 2 | មេរៀនទី៣៧ យើងទៅមណ្ឌលសុខភាព | 1 |
| 3 | មេរៀនទី៣៨ ពណ៌នាអំពីព្រឹត្តិការណ៍ | 1 |
| 4 | មេរៀនទី៣៩ ទោសនៃគ្រឿងញៀន | 1 |
| 5 | មេរៀនទី៤០ រៀបរាប់ពីសមាជិកគ្រួសារ និងមុខរបរ | 1 |
| 6 | មេរៀនទី៤១ ឥទ្ធិពលនៃគ្រឿងស្រវឹង | 1 |
| 7 | មេរៀនទី៤២ សញ្ញាសួរ "  " ដល់ មេរៀន៤៣ សិប្បកម្មថ្មកែវ | 1 |
| 8 | មេរៀនទី៤៤ ដំណាំដំឡូងមី | 1 |
| 9 | មេរៀនទី៤៥ ការពណ៌នាពីទីកន្លែង | 1 |
| 10 | មេរៀនទី៤៦ សុជីវធម៌តាមទីសាធារណៈ ដល់មេរៀនទី៤៧ មូសិកទន្ត ឬធ្មេញកណ្ដុរ " ◌៉ " | 1 |
| 11 | មេរៀនទី៤៨ បកស្រាយភ្លើង និងផ្លាកសញ្ញាចរាចរណ៍ ដល់មេរៀនទី៤៩ ផ្លាកសញ្ញាសុវត្ថិភាពនានា | 1 |
| 12 | មេរៀនទី៥០ សមិទ្ធផលថ្មីៗ | 1 |
| 13 | មេរៀនទី៥១ រឿងទឹកចិត្តប៉ូលិស | 1 |
| 14 | មេរៀនទី៥២ ត្រីសព្ទ ឬសញ្ញាសក់ ក " ◌៎ " និងមេរៀនទី ៥៣ បុណ្យសមុទ្រ | 1 |

| | | |
|---|---|---|
| 15 | មេរៀនទី៥៤ រឿងភាពស្មោះត្រង់ | 1 |
| 16 | មេរៀនទី៥៥ បកស្រាយរូបភាព " ការសម្អាតបរិស្ថាន " | 1 |
| 17 | មេរៀនទី៥៦ កន្លែងទេសចរណ៍ក្នុងប្រទេសកម្ពុជា និងមេរៀនទី៥៧ បន្តក់ " ់ " | 1 |
| 18 | មេរៀនទី៥៨ ធនធានធម្មជាតិ | 1 |
| 19 | មេរៀនទី៥៩ បំណងខ្ញុំ | 1 |
| 20 | មេរៀនទី៦០ រឿង ភូមិ ឃុំមានសុវត្ថិភាព | 1 |
| 21 | មេរៀនទី៦១ ឧបករណ៍តន្ត្រីខ្មែរ | 1 |
| 22 | មេរៀនទី៦២ ខ្ញុំស្រឡាញ់ទឹកដីខ្មែរ | 1 |
| 23 | មេរៀនទី៦៣ ផលប្រយោជន៍នៃបច្ចេកវិទ្យាព័ត៌មាន | 1 |
| 24 | មេរៀនទី៦៤ សមាគមអាស៊ាន | 1 |